សារព័ត៌មាន ខ្មែរផុស ស.រ.អ.
KhmerPost USA
E-mail: info@khmerpost.us / Website : khmerpost.us
Advertising: 978-656-8141/ Hotline news: 1 (267) 253-3947

មាតិការរឿង Vol 07 Issue 136- August 23rd- Sept 12th, 2013





New Office: Tel: (978) 677-7163 Fax: (978) 677-7092
45 Merrimack St. Suite 218A Lowell, MA 01852

# ខ្មែរ_អាមេរិកាំងធ្វើមហាបាតុកម្មអហឹង្សា នៅអង្គការសហប្រជាជាតិ

**ដោយៈ អ៊ុម លឿម** ●●●ដូចការគ្រោងទុកពលរដ្ឋខ្មែរ-អាមេរិកាំងបានសម្រេចធ្វើមហាបាតុកម្មដ៏ធំមួយ កាលពីថ្ងៃច័ន្ទ ទី១៩ ខែសីហា កន្លងមកនេះ នៅពីមុខទីស្នាក់ការអង្គការសហប្រជាជាតិនាបូរីញូយ៉កដោយមានការចូលរួមពីសំណាក់បាតុករមកពីបណ្តារដ្ឋមួយចំនួនក្នុងសហរដ្ឋអាមេរិកប្រមាណជាង២០០០នាក់ ។

ក្រៅពីព្រះសង្ឃជយន្តោប្រទានពរជ័យដល់ក្រុមបាតុករដែលអង្គុយត្រៀបត្រារួចមកក្រុមបាតុករក៏ច្រៀងចំរៀងស្នេហាជាតិយ៉ាងកងរំពងដែលជាហេតុធ្វើឱ្យមានការចាប់អារម្មណ៍យ៉ាងខ្លាំងពីសំណាក់ភ្ញៀវទេសចរណ៍ជាតិដែលធ្វើដំណើរឆ្លងកាត់ ។ ក្រៅពីនោះ បដាពាក្យស្លោកជាច្រើនត្រូវបានលើកបង្ហាញយ៉ាងព្រោងព្រាតនឹងតាមឧឃោសនៈស័ព្ទក្នុងការរកអន្តរាគមន៍ពីមន្ត្រីអង្គការសហប្រជាជាតិចំពោះករណីដែលពួកគេលើកឡើងថា ការបោះកាលពីថ្ងៃទី២៨ កក្កដា កន្លងមកនេះ ជាការបោះឆ្នោតដោយពុំត្រឹមត្រូវ និងពុំយុត្តិធម៌ ព្រោះមានការបន្លំសន្លឹកឆ្នោតពីគណបក្សប្រជាជនកម្ពុជា ក្រោមការជួយជ្រោមជ្រែងពីគណៈកម្មាធិការជាតិរៀបចំការបោះឆ្នោត (គ.ជ.ប) ។







តាមការឱ្យដឹងពីអ្នកទទួលបន្ទុករៀបចំក្បួនបាតុកម្មម្នាក់ គឺលោក មាស ជា បានឱ្យ"ខ្មែរផុស"ដឹងថា : តំណាងក្រុមបាតុករចំនួនពីរក្រុមផ្សេងគ្នា គឺក្រុមគណបក្សសង្គ្រោះជាតិ និងតំណាងក្រុមពលរដ្ឋខ្មែរ-អាមេរិកត្រូវបានចូលជួបមន្ត្រីអង្គការសហប្រជាជាតិដើម្បីប្រគល់ញត្តិជូនមន្ត្រីផ្លូវការនៅទីនោះ ។ ទោះបីជាមានក្រុមចំនួនពីរផ្សេងគ្នាយ៉ាងណាក្តី ប៉ុន្តែខ្លឹមសារចម្បងរបស់ញត្តិហាក់មានអត្ថន័យ តទៅទំព័រទី ១០

## វិចារណកថា

## ចៅហ្វាយក្រុងឡូវែល សរសើរខ្មែរផុសស.រ.អ.

យើងសូមថ្លែងអំណរគុណដល់ចៅហ្វាយក្រុង ប៉ាទ្រិក ម័រហ្វី គណក្រុមប្រឹក្សាក្រុងនឹងនាយកគ្រប់គ្រងសាលាក្រុងឡូវែលដែលបានចេញលិខិតអបអរសាទរទទួលខ្មែរផុស

ជាពាណិជ្ជកម្មថ្មីមកចូលរួមរស់ក្នុងតំបន់ ហើយផ្តល់ការកោតសរសើរថា មានសារសំខាន់ តទៅទំព័រទី ០៨

## 2013 Southeast Asian Water Festival Attracts Numerous Number of Visitors and Vendors

## បុណ្យអុំទូកអាស៊ីអាគ្នេយ៍ឆ្នាំ២០១៣នៅឡូវែលកាន់តែអ៊ូអរ

**ដោយ : សុខា**

**ក្រុងឡូវែលៈ**តាមបណ្តោយដងស្ទឹងមែរីម៉ាក Merrimack River (ដងស្ទឹងឡូវែល) គិតចាប់ពីម៉ោង៩ព្រឹកតទៅសំបូរដោយមនុស្សម្នារកកកុញទាំងក្មេង ចាស់ ប្រុស ស្រី ដែលជាអ្នកចូលរួមពិធីបុណ្យអុំទូកជាពិធីបុណ្យមួយប្រារព្ធឡើងរំឭកពីវប្បធម៌អាស៊ីអាគ្នេយ៍ខណៈដែលប្រជាជននៃជាតិសាសន៍នេះរស់នៅប្រទេសអាមេរិក។ រាល់ឆ្នាំទទឹមនឹងការប្រណាំងទូក និងការសម្តែងពិធីបុណ្យអុំទូកនេះ ជាថ្ងៃដ៏ពិសេសមួយដែល តទៅទំព័រទី ០៧




# CENTURY PHARMACY & OPTICAL

**937 Gorham St** **ALL MAJOR INSURANCES ACCEPTED** **Tel. 978-455-6554**

- ទទួល និងផ្ញើវេជ្ជបញ្ជាដោយឥតគិតថ្លៃ
- យកចិត្តទុកដាក់ខ្ពស់ដល់អតិថិជនគ្រប់រូប
- ទទួលគ្រប់ប័ណ្ណធានារ៉ាប់រងទាំង មេឌីឃែរ (Medicare) និងមេឌីឃេដ (Medicaid)
- អាចបង់ប្រាក់ដោយលុយសុទ្ធ,ម៉ាន់នីអ័រដឺ (Money order) ឬដោយចម្លង/ បញ្ជូនតាមទូរសារ
- អាចជួយចំណាយរួមគ្នា បើត្រូវតាមលក្ខណខណ្ឌ
- យើងមានជំនាញខាងជំងឺឆ្លង និងជំងឺរ៉ាំរ៉ៃ
- មានកញ្ចប់ពិសេសជូន

- FREE PRESCRIPTION PICK UP AND DELIVERY
- Co-Pay assistance available to those who qualify
- Bill Pay, Money Orders, fax/copies




អាស័យដ្ឋាន : 937 Gorham St Lowell, MA 01852
ទូរស័ព្ទ : 978-455-6554 / ទូរសារ : 978-455-9476

# ដល់ពេលជ្រើសយកអាវុធ តើនរណានឹងកាន់អ្វី?

ដោយ : ពិន សំខុន

សប្តាហ៍ទី៣នៃខែសីហា ២០១៣ គ.ជ.ប. ទើបតែប្រកាសលទ្ធផលបណ្តោះអាសន្ននៃការបោះឆ្នោតថ្មីៗ ឱ្យគណបក្សប្រជាជនឈ្នះ៦៣អាសនៈ នឹងគណបក្សសង្គ្រោះជាតិចាញ់បានតែ៥៥អាសនៈ ពលរដ្ឋខ្មែររង់ចាំសញ្ញា ដើម្បីធ្វើបាតុកម្មបង្ហាញឆន្ទៈថា "គ.ជ.ប. បានលួចសន្លឹកឆ្នោតឱ្យគណបក្សកាន់អំណាចឈ្នះត្រូវតែរកយុត្តិធម៌ឱ្យឃើញ" ។ លោក សម រង្ស៊ី ប្រធានគណបក្សសង្គ្រោះជាតិ នៅពេលចុះពីយន្តហោះមកពីការកូនស្រីនៅស.រ.អា។ ប្រឈមមុខនឹងការដឹកនាំបាតុកម្មអហឹង្សាមួយដែលលោក ហ៊ុន សែន ត្រៀមប្រើកម្លាំងទ័ពសម្រាប់ទប់ស្កាត់។ តើជម្រើសនៃមេដឹកនាំទាំង២នាក់មានអ្វីខ្លះ?

សម រង្ស៊ី សច្ចាថា នឹងប្តូរនាយករដ្ឋមន្ត្រីខ្មែរឱ្យទាល់តែបាន -ហ៊ុន សែន សច្ចាថា នឹងធ្វើនាយករដ្ឋមន្ត្រីរហូតដល់អាយុ៩០ ។ សម រង្ស៊ី សំអាងកម្លាំងបាតុកម្មប្រជាពលរដ្ឋដែលទើបនឹងរីករឹងមាំ -ហ៊ុន សែន សំអាង កម្លាំងនគរបាលជាតិនឹងកងខេមរភូមិន្ទ ដើម្បីទប់ស្កាត់សកម្មភាពក្រុមបាតុករ ។ គេសង្ឃឹមថា នឹងឃើញអំពើហិង្សាផ្ទុះឡើងពេញប្រទេស ហើយព្រឹត្តិការណ៍នេះនឹងបង្កើនអ្នកគាំទ្រដល់ក្រុមទាំង២ ឬក៏ក្រុមណាតែម្ខាងដែលអាចប្តូរតុល្យភាពនៃកម្លាំងឈ្នះចាញ់បាន តើហេតុអ្វីក៏មេអាប៉ោងគ.ជ.ប.មិនព្រមបើក





គ្របឱ្យគេឃើញថា អាចោរជើងមួយនោះ វាចេញក្រឡាអ្វី? តែអនិច្ចាមេអាប៉ោងដ៏មានល្បិចនោះ វាគ្រាន់តែថា "អាប៉ោងវាចេញលេខ៤" តែមិនបើកគ្របឱ្យគេមើលទេ វាសម្រេចស៊ីសងតែម្តង ។ នៅចំពោះមុខ "អំណាចនៃសត្វចចក ហ៊ុន សែន កូនចៀម សម រង្ស៊ី គ្មានជម្រើសអ្វីក្រៅពីប្រមូលកម្លាំងដណ្តើមយកកម្មសិទ្ធខ្លួនមកវិញនោះទេ" ហ៊ានក៏ដោយសារកូនចៀម ពេលនេះពុំដូចពេលមុនទេ គឺជា "ដីរ៍"ដែលមានការសម្រេចចិត្តច្បាស់លាស់... គណបក្សសង្គ្រោះជាតិអាចប្រើកម្លាំងជាតិប្រមូលផ្តុំពលរដ្ឋរហូតដល់ធ្វើកុបកម្មទម្លាក់នាយករដ្ឋមន្ត្រីទម្លាក់រដ្ឋាភិបាល នឹងរំលាយទាំងគណបក្សប្រជាជន ឬក៏អាចបង្កសង្គ្រាមស៊ីវិលបានទៀតផងក៏មិនដឹង...តែគួរចាំថា "ពេលដែលបាតុកម្មផ្ទុះហើយនោះ លទ្ធផលនៃការបោះឆ្នោតនិងគ្មានន័យអ្វីទៀតហើយ"។ កម្លាំងរដ្ឋាភិបាលលោក ហ៊ុន សែន ទោះជាមានប្រើអាវុធ ឬផ្សែងពុល ឬទ័ពវៀតណាម ពេលនេះនៅមិនគ្រប់គ្រាន់ទេ គឺត្រូវការឱ្យមានភាពជាក់ច្បាស់ពីសហការណ៍មិត្តរួមគណបក្ស ពីព្រះមហាក្សត្រដែលកំពុងថៃព្រះកាយនៅបេយឹង ពីប្រទេសចិន មិនត្រូវភ្លេចជាមួយវៀតណាមស្រាប់ ។ ចំណែកគណបក្សសង្គ្រោះជាតិមានសង្ឃឹមយ៉ាងមាំថា នៅពេលមានបាតុកម្ម ឬកុបកម្មប្រជាពលរដ្ឋផ្ទុះឡើងនឹងមានទ័ពមហាអំណាចបច្ចិមប្រទេស ជាពិសេស អ.ស.ប.(ហក់មកជួយជាមិនខានតែបាន ហ៊ុន សែន ខំទប់ស្កាត់ដោយមិនឱ្យមានហឹង្សាមុនបោះឆ្នោតនឹងល្បិចពន្យាពេលផ្ទុះបាតុកម្មដ៏សែនគ្រោះថ្នាក់នោះ ឱ្យទៅកាន់តែឆ្ងាយពេល

តទៅទំព័រ ១៨

# សន្តិសីទសារព័ត៌មាន

Comcast,Cities ចាប់ផ្តើមឆ្នាំទីបីនៃកម្មវិធីជាតិជាផ្លូវការ ដើម្បីផ្សារភ្ជាប់ការបែកចែកឌីជីថល

Comcast ប្រកាសនូវការកើនឡើងនៃល្បឿនទាញយកបីដងសម្រាប់អតិថិជនចាប់តាំងពីការដាក់ដំណើរការកម្មវិធី

**Miami, FL** - ថ្ងៃទី ១៣ ខែសីហា ឆ្នាំ២០១៣ -ជាមួយនឹងការចាប់ផ្តើមឆ្នាំសិក្សាថ្មី Comcast កំពុងតែដាក់ឱ្យដំណើរការឡើងវិញ នូវអ៊ីនធឺណិតមូលដ្ឋានដែលជាកម្មវិធីផ្តួចផ្តើមដាក់ដំណើរការប្រព័ន្ធប្រ៊ដប៊ែនដ៏ធំបំផុតរបស់ប្រទេសសម្រាប់គ្រួសារដែលមានប្រាក់ចំណូលទាប ។ ថ្ងៃនេះសមាជិកាសភា Frederica Wilson, Alberto Carvalho អភិបាលនៃ Miami Dade County School, ប្រធាន Miami Dade League of Cities nig Deede Weithorn ចៅហ្វាយតំបន់ Miami Beach ព្រមទាំង Comcast David L Cohen អនុធិបតីប្រតិបិត្តនៃ Comcast រួមជាមួយនឹងអ្នកដឹកនាំជាពលរដ្ឋ និងសហគមន៍បានដាក់ដំណើរការឆ្នាំទីបីនៃកម្មវិធី ហើយបានប្រកាសថា ក្នុងអំឡុងប្រហែលជា២២ខែនេះ មានគ្រួសារច្រើនជាង២២០,០០០គ្រួសារ ដែលមានជនជាតិអាមេរិកមានប្រាក់ចំណូលទាមចំនួន៩០០.០០០នាក់នៅទូទាំងប្រទេសទទួលការតភ្ជាប់ប្រ៊ដប៊ែននៅផ្ទះ ។ នេះមានរួមបញ្ចូលទាំងគ្រួសារជិត



Comcast Launched year three of Internet Essentials with a surprise for 5 families that have recently graduated from Chapman Partnership for Homeless program and are living on their own; they all received free netbook computers and one year's worth of Internet Essentials service for free. Cohen told a group of more than 100 political and civic leaders gathered at the Chapman Partnership in Miami that in the last six months alone, 70,000 new families have signed up for the program. He said the program is now benefitting an estimated 900,000 low-income Americans nationwide, who now have a broadband connection at home. This includes nearly 18,700 families in the South Florida area and nearly 30,000 in the state of Florida. Cohen (back row left) was joined by Comcast's Regional Senior Vice President/Florida, Amy Smith (back row center) and Comcast's Regional Vice President of Government Affairs and Community Investment in Florida, Derek Cooper (back row, right)

១៨,៧០០នៅក្នុងតំបន់ South Florida និងប្រហែលជា៣០,០០០គ្រួសារនៅក្នុង Florida ។

លោក Carvalho បានមានប្រសាសន៍ថា "សម្រាប់សិស្សានុសិស្សសព្វថ្ងៃនេះ ការចេះអានចេះសរសេរខាងឌីជីថល គឺពុំមែនគ្រាន់តែជាជម្រើសទៀតឡើយ ប៉ុន្តែវាគឺជាការចាំបាច់" ។

លោក Cohen បានមានប្រសាសន៍ថា "សូមថ្លែងអំណរគុណចំពោះអ្នកដឹកនាំសហគមន៍ និងសាលារៀននៅទូទាំងប្រទេសដែលឥឡូវនេះគ្រួសារច្រើនមានឱកាសប្រើថាមពលអ៊ីនធឺណិតនៅផ្ទះ ដើម្បីឈានមុខក្នុងការងារ ការអប់រំ និងការរស់នៅដោយគ្រាន់តែធ្វើៗអ្វីលើបណ្តាញដែលយើងរាល់គ្នាភាគច្រើនបានធ្វើ ដូចជាការធ្វើកិច្ចការសាលារៀននៅផ្ទះការដាក់ពាក្យសុំការងារការស្រាវជ្រាវស្ថានភាពសុខភាព ឬការបង់វិក្កយប័ត្រជាដើម" ។

កម្លាំងចលនានៃ Internet Essentials បន្តកើនឡើង។ ចាប់តាំងពីការដាក់ឱ្យដំណើរការនូវកម្មវិធីនៅក្នុងខែសីហា ឆ្នាំ២០១១ មក Internet Essentials បានចុះឈ្មោះគ្រួសារថ្មីចំនួន៥០,០០០គ្រួសាររៀងរាល់ប្រាំមួយខែ។ នៅក្នុងរយៈពេលតែប្រាំមួយខែចុងក្រោយប៉ុណ្ណោះ មានគ្រួសារថ្មីចំនួន៧០,០០០ហើយដែលបានចុះឈ្មោះ។ បន្ថែមលើនេះទៀត Comcast បានបរិច្ចាកកុំព្យូទ័រច្រើនជាង១៨,០០០គ្រឿងបណ្តុះបណ្តាលប្រជាជនប្រហែល២០,០០០នាក់ចេញផ្សាយកម្មវិធីនៅក្នុងច្រើនជាង៤,០០០តំបន់សាលារៀន និងច្រើនជាង ៣០,០០០សាលារៀនចេញសេចក្តីប្រកាសសេវាកម្មសាធារណៈប្រហែល២លាន និងចូលជាដៃគូជាមួយនឹងអង្គការទីភ្នាក់ងារ និងមន្ត្រីពាក់ព័ន្ធនឹងសហគមន៍ច្រើនជាង៧,០០០ ក្នុងគោលបំណងជួយផ្សព្វផ្សាយអំពីកម្មវិធីទៅកាន់ពិភពលោក។

នៅក្នុងរដ្ឋ Florida, Comcast កំពុងតែធ្វើការជាមួយនឹងអង្គការធ្វើការពាក់ព័ន្ធនឹងសហគមន៍ចំនួន១៥០ដោយក្នុងនោះមាន៤០សហគមន៍នៅ Miami ដើម្បីផ្សព្វផ្សាយអំពី Internet Essentials និងផ្តល់ការបណ្តុះបណ្តាលខាងការអាន និងការសរសេរឌីជីថល។ អង្គការទាំងនេះរួមមានៈ ប្រព័ន្ធបណ្ណាល័យសាធារណៈ Miami; Big Brothers, Big Sister of Greater Miami និង Boys and Girls Club of Greater Miami ។

**អំពី Internet Essentials:**

Internet Essentials ពី Comcast គឺជាកម្មវិធីផ្តល់ប្រ៊ដប៊ែនដ៏ធំ និងជម្រើនបំផុត។ វាផ្តល់សេវាប្រ៊ដប៊ែនក្នុងតម្លៃទាបគឺ $៩.៩៥ ក្នុងមួយខែរួមទាំងពន្ធជម្រើសទិញកុំព្យូទ័រដែលមានអ៊ីនធឺណិតជាស្រេចក្នុងតម្លៃក្រោម$១៥០ និងជម្រើសជាច្រើនដើម្បីចូលដល់ការបណ្តុះបណ្តាលខាងការអាននិងការសរសេរឌីជីថលទាំង តាមការបោះពុម្ពលើបណ្តាញ និងដោយផ្ទាល់ខ្លួន ។ គ្រួសារមួយមានសិទ្ធិចូលរួម លុះត្រាតែគ្រួសារនោះយ៉ាងហោចណាស់មានកូនម្នាក់ដែលមានសិទ្ធិចូលរួមក្នុងកម្មវិធីអាហារថ្ងៃត្រង់សាលាជាតិ (National School Lunch Program, NSLP) ដែលស្ថិតនៅក្នុងទីកន្លែងដែលComcastផ្តល់សេវាអ៊ីនធឺណិតមិនទាន់ជាវសេវាសេវាអ៊ីនធឺណិត Comcast ក្នុងអំឡុង ៩០ថ្ងៃចុងក្រោយ និងមិនមានវិក្កយប័ត្រហួសកំណត់មិនទាន់បានបង់ ឬបរិក្ខាដែលមិនទាន់សងវិញ។ គ្រួសារដែលចុះឈ្មោះនៅក្នុងកម្មវិធីអាចបន្តរីករាយនឹងសេវាបាន លុះត្រាតែកូនម្នាក់ដែលមានសិទ្ធិចូលរួមក្នុង NSLP នោះ កំពុងតែរស់នៅក្នុងគ្រួសារនោះ។

សម្រាប់ព័ត៌មានបន្ថែមអំពីអ៊ីនធឺណិតមូលដ្ឋាន សូមទស្សនា InternetEssentials.com សម្រាប់ភាសាអង់គ្លេស និង InternetBasico .com សម្រាប់ភាសាអេស្ប៉ាញ។ អ្នកអប់រំ ឬភាគីទីបីដែលមានបំណងចង់ជួយផ្សព្វផ្សាយដំណឹងនេះ អាចរកព័ត៌មានបន្ថែមបានតាម Internet Essentials.com/partner ។ មាតាបិតាដែលចង់ចុះឈ្មោះក្នុងកម្មវិធីនេះ អាចទូរស័ព្ទមកលេខ ១-៨៥៥-៨៤៦-៨៣៧៦ ឬសម្រាប់ភាសាអេស្ប៉ាញលេខ ១-៨៥៥-៧៦៥-៦៩៩៥ ៕


**KhmerPost USA, LLC**

សារពត៌មានខ្មែរផុសសហរដ្ឋអាមេរិក

អាស័យដ្ឋាន 45 Merrimack St. Suite 218A. Lowell, MA 01852

លេខទូរស័ព្ទ Phone: 978 677-7163 | Fax: (978) 677-7092

អ៊ីម៉ែល info@khmerpost.us

អានកាសែតនៅគេហទំព័រ www.khmerpost.us

តាមដានយើងនៅទំព័រហ្វេសប៊ុក Like us at: www.facebook.com/KhmerPostUSA

ផ្សាយពាណិជ្ជកម្ម Advertising

អគ្គនាយកទីផ្សារ និងគ្រប់គ្រង សុបិន្ត ពិន Soben Pin, *Managing Partner*

លេខទូរស័ព្ទ 978 - 656 - 8141 (Mobile) 978 677-7163 (Office) |

អ៊ីម៉ែលsobenpin@khmerpost.us

អ្នកនិពន្ធ Editorials

និពន្ធនាយក ពិន សំខុន Roger Samkhon Pin, *Publisher & Editor-in-Chief*

(978) 942 - 1641 | rogerpin@khmerpost.us

ការីនិពន្ធ Staff Writers: Loeum Im, Sokha Lim

អ្នកនិពន្ធកិត្តិយស **Contributed Writers:**

Kim Phien, Kim Sos, Mao Chan Somnom, Mam Yin,
Richard Howe Esq. Sengly Kong, Ph.D.

ច្នៃសោភ័ណភាពកាសែត **Design Artist**

Heng Chhunleng

ជំនួយការរដ្ឋបាល **Administrative Assistant**

Sokha Lim

KhmerPost USA, LLC is an independent newspaper that aims to facilitate mass communication among the Cambodian communities, their neighboring communities, and families. We aim to address local community, and national news; and give an insight into Cambodian & global news. We also strive to bridge the language and cultural gaps and reduce social isolation by publishing in Khmer & English. It published twice a month in Massachusetts serving Greater Lowell, Lynn, Revere, MA, Providence, RI, CT, NY, NJ, and Philadelphia, PA.

Mail subscription is available within the U.S. & Canada at $60.00 or 70 Euros in Europe per year.

The KhmerPost USA has full authorization from Bernard Krisher, the publisher of the Cambodia Daily to reproduce all the articles that are produced by the Cambodia Daily free of charge effective date: 6/19/2009




# សេចក្តីអញ្ជើញដល់សហគមន៍ខ្មែរចូលរួមអង្គប្រជុំ ស្តីពីព័ត៌មានថ្មីទាក់ទងនឹងវាយតម្លៃពន្ធអចលនវត្ថុ

# City of Philadelphia Real Estate Tax Information Session

**រៀបចំដោយ**

ការិយាល័យទីប្រឹក្សាសាលាក្រុងហ្វីឡាដែលហ្វៀ ដេវីដ អូ (Philadelphia Office of City Councilman at-Large David Oh)

ការិយាល័យវាយតម្លៃលើអចលនវត្ថុ (Office of Property Assessment)



Councilman David Oh

**ប្រធានបទ : តើអ្វីជាតម្លៃជាក់ស្តែងនៃពន្ធថ្មី ?**

**Topics** : (What is Actual Value Initiative?)

- ជាសេចក្តីពន្យល់នៃប្រព័ន្ធវាយតម្លៃថ្មី និងការបង់ពន្ធរបៀបថ្មីលើអចលនវត្ថុ
- របៀបប្តឹងឧទ្ធរណ៍ ប្រសិនបើអ្នកមិនយល់ព្រមលើវាយតម្លៃពន្ធថ្មីនេះ

**កម្មវិធីសម្រួលលើការបង់ពន្ធ**

(Tax-relief Programs)

- បន្ថយតម្លៃវិក័យប័ត្រពន្ធលើអចលនវត្ថុសម្រាប់ឆ្នាំ២០១៤!
  Homestead Exemption
- លើកលែងការតម្លើងពន្ធចំពោះមនុស្សចាស់ ដែលមានប្រាក់ចំណូលទាប
  Low-Income Senior Real Estate Tax Freeze
- កម្មវិធីបង់រំលួសពន្ធអចលនវត្ថុសម្រាប់ប្រជាជនដែលមានប្រាក់ចំណូលទាប
  Low-Income and Low-Income Senior Installment Plans
- កិច្ចព្រមព្រៀងបង់ពន្ធសម្រាប់អ្នកមានវិបត្តិសេដ្ឋកិច្ច
  Hardship Payment Agreement
- កម្មវិធីផ្តល់លុយមកវិញដល់ម្ចាស់ផ្ទះ និងអ្នកជួល
  Property/Rent Rebate Program

ពេលវេលា : ថ្ងៃសុក្រ ទី 23 ខែសីហា ឆ្នាំ2013

**Date** : Friday, August 23, 2013

ម៉ោង : 6:00ដល់8:00ល្ងាច

**Time** : 6:00 PM - 8:00 PM

ទីកន្លែង : វត្តព្រះពុទ្ធរង្សី

**Location:** Preah Buddha Rangsey Temple
2400 South 6th Street
Philadelphia, PA 19148



Sponsors:

Preah Buddha Rangsey Temple
Intercultural Family Services, Inc.

ឧបត្ថម្ភដោយ : វត្តព្រះពុទ្ធរង្សី និងសមាគមគ្រួសារវប្បធម៌ចំរុះ

ហូមស្តេត
ហ៊ីឡាដែលហ្វៀ

HOME
STEAD
PHILADELPHIA

ហូមស្តេត
ហ៊ីឡាដែលហ្វៀ

HOME
STEAD
PHILADELPHIA

# អ្នកអាចសន្សំប្រាក់ពីការបង់ពន្ធលើអចលនវត្ថុ

## Councilman David Oh Says:

"Own your home? Apply for the City of Philadelphia's Homestead Exemption to lower your property tax bill for 2014!"

## ទីប្រឹក្សាក្រុងដេវីដអូ (David Oh) បានមានប្រសាសន៍ថា

"តើអ្នកចង់ក្លាយជាម្ចាស់កម្មសិទ្ធផ្ទះមែនទេ? សូមដាក់ពាក្យ សុំបន្ថយការបង់ពន្ធពីវិក័យប័ត្រពន្ធឆ្នាំ២០១៤!"

## It's easy to apply – simply call:

ងាយស្រួលដាក់ពាក្យសុំ -ដោយគ្រាន់តែទូរស័ព្ទមកកាន់លេខ

# 215-686-9200

*Remember, you must apply by September 13, 2013!*

សូមចងចាំ ! អ្នកត្រូវដាក់ពាក្យសុំឱ្យបានត្រឹម ថ្ងៃទី១៣ ខែកញ្ញា ឆ្នាំ២០១៣

អ្នកអាចពិនិត្យមើលលក្ខណៈនៃហូមស្តេតរបស់អ្នក និងគណនាពន្ធអចលនវត្ថុឆ្នាំ២០១៤ តាមគេហទំព័រ ***avicalculator.phila.gov***

សំរាប់ព័តិមានបន្ថែមសូមចូលកាន់ គេហទំព័រ ***opa.phila.gov***






## តមកពីទំព័រទី ១ បុណ្យអុំទូកអាស៊ីអាគ្នេយ៍ឆ្នាំ២០១៣...

អ្នកចូលរួមទស្សនាកំសាន្តសប្បាយក្នុងពិធីបុណ្យ បានទទួលឱជារសសម្បូរបែប និងដោយឡែក ពីគ្នាចេញពីម្ហូប ចម្អិនដោយ ខ្មែរ ថៃ វៀតណាម ជោគជ័យរកចំណូលយ៉ាងល្អប្រសើរពីការលក់ទឹកអំពៅ។

ពិនិត្យទៅលើតូបនីមួយៗ ក្រៅពីអាហារ



ឡាវ។ អ្នកទិញត្រូវចាំឈរតម្រង់ជួរបន្តកន្ទុយគ្នា រង់ចាំវេនហៅម្ហូប។ គេសង្កេតឃើញថា អាកាសធាតុនាថ្ងៃទី១៧ សីហា ឆ្នាំ២០១៣ ត្រូវនឹងថ្ងៃនៃពិធីបុណ្យនោះ អំណោយផលល្អដល់គូប្រកួត ក៏ដូចជាអ្នកចូលរួម។ ចំណុចដែលគួរចាប់អារម្មណ៍ អ្នកលក់ទឹកអំពៅស្រស់នាថ្ងៃនោះ ហាក់ទទួល និងភេសជ្ជៈ មានការដាក់តាំងតូបផ្សព្វផ្សាយព័ត៌មានសេវាកម្មផ្សេងៗពីស្ថាប័ននានាដែលមានក្នុងសហគមន៍ឡូវែលដូចជាសេវាដោះស្រាយទំនាស់ដោយសន្តិវិធីដោយឥតគិតថ្លៃពីមជ្ឈមណ្ឌលច្បាប់សម្រាប់សហគមន៍មីដលសិុក (Middlesex Community College Law Center) តទៅទំព័រទី០៩

## អតីតប្រធានគណៈកម្មការបុណ្យអុំទូកអាស៊ីអាគ្នេយ៍ នាឆ្នាំទី៨ បង្ហាញចំណាប់អារម្មណ៍បទពិសោធន៍និងផ្តល់ប្រវត្តិខ្លះៗអំពីពិធីបុណ្យនេះ

ដោយខ្មែរផុសស.រ.អា

**ក្រុងឡូវែល៖** ថ្មីៗនេះ បន្ទាប់ពីព្រឹត្តិការណ៍បុណ្យអុំទូកកន្លងផុតលោក លី អេ លីបប៊ី (Lee A. Libbey) បច្ចុប្បន្នជាគ្រូបង្រៀនភាសាអង់គ្លេសនៅសាកលវិទ្យាល័យមួយក្នុងប្រទេសចិន ហើយដែលជា គូស្វាមីភរិយា វ័យចំណាស់ថ្មី ថ្មោងរៀបការ នឹង គ្រូបង្រៀនដូច គ្នា ឈ្មោះ សៀវ លីស៊ី (Xiuli Shi) ពេញចិត្ត សន្ទនាជាមួយសារព័ត៌មានខ្មែរ ផុស និងបានបង្ហាញថា លោកជាអតីតប្រធានគណៈកម្មការបុណ្យអុំទូកឆ្នាំទី៨ ត្រូវនឹងគ្រឹស្តសករាជ២០០៤។ លោកចាប់ផ្តើមស្វែងយល់ពីតម្លៃវប្បធម៌នៃជាតិសាសន៍អាស៊ីអាគ្នេយ៍ក្រោយពេលដែលលោកផ្លាស់ទីលំនៅពីឃ្វីនស៊ី(Quincy) មកឡូវែលកាលពីឆ្នាំ១៩៨៦។លោកបានលើកឡើងថា ការស្វែងយល់ពីវប្បធម៌អាស៊ីអាគ្នេយ៍ បានធ្វើឱ្យស្គាល់ខ្លួនឯង និងស្វែងយល់នូវតម្លៃបី




ដែលចង់ណែនាំឱ្យលោកខាងលិចប្រតិបត្តិ ហើយដែលលោកពោលថា មនុស្សលោកខាងលិចមិនមាន គឺការអត់ធ្មត់ (Patience) ឧបេក្ខា (Balance) និងកតញ្ញូ (Respect)៕

## លទ្ធផលប្រណាំងទូកឆ្នាំទី១៧ នៃពិធីបុណ្យអុំទូកឆ្នាំ២០១៣
## 2013 Boat Race Results

ចំណាត់ថ្នាក់លេខមួយបានទៅលើក្រុម ប៉ាយ៉ាណាក់ រង្វាន់ពានលេខមួយ និងទឹកប្រាក់៦០០ ដុល្លារ

1st - Pay Nak ($600 + Trophy) ចំណាត់ថ្នាក់លេខពីរបានទៅលើក្រុមគ្រាប់ពូជអមតៈ-មច្ឆារង្វាន់ពានលេខពីរ និងទឹកប្រាក់ ៤០០ ដុល្លារ

2nd - Living Root Fish - Fish ($400 + Trohpy) ចំណាត់ថ្នាក់លេខបីបានទៅលើក្រុមទាសំណាងរង្វាន់ពានលេខបី

3rd - Lucky Ducky (Trophy) ចំណាត់ថ្នាក់លេខបួនបានទៅលើក្រុមទ័ពអង្គររង្វាន់មេដាយលេខ៤

4th-Angorian Warriors (Medallion) ចំណាត់ថ្នាក់លេខប្រាំបានទៅលើក្រុមក្រុមគ្រួសារសាមគ្គី រង្វាន់មេដាយលេខ៥

5th-Family Unity (Medallion) ចំណាត់ថ្នាក់លេខប្រាំមួយបានទៅលើក្រុមគ្រាប់ពូជអមតៈ រង្វាន់មេដាយលេខ៦

6th-Living Roots - Chips (Medallion)

តមកពីទំព័រទី ១ ចៅហ្វាយក្រុងឡូវែលសរសើរខ្មែរផុស...

សំរាប់សហគមន៍ ។ នេះជាលើកដំបូងដែលតាំងពីកាសែត "ខ្មែរផុសស.រ.អា."ចាប់កំណើតពី៨ឆ្នាំមុននៅហ្វីឡាដែលហ្វៀ ហើយ១០ខែចុងក្រោយមកឈរជើងនៅឡូវែលដែលក្រុងនេះ សំដែងការលើកទឹកចិត្តដោយផ្តល់កិត្តិយសដ៏ខ្ពង់ខ្ពស់នេះដល់យើងខ្ញុំ ។

មុនពេលមកដល់ខ្មែរផុសបានចែកផ្សាយកាសែតរបស់ខ្លួនជាប្រចាំជាង២ឆ្នាំរួចមកហើយៗក៏ឃើញថា មានការគាំទ្រពីសំណាក់អ្នកអានយ៉ាងសមរម្យដែរ ។ លោកស្រីក្រុមប្រឹក្សា រីដា មៀវស័រ បានសួរថា "តើខ្ញុំអាចធ្វើ ដើម្បីឱ្យអ្នកមកផ្សព្វផ្សាយនៅទីនេះបាន?" គឺជាសំនួរដែលអ្នកស្រីបានឱ្យអត្ថន័យ និងជំនឿខ្ពស់ខាងផ្នែកសេដ្ឋកិច្ចដល់យើងតាំងពីពេលនោះ រហូតមកដល់បានមកឈរជើងជាស្ថាពរ -ចំណែកឯលោកក្រុមប្រឹក្សា វ៉ាស្នា នួន ក៏បានណែនាំអង្គការសមាគមអង្គភាពក្រុងខ្មែរ ។ល។ ជាទំនាក់ទំនងដ៏ទូលំទូលាយពង្រីងការិយាល័យនិពន្ធនឹងផ្សព្វផ្សាយសាធារណតាំងពីដើមទី ។ ដោយសារការជួយជ្រោមជ្រែងនេះ យើងបានជួបសហគ្រាសន៍ -សមាគមនឹងមនុស្សសំខាន់ៗជាច្រើនដែលជាធនធានកាត់ថ្លៃមិនបាន ។ ថ្វីត្បិតតែយើងខិតខំទ្រទ្រង់ការផ្សាយសារព័ត៌មានឱ្យគង់វង្សប្រឈមនឹងតម្លៃបោះពុម្ពក៏ដោយយើងនៅតែយល់ថាត្រូវរក្សាគុណភាពកាសែតមុននឹងគិតពីពាណិជ្ជកម្មជាដំរាប ។ គុណភាពនោះគឺ ១-សោភ័ណ្ឌភាពរៀបគួរឱ្យចង់មើល ២-សាច់រឿងដែលគួរឱ្យចាប់អារម្មណ៍ទាំងបច្ចុប្បន្នភាពថ្មីៗទាំងបទវិភាគ បទយកការណ៍ នយោបាយ សុខភាព រមនីយដ្ឋាន ៣-ព័ត៌មានដែលគួរឱ្យជឿទុកចិត្តបាន ៤-រឿងដែលជាទំនាស់ផ្សព្វផ្សាយដោយគ្មានអុចអាល

ញុះញង់បន្ថែម ៥-បើបានសរសេរខុសដោយឥតចេតនាហ៊ានទទួលខុសហើយសុំទោសអ្នកអាន ៦-លើកដំកើងគំនិតការបានរកឃើញថ្មីៗ ការបានខិតខំ-សិក្សា-ស្រាវជ្រាវ ៧-ប្រុងប្រយ័ត្នមិន លួចចម្លងស្នាដៃ ប្រុងប្រយ័ត្នចំពោះការផ្សាយដែលអាចបង្ករគ្រោះថ្នាក់ដល់អ្នក អានមិនផ្សាយបន្តនូវរឿងមិនពិត ៨-ការផ្តល់វេទិការដល់អ្នកដែលគ្មានកន្លែងបញ្ចេញសម្លេង ៩-ការពារសិទ្ធ និងកិត្តិយសដល់អ្នកដែលមិនអាចការពារខ្លួនឯងបាន... ។ល។ ទាំងនោះសុទ្ធតែជាលក្ខណៈសម្បត្តិនៃសារព័ត៌មានដែលវិជ្ជមាន ចំពោះសហគមន៍ដែលខ្លួនបំរើ ។


សូធិន្ទ សំខុន ទទួលប័ណ្ណសរសើរពី ប៉ាទ្រិក ម័រទ្រី

យើងចេញ២ដងក្នុង១ខែយ៉ាងទៀងទាត់ មែនតែនៅប្រឈមមុខនឹងបញ្ហាសេដ្ឋកិច្ចដែលចំណាយតែងច្រើនជាងចំណូលតែនៅតែមានសង្ឃឹមថានឹងបានរួចខ្លួនជាមិនខាន ។ ប្រភពនៃចំណូលរបស់យើង គឺការផ្សាយពាណិជ្ជកម្មតែមួយមុខគត់បូកបញ្ចូលនឹងប្រាក់ខែបានពីការងារខាងក្រៅ រហូតដល់ឆ្នាំទី៤ យើងបានកើនពាណិជ្ជកម្មរហូតទប់ទល់ការខាតបានតែយើងបានធ្វើវិនិយោគភ្លាមទៅចូលតំបន់២ថ្មីទៀតគឺឡូវែល រដ្ឋម៉ាសាឈូសែត នឹងប្រូវីដិន រដ្ឋរ៉ូដអាយឡិនប្រកបដោយក្តីសង្ឃឹមនៅពេលមកដល់ ពីព្រោះជាតំបន់ដែលវត្តមានកាសែតជាភាសាខ្មែរមានភាពចាំបាច់សម្រាប់អភិវឌ្ឍន៍សហគមន៍តែជាអកុសលចំនួនពាណិជ្ជកម្មដែលកំពុងឡើង ស្រាប់តែស្រុតចុះដល់កំរិតសូន្យ នា៦ខែបន្ទាប់មកយើងបានខិតខំស្តារស្ថានភាពសេដ្ឋកិច្ចដ៏កំសត់នេះអស់ពេលជាង ២ឆ្នាំបន្តទៅទៀត មុននិងសម្រេចចិត្តមកឈរជើងតាំងទីនៅឱ្យចំកណ្តាលមណ្ឌលសកម្មភាពចំបងរបស់យើង។

ខែសីហា២០១៣ យើងបានដើរមកដល់ខែទី១០ដំបូងនាទីបញ្ហាការថ្មីនៅក្រុងឡូវែល នៅទីនោះយើងអាចមើលឃើញការផ្លាស់ប្តូរឆាប់រហ័ស និងប្រតិកម្មលឿនដោយខ្លួនឯងបានយ៉ាងងាយស្រួលការថ្លោះធ្លោយក៏មានតិចជំនួយនិងទំនាក់ទំនងក៏មានច្រើន ដូចការគ្រោងទុកថាមានគេត្រូវការអានកាសែតខ្មែរច្រើន ហើយជាពិសេសគំរ"ខ្មែរផុសស.រ.អា."ក៏កំពុងពេញនិយម ។ បងប្អូនខ្មែរដំបូងឡើយមានការរារែកក្នុងការប្រើទំព័រកាសែតដែលគេចូលចិត្តអានសម្រាប់ទាក់ទាញភ្ញៀវឱ្យមកសាកល្បងផលិតផលរបស់ខ្លួនទិញ ឬលក់របស់តូច ឬធំពាំនាំដំណឹងសំខាន់អ្វីមួយទៅឱ្យសាធារណជនបង្ហាញសោភ័ណភាពស្រស់បស់... ។ល។ ឥឡូវស្នាដៃជំនាញបងប្អូនពាណិជ្ជករ ឬសហគ្រាសន៍ ឬឯកជន ទោះជាខ្មែរឬបរទេសបានត្រូវ"ខ្មែរផុស"នាំទៅដល់ទីដៅបានយ៉ាងសមគួរដូចប្រាថ្នាមែន ។ ខ្មែរផុសបានសម្រេចវត្ថុបំណងធំ១ គឺបំពេញតួនាទីជាអ្នកនាំសារដ៏ប្រសើរនឹងដំមាន តទៅទំព័រទី ២៨



## តមកពីទំព័រទី ៧ បុណ្យអុំទូកអាស៊ីអាគ្នេយ៍ឆ្នាំ២០១៣...

ឬ (MCC Law Center) ព័ត៌មានរៀនភាសាខ្មែរ និងសេវា ផ្សេងទៀតពីសមាគមខ្មែរ (CMAA) ព័ត៌មានប្រដាល់សេរីនៅលីនក្រុមបង្ហាញម៉ូដ និង ថតរូប ឌី ពេជ្រ (Dy Pech Photography) កម្មវិធីសម្រាប់ខ្មែរជនបទ (Life Project for Rural Cambodian) ការផ្សព្វផ្សាយព្រះពុទ្ធសាសនាពីវត្តពន្លឺពុទ្ធចក្រវត្តខ្មែរឡូវែលការផ្សព្វផ្សាយសាសនាគ្រីស្តក្រុមគាំពារពីអំពើហឹង្សាក្នុងគ្រួសារ (Asian Task Force Against Domestic Violence) ការផ្សព្វផ្សាយគណបក្សសង្គ្រោះជាតិមន្ទីរពេទ្យមជ្ឈមណ្ឌលក្រុងឡូវែល (Lowell General Hospital) មន្ទីរសារគមនាគមន៍ និងខ្សែកាបនៃ រដ្ឋម៉ាសាឈូសេត (MA Department of Telecommunica tion and Cable) និងតូបផ្តល់ព័ត៌មានអំពីគ្រឹះ ស្ថានហិរញ្ញវត្ថុ មន្ទីរពេទ្យមណ្ឌលសុខភាព ព្រមទាំងស្ថាប័នមានប្រយោជន៍ដល់សហគមន៍ផ្សេងៗជាច្រើនទៀត ។

ក្រៅពីនេះ គេក៏ឃើញមានក្រុមនិស្សិតខ្មែរដែលមករៀនថ្នាក់បណ្ឌិតអនុបណ្ឌិត និងធ្វើកម្មសិក្សានៅអាមេរិកមកចូលរួមក្នុងពិធីបុណ្យអុំទូកផងដែរ ។ ពិធីបុណ្យនេះផ្តល់អត្ថប្រយោជន៍ជាសារវ័ន្តដល់ ម្ចាស់ កម្មវិធី ដែលជាម្ចាស់ ផ្ទះសហគមន៍ និងទូទាំងសហរដ្ឋក្នុងការបន្តអតិភាពជាតិសាសន៍ចម្រុះដែលជាធាតុផ្សំដ៏សំខាន់នៃកំណើតសហរដ្ឋអាមេរិកដែលជារដ្ឋសហព័ន្ធមានអាយុកាលមិនលើស៣០០ឆ្នាំនេះ ៕ **សុខា**

# គ្លូបលវិតណេសរាយការណ៍ពីបរិស្ថាននៅកម្ពុជា

(តពីលេខមុន)

**៤.៦ ទិន្នផល និងចំណូលហិរញ្ញវត្ថុ**

ដោយសារតែសញ្ញាណខុសច្បាប់នៃសកម្មភាពរបស់ក្រុមហ៊ុន Seng Keang Company គ្មានស្ថិតិផ្លូវការដែលអាចជឿជាក់បានណាទៅលើចំនួនឈើ ដែលក្រុមហ៊ុនបានកាប់ក្នុងព្រៃឡង់នោះទេ ។ ទោះយ៉ាងណាក៏ដោយ Global Witness បានចងក្រងទិន្នន័យទៅលើប្រតិបត្តិការរបស់ក្រុម ដែលធ្វើឱ្យមានការប៉ាន់ស្មានពីទិន្នផលគ្របដណ្តប់លើរយៈពេលនេះ ចាប់តាំងពីក្រុមហ៊ុនបានបង្កើតរោងចក្ររបស់ខ្លួននៅភូមិខែស៍ នៅចុងឆ្នាំ ២០០៤ ។

***តើឈើចំនួនប៉ុន្មានដែលក្រុមហ៊ុន Seng Keang Company បានកែច្នៃនៅរោងចក្ររបស់ខ្លួននៅទីរីង ?***

ប្រជាជនដែលរស់នៅក្បែរផ្លូវឆ្ពោះទៅកាន់ទីរីងដែល Global - Witness បានសម្ភាសន៍ក្នុងឆ្នាំ ២០០៥ និង ២០០៦ បានបញ្ជាក់ថារយៈពេល ២៤ម៉ោ ពួកគេតែងឃើញ និងឮឡានដែលបានផ្ទុករួចរបស់ក្រុមកាប់ឈើពីពីរទៅបីចេញពីចំការ[១៨៥] ។ អ្នកគ្រប់គ្រងការដឹកជញ្ជូនរបស់ក្រុមហ៊ុន Seng Keang Company បានប្រាប់ Global Witness ក្នុងខែវិច្ឆិកា ឆ្នាំ ២០០៥ ថា ក្រុមហ៊ុនកំពុងដឹកជញ្ជូនឈើអារជាមធ្យមបីទៅបួនឡានក្នុងមួយថ្ងៃ[១៨៦] ។ យានយន្តរបស់ក្រុមហ៊ុន Seng Keang Company និមួយៗដឹកយ៉ាងហោចណាស់ឈើកែច្នៃ ៦០ម$^{៣}$ [១៨៨] ។

ការប៉ាន់ស្មានទាំងនេះ រវាងឈើពីពីរទៅបួនឡានក្នុងមួយថ្ងៃស្របតាមការអង្កេតស្រាវជ្រាវសកម្មភាពឡានរបស់ Global - Witness ក្នុងរយៈពេលដូចគ្នានេះ ។ដោយសន្មតថាក្រុមហ៊ុនប្រើប្រាស់ជាមធ្យមនូវឡានចំនួនបីក្នុងមួយថ្ងៃ នេះស្តែងថា ទិន្នផលឈើអារមាន ១៨០ម$^{៣}$ ក្នុងមួយថ្ងៃ ៤៦៨០ម$^{៣}$ ក្នុងមួយខែ និងលើសពី ៥៦,០០០ម$^{៣}$ ក្នុងមួយឆ្នាំ[v] ។

***តើនេះស្មើទៅនឹងចំនួនឈើដែលបានប្រើប្រាស់ដែរឬទេ ?***

អត្រាកែច្នៃអន្តរជាតិតាមបទដ្ឋានសម្រាប់ឈើមូល ដែលបានកែច្នៃជាឈើអារ គឺ ១.៨ ម្យ៉ាងវិញទៀត ត្រូវការឈើ ១.៨ម$^{៣}$ ដើម្បីផលិតជាឈើអារមួយម៉ែត្រគីប[២០៧] ។ ជាក់ស្តែង ចំនួនដ៏ច្រើននៃឈើរបស់ក្រុមហ៊ុន Seng Keang Company ត្រូវបានកែច្នៃក្នុងព្រៃដោយប្រើប្រាស់រណារអារ និងហើយហេតុនេះ កែច្នៃមានប្រសិទ្ធិភាពតិចជាង ។ ទោះយ៉ាងណាក៏ដោយ ដោយប្រើប្រាស់អត្រាកែច្នៃ ១.៨ យើងអាចប៉ាន់ស្មានជាធម្មតាពីការប្រើប្រាស់ឈើរបស់ក្រុមនេះថាមានឈើមូលប្រមាណ ៣២៤ម$^{៣}$ ក្នុងមួយថ្ងៃ ៨៤២៤ម$^{៣}$ ក្នុងមួយខែនិងលើសពី ១០០,០០០ម$^{៣}$ ក្នុងមួយឆ្នាំ[v] ។

មានតម្លៃគួរឱ្យកត់ចំណាំថា ចំនួននេះលើសច្រើនខ្លាំងពីអ្វីដែលសម្បទានិកឈើត្រូវបានអនុញ្ញាតឱ្យកាប់ ។ ឧទាហរណ៍ និយោជកពីមុនរបស់ ឌី ចូច, សេង គាង និង ឃុន ថុង ត្រូវបានផ្តល់សិទ្ធិឱ្យប្រមូលផលអតិបរមា ៣៥,០០០ម$^{៣}$ ក្នុងមួយឆ្នាំ[៨០] ។

ក្នុងខែ មិនា ឆ្នាំ ២០០៦ ចាន់ សារុន បានផ្តល់ការវាយតម្លៃរបស់ក្រសួងកសិកម្ម រុក្ខាប្រមាញ់ និងនេសាទ ពីសកម្មភាពកាប់ឈើរបស់ក្រុមហ៊ុន សេង គាង ក្នុងតំបន់នេះ :

"មកទល់ចុងឆ្នាំ ២០០៥ ក្រុមហ៊ុន Seng Keang Company បានប្រមូលព្រៃឈើ និងអនុផលពីចំការកៅស៊ូទីរីង ដែលបានឈូសសំអាតក្នុងចំនួនសរុប ១២,២០៤.៦៩៦ម$^{៣}$ នៃឈើមូល និងឈើប្រភេទចម្រុះ និងដើមឈើតូចៗ និងអុសចំនួន ២,០២៣ ស្ទែរ"[vi] ។[១៨៨]

ស្របពេលដែលមានការជាក់លាក់គួរឱ្យស្ងើចសរសើរនេះ តួលេខទាំងនេះមានទាបខ្លាំងណាស់ ដោយគិតថា ក្រុមហ៊ុន Seng Keang Company បានចាប់ផ្តើមប្រតិបត្តិការផ្លូវការក្នុងទីរីងក្នុងខែ តុលា ឆ្នាំ ២០០២ ។ ការគណនារបស់ ចាន់ សារុន ទៅលើចំនួនឈើសរុបដែលក្រុមហ៊ុនបានយកចេញក្នុងរយៈពេលជាងបីឆ្នាំនេះ គឺស្មើនឹងចំនួនឈើដែលរោងចក្ររបស់ខ្លួនក្នុងទីរីងកែច្នៃរៀងរាល់ ៣៨ ថ្ងៃធ្វើការ ។

សកម្មភាពខាងក្នុងរោងចក្រ ក្រុមហ៊ុន Seng Keang Company ខែ កញ្ញា និង វិច្ឆិកា ឆ្នាំ ២០០៥

***តើមានចំណូលហិរញ្ញវត្ថុរបស់ក្រុមហ៊ុន Seng Keang Company និងរដ្ឋចំនួនប៉ុន្មាន ?***

Global Witness បានប្រមូលទិន្នន័យជាច្រើនពីចំណាយរបស់ក្រុមហ៊ុន Seng Keang Company ក្នុងការកាប់ឈើ ដឹកជញ្ជូនឈើ បង់ឱ្យកម្មករ និងសូកមន្ត្រី តែគ្មានតួលេខពីចំណាយ និងចំណេញសុទ្ធទាំងមូលរបស់ក្រុមនេះទេ ។ ទោះយ៉ាងណាក៏ដោយ ច្បាស់ថាចំណូលពីការកាប់ឈើ និងប្រតិបត្តិការកែច្នៃឈើរបស់ក្រុមហ៊ុនមានច្រើន ។ ដោយត្រូវបានគណនាតម្លៃឈើអារកម្រិត II ដែលមានតម្លៃ US$២៣៥ ក្នុងមួយម៉ែត្រគីបក្នុងភ្នំពេញឆ្នាំ ២០០៦ នោះលទ្ធផលប្រចាំឆ្នាំរបស់ក្រុមហ៊ុន Seng Keang Company ពីឈើកែច្នៃពីទីរីង នឹងមានតម្លៃប្រមាណ US$១៣ លាន[២០៨] ។

តួលេខនេះ មិនរាប់បញ្ចូលបរិមាណឈើជាច្រើនដែលក្រុមហ៊ុន Seng Keang Company បានកែច្នៃជាបន្ទះឈើ និងក្តារបន្ទះដែលមានតម្លៃច្រើនជាងឈើអារទៀត ។ក៏មិនគិតពីឈើប្រណិត និងកម្រិតលេខ I ដែលមានតម្លៃថ្លៃជាងដែលក្រុមនេះបានកាប់ និងបានលក់ហើយនិងចំណូលកាន់តែខ្ពស់ ដែលក្រុមហ៊ុននឹងបានទទួលពីផលិតផលឈើណាមួយ ដែលខ្លួនបាននាំចេញ។

ដោយយោងតាម ចាន់ សារុន បានឱ្យដឹងថា រវាងពីចំណុចដែលក្រុមហ៊ុនបានចាប់ផ្តើមប្រតិបត្តិការជាផ្លូវការក្នុងទីរីង និងចុងឆ្នាំ ២០០៥ ក្រុមហ៊ុនរបស់ សេង គាង បានបង់ពន្ធជូនរដ្ឋចំនួន US$៥៥៤,៥៨៧.៥២ និង ៨,៤៥៦,៦០០រៀល ម្យ៉ាងទៀត និយាយដោយខ្លី គឺ US$៦០០,០០០[១៨៨] ។ ក្នុងចម្លល់ដែលបានដឹងពាក់ព័ន្ធនឹងចំនួនដែលក្រុមហ៊ុន Seng Keang Company បានបង់ពន្ធមានលក្ខណៈជាទ្រឹស្តី ដោយសារចំនួនដើមឈើដ៏ច្រើនដែលក្រុមហ៊ុនបានកាប់ដោយខុសច្បាប់ មិនគួរត្រូវបានកាប់រំលំក្នុងតំណែងទីមួយនោះទេ ។ ទោះយ៉ាងណាក៏ដោយ វាបង្ហាញពីការខាតបង់ទាំងមូលចំពោះប្រទេសកម្ពុជា ប្រសិនបើតាមបែបហិរញ្ញវត្ថុ នៅពេលដែលគិតថាការយកពន្ធលើការប្រើប្រាស់ឈើមូលប្រចាំឆ្នាំចំនួន ១០០,០០០ម$^{៣}$ របស់ក្រុមនេះនូវកម្រិតសួយសារ ដែលកំណត់លើឈើកម្រិតលេខ II - US$៥៤ ក្នុងមួយម៉ែត្រគីប - នឹងមានចំណូលសុទ្ធដល់រតនាគារចំនួន US$៥.៤ លានក្នុងមួយឆ្នាំ ។

ឡានផ្ទុកឈើចេញនៅក្បែរបរិវេណក្រុមហ៊ុន Seng Keang Company ខែ មិនា ឆ្នាំ ២០០៦

ស្តុកឈើរបស់ក្រុមហ៊ុន Seng Keang Company ក្នុងភូមិខែស៍ ខែ វិច្ឆិកា ឆ្នាំ ២០០៥

[v] ដោយផ្អែកលើ ៥២ សប្តាហ៍ ដែលមានថ្ងៃធ្វើការប្រាំមួយថ្ងៃក្នុងមួយឆ្នាំ ។

[vi] ស្ទែរ គឺជាឯកតាដែលត្រូវបានប្រើប្រាស់ ដើម្បីវាស់វែងចំនួនឈើដែលបានប្រមូល និងស្មើទៅនឹងមួយម៉ែត្រគីប ។

តនៅលេខក្រោយ

តមកពីទំព័រទី ១

## ខ្មែរ-អាមេរិកាំងធ្វើមហាបាតុកម្ម...

តែមួយ ពោលគឺសុំអន្តរាគមពីអង្គការសហប្រ-ជាជាតិក្នុងរឿង គ.ជ.ប លួចបន្លំសន្លឹកឆ្នោត ការបោះឆ្នោតមិនមានភាពប្រក្រតី ។ល។ នេះជាការអះអាងរបស់លោក មាស ជា ។

ដោយឡែកលោក ជា គីមលី ជាថ្នាក់ដឹកនាំកំពូលរបស់គណបក្សសង្គ្រោះជាតិប្រចាំសហរដ្ឋអាមេរិកក៏បង្ហើបឱ្យ"ខ្មែរផុស"ដឹងដែរថា : លោកក៏បានចូលជួបជាមួយមន្ត្រីអង្គការសហប្រជាជាតិ ដើម្បីប្រគល់ញត្តិជូនមន្ត្រីនៅទីនោះ ហើយការប្រគល់ញត្តិនោះទៀតសោត គឺក្នុងនាមខ្មែរ-អាមេរិក និងខ្មែរ-កាណាដា ៕



## ឡូវែលចេញទៅធ្វើបាតុកម្មនៅញូយ៉ក



ដោយ : ម៉ុំ សោភនី

**ឡូវែល** : បាតុកម្មប្រឆាំងការរាប់សន្លឹកឆ្នោតនៅកម្ពុជាបានផ្ទុះឡើងព្រមគ្នានៅមុខវិមានសហប្រជាជាតិទីក្រុងញូយ៉ក កាលពីថ្ងៃទី១៩ សីហា ២០១៣ ចូលរួមដោយប្រជាពលរដ្ឋចំនួន ២000នាក់ ជាចំនួនដ៏ច្រើនមិនដែលមានពីមុនមក ។

ព្រឹកព្រលឹមម៉ោង៦ នាថ្ងៃដដែលបងប្អូនខ្មែរបានសម្រុកចូលរត់យន្តនៅចតវាលសាទីជាក្រុងឡូវែលដែលមានរថយន្តក្រុងចំនួន៥គ្រឿងរង់ចាំរួចជាស្រេចខ្លះក៏ទៅក្រុងញូយ៉កដោយរថយន្តផ្ទាល់ខ្លួនសណ្តោងទាំងមិត្តភ័ក្ត្រទៅផង ។ នៅតំបន់ផ្សេងទៀតក៏មានសកម្មភាពដូចគ្នាដឹកនាំមនុស្សដែលពុះពារដោយបំណងស្រែកប្រាប់អន្តរជាតិឱ្យជួយកម្ពុជាប្រជារាស្ត្រខ្មែរឱ្យរួចពីក្រញាំរដ្ឋអំណាចផ្តាច់ការបច្ចុប្បន្នពីទីក្រុងញូយ៉កដែលកាលពីថ្ងៃទី២៨ កក្កដា មុនរដ្ឋាភិបាលខ្មែរលួចបន្លំសន្លឹកឆ្នោត ដើម្បីដាក់ឱ្យខ្លួនអាចកាន់អំណាចបាន៥ឆ្នាំជាបន្តទៅទៀត ។




មកពីតំបន់ផ្សេងៗគ្នា ដូចជា វេជីនា ,ហ្វីឡាដែលហ្វៀ, រ៉ូដអាឡិន, តិចសាស់ ,កាណាដា, កូណិទីកិត, ញ៉ូហាមសៀ, ឡុងអាយឡិន, ញូជើស៊ី, គេស្រែកថា :

"គ.ជ.ប គឺជាចោរលួចបន្លំសន្លឹកឆ្នោត"

តទៅទំព័រទី ១៦

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសំរួលពីកាសារអង់គ្លេស | អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី | ច្បាប់ចេញផ្សាយថ្ងៃ ច័ន្ទ ទី១៩ ខែសីហា ឆ្នាំ២០១៣

# អ្នកធ្វើរបាយការណ៍ពិសេសរបស់សហប្រជាជាតិថា ប្រជាធិបតេយ្យនៅកម្ពុជាមានកម្រិត

*ដោយ Lauren Crothers-August 19, 2013*

យោងតាមរបាយការណ៍ចុងក្រោយបំផុតរបស់លោក សុរិយា ស៊ូបេឌី ប្រេសិតសិទ្ធិមនុស្សរបស់អង្គការសហប្រជាជាតិស្តីពីកម្ពុជាបានឱ្យដឹងថា ប្រទេសកម្ពុជាគ្មានលទ្ធិប្រជាធិបតេយ្យពេញលេញដូចដែលមានចែងនៅក្នុងរដ្ឋធម្មនុញ្ញរបស់ខ្លួនទេ ដោយរដ្ឋាភិបាលកាន់តែលែងអត់ឱនចំពោះការរិះគន់ដើម្បីស្ថាបនា ចំណែកឯកំណែទម្រង់ប្រព័ន្ធតុលាការ រដ្ឋសភា និងប្រព័ន្ធបោះឆ្នោតមានការយឺតយ៉ាវ។

របាយការណ៍ដ៏វែងផ្ញើជូនក្រុមប្រឹក្សាសិទ្ធិមនុស្សក្នុងទីក្រុងហ្សឺណែវ ស្តីពីស្ថានភាពសិទ្ធិមនុស្សនៅក្នុងប្រទេសកម្ពុជា ដែលចុះថ្ងៃទី៥ ខែសីហា ប៉ុន្តែដែលត្រូវបានព្រាងឡើងនៅមុនថ្ងៃបោះឆ្នោតកាលពីថ្ងៃទី២៨ ខែកក្កដា កន្លងទៅនោះ ធ្វើឡើងបន្ទាប់ពីបេសកកម្មលើកទី៨របស់លោកមកកាន់ប្រទេសកម្ពុជា កាលពីខែធ្នូ ឆ្នាំ២០១២ ដែលអំឡុងពេលនោះលោកត្រូវបានមន្ត្រីរដ្ឋាភិបាលព្រងើយកន្តើយដាក់ ចំណែកឯបេសកកម្មលើកទី៩របស់លោក កាលពីខែឧសភា លោក សុរិយា ស៊ូបេឌី ចាត់ទុកថា "មិនល្អ"។

របាយការណ៍នេះ ដែលជារបាយការណ៍ទី៥របស់លោកចាប់តាំងពីលោកចូលកាន់តំណែងនេះកាលពីខែមីនា ឆ្នាំ២០០៩មកនោះមានលទ្ធផលនៃបេសកកម្មស្វែងរកការពិតលើកមុនៗទាំងអស់របស់លោកដែលបានផ្តោតលើកំណែទម្រង់ប្រព័ន្ធតុលាការ រដ្ឋសភា និងប្រព័ន្ធបោះឆ្នោត និងគោលនយោបាយរបស់ប្រទេសកម្ពុជាពាក់ព័ន្ធនឹងដីសម្បទានសេដ្ឋកិច្ច។

លោក សុរិយា ស៊ូបេឌី បានលើកឡើងនៅក្នុងរបាយការណ៍របស់លោកដោយសំដៅលើរូបលោកផ្ទាល់ជាជនទី៣ថា "ការទទួលស្វាគមន៍របស់រដ្ឋាភិបាលចំពោះអ្នកធ្វើរបាយការណ៍ ពិសេស អំឡុងបេសកកម្មរបស់លោកមកកាន់ប្រទេសនេះកាលពីខែធ្នូ ឆ្នាំ២០១២ គឺជាការស្វាគមន៍សោះកក្រោះដែលអំឡុងពេលនោះគ្មានមន្ត្រីរដ្ឋាភិបាលជាន់ខ្ពស់ណាម្នាក់ជួបជាមួយលោកឡើយ។

ក្រោយពីការចេញ តទៅទំព័រទី ២២

# UN Rights Envoy Says Democracy Is Limited in Cambodia

*By Lauren Crothers - August 19, 2013*

Cambodia is falling short of the full liberal democracy enshrined in its Constitution, the government is becoming increasingly intolerant to constructive criticism and judicial, parliamentary and electoral reforms have been slow to take effect, according to U.N. human rights envoy Surya Subedi's latest report on Cambodia.

The wide-ranging report to the Human Rights Council in Geneva on the situation of human rights in Cambodia, which is dated Au-gust 5 but was drafted prior to the July 28 election, follows his eighth mission to the country in December 2012, during which he was snubbed by members of the government, and his ninth mission in May, parts of which Mr. Subedi described as being "unpleasant."

This, his fifth report since taking up the post in March 2009, wraps up the findings to all of his previous fact-finding missions, which focused on judiciary, parliamentary and electoral reforms and the country's policies regarding economic land concessions.

"The reception that the Special Rapporteur received from the Government during his mission to the country in December 2012 was a frosty one during which no senior member of the Government was available to meet with him," Mr. Subedi said in his report, referring to himself in the third person.

"In the wake of the publication of two major reports by the Special Rapporteur—one on electoral reform and the other one on economic and other land concessions—he was subjected to some raw remarks descending to the personal level.

"This was highly regrettable, as the focus of the dialogue between the Special Rapporteur and the Government should remain strictly on the substance of the work he is mandated to carry out by the United Nations, and not on him as a person."

Mr. Subedi appeared to be referring to remarks made by Om Yentieng, president of the government's Cambodian Hu-man Rights Committee, in September last year that accused Mr. Subedi of working for the opposition. The following month, Prime Minister Hun Sen said during a speech at a graduation ceremony that

***Continue to page 16***

# ដើមកំណើតនៃពិធីប្រណាំងទូក"ង"របស់ខ្មែរ

**ដោយៈ បណ្ឌិត គង់ សេងលី**


សេងលី គង់

បុព្វបុរសខ្មែរចាប់តាំងសម័យមុនអង្គរ សម័យអង្គរ និងក្រោយអង្គរ តែងតែជ្រើសរើសទីតាំងបង្កើតទីក្រុងនៅជាប់ ឬក្បែរតំបន់ទំនាបទន្លេ បឹងបួរ ក្នុងបុព្វហេតុនៃការទាញយកសក្តានុពលភាពពីធនធានធម្មជាតិ ដើម្បីអភិវឌ្ឍន៍សេដ្ឋកិច្ច សង្គមកិច្ច និងការគោរពបូជាសាសនាផ្សេងៗជាដើម។ ថ្វីត្បិតតំបន់ទំនាបមានសក្តានុពលភាពអភិវឌ្ឍន៍ក៏ដោយការបង្កើតទីក្រុងនៅតំបន់ជាប់ទន្លេ បឹងបួរ ឬតំបន់ទំនាប អាចប្រឈមអាណាចក្រនឹងការវាយប្រហារពីសត្រូវតាមផ្លូវទឹក បើសិនការរៀបចំយុទ្ធសាស្ត្រការពារជាតិលើសមរភូមិ ផ្លូវទឹកពុំមានការអភិវឌ្ឍន៍ដល់កំរិតនោះទេ។

ការសាងសង់ទីក្រុងនៅក្បែរតំបន់ទំនាប ទន្លេ បឹងបួរមានតាំងពីសម័យនៃការបង្កើតនគរ។ រឿងនិទានបុរាណខ្មែរតែងតែនិទានថា នគរខ្មែរបានបង្កើតឡើងដោយកូនស្រីរបស់ស្តេចភូជង្គនាគដែលគ្រប់គ្រងទន្លេ សាគរ បឹងបួ នានា។ ថ្វីត្បិតនេះជានិទានបុរាណ វាបានឆ្លុះបញ្ចាំងនូវនិន្នាការរួមរបស់បុព្វបុរសខ្មែរក្នុងការជ្រើសរើសតំបន់ទំនាប ទន្លេ បឹងបួរ ដើម្បីបង្កើតអាណាចក្រ ឬចក្រភពរបស់ខ្លួន។ ទីក្រុងមួយនៃចក្រភពខ្មែរត្រូវបានប្រវត្តិសាស្ត្រកំណត់ថា ជាកន្លែងដែលព្រះបាទជ័យវរ្ម័នទី២បានឧទ្ទិសខ្លួនព្រះអង្គជូនអាទិទេពីនដរានៃព្រហ្មណ៍សាសនានៅឆ្នាំ៨០២ ហើយប្រកាសអង្គឯងជាស្តេចចក្រវាលទិននៅទីក្រុងមហេន្ទ្របវិត (Mahendraparvata)



ស្ថិតនៅលើភ្នំគូលែនដែលមានចំងាយប្រមាណ៣០គីឡូម៉ែត្រភាគខាងជើងនៃខេត្តសៀមរាប។ ភ្នំគូលែន គឺជាប្រភពទឹកដ៏ពិសិដ្ឋសំរាប់បូជានិយកិច្ចសាសនាក៏ដូចជាសំរាប់ស្រោចស្រពដល់តំបន់កសិកម្មរាប់ម៉ឺនហិចតានៅភាគខាងត្បូង ឬខាងក្រោមៗ។

ទីក្រុងមួយទៀតដែលប្រវត្តិសាស្ត្រចារថា ជាទីក្រុងទីមួយផ្លូវការរបស់ចក្រភពខ្មែរនៃរជ្ជកាលព្រះបាទជ័យវរ្ម័នទី២ គឺទីក្រុងហរិហរាល័យ (Hariharalaya) ដែលបច្ចុប្បន្នត្រូវគេស្គាល់ថា ទីក្រុងរលួស (Roluos) មានចំងាយប្រមាណ១៣គីឡូម៉ែត្រភាគខាងកើតទីក្រុងសៀមរាបបច្ចុប្បន្ននេះ។ ក្រុងហរិហរាល័យ ឬរលួសនេះក៏ស្ថិតនៅជិតបឹងទន្លេសាបមិនដល់១០គីឡូម៉ែត្រផង។ ទីក្រុងយសោធរបុរៈ (Yasodharapura) ដែលជាអង្គរវត្តសព្វថ្ងៃនេះជាទីក្រុងមួយទៀតនៃចក្រភពខ្មែរនាដើមសតវត្សទី១២ ក្នុងរជ្ជកាលព្រះបាទសូរ្យវរ្ម័នទី២ (Suryavarman II) និងក្រុងអង្គរធំ (Great City) ជាទីក្រុងចក្រភពខ្មែរនាចុងសតវត្សទី១២ ឬដើមសតវត្សទី១៣ ក្នុងរជ្ជកាលព្រះបាទជ័យវរ្ម័នទី៧។ ទាំងទីក្រុងអង្គរវត្ត និងក្រុងអង្គរធំសុទ្ធតែស្ថាបនាឡើងជិតតំបន់បឹងទន្លេសាបប្រមានតែ១០គីឡូម៉ែត្រប៉ុណ្ណោះ។ ទីក្រុងក្រោយសម័យអង្គរក៏សាងសង់ក្បែរទន្លេ បឹងបួរ ដូចជាទីក្រុងលង្វែកនៅតាមដងទន្លេសាប ទីក្រុងភ្នំពេញបច្ចុប្បន្នស្ថិតនៅជាប់នឹងទន្លេ៤មុខ ។ ជាពិសេសខ្មែរអាមេរិកាំងនៅឡូវែលបានជ្រើសរើសមករស់នៅក្នុងទីក្រុងឡូវែលដែលនៅជាប់នឹងស្ទឹង Merrimack នេះក៏អាចជាសក្ខីកម្មនៃពូជពង្សខ្មែរបុរាណដែលនិយមរស់នៅ ឬបង្កើតទីក្រុងនៅក្បែរតំបន់មាត់ទឹក ស្ទឹង ទន្លេ និង បឹងបួរជាដើម។

ថ្វីត្បិតការជ្រើសរើសតំបន់ទំនាបទន្លេ បឹងបួរ ដើម្បីរស់នៅក្តី ឬបង្កើតទីក្រុងក្តី ការជ្រើសរើសបែបនេះមិនមែនគ្មានផលវិបាកនោះទេ។ ការតាំងទីក្រុងរបស់ដូនតាបុព្វបុរសយើងនៅតាមទន្លេបឹងបួរអាចងាយប្រឈមនឹងការឈ្លានពានតាមផ្លូវទឹកពីប្រទេសជិតខាង ហើយបុព្វបុរសយើងក៏បានដឹងច្បាស់អំពីចំនុចនេះដែរ។ នៅកំលុងគ្រិស្តសករាជឆ្នាំ ១.១៧៧ប្រទេសចម្ប៉ាដែលសព្វថ្ងៃជាផ្នែកមួយនៃប្រទេសវៀតណាមបានឈ្លានពានចក្រភពខ្មែរតាមបឹងទន្លេសាប។ កងទ័ពជើងទឹករបស់ចក្រភពខ្មែរបានកំទេចពួកទាហាន តទៅទំព័រទី ១៤

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសំរួលពីកាសារអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃ ច័ន្ទ ទី១៩ ខែសីហា ឆ្នាំ២០១៣

# កងរាជអាវុធហត្ថធ្វើការហ្វឹកហ្វឺន សម្រាប់ទប់ទល់នឹងបាតុកម្ម

*ដោយ: Saing Soenthrith and Denise Hruby - August 19, 2013*

ក្រុមមន្ត្រីបាននិយាយកាលពីម្សិលមិញថា កាលពីថ្ងៃសៅរ៍ កងរាជអាវុធហត្ថជាង១.០០០ នាក់បានចូលរួមក្នុងការហ្វឹកហ្វឺនស្របតាមស្ថានការណ៍ ដើម្បីត្រៀមទប់ទល់ករណីដែលបាតុកម្មតវ៉ាលទ្ធផលនៃការបោះឆ្នោតជ្រើសតាំងតំណាងរាស្ត្រកាលពីខែមុនដ៏ចម្រូងចម្រាសកើតឡើង។



កងរាជអាវុធហត្ថពាក់អាវក្រោះត្រូវបានហ្វឹកហ្វឺនពីរបៀបគ្រប់គ្រងក្រុមមនុស្ស និងពីការទប់ទល់កុបកម្ម តាមរយៈការហ្វឹកហាត់សម្តែង ជាឈុតបញ្ចេញប្រតិកម្មចំពោះមហាបាតុកម្ម រាប់ទាំងការប្រើខែល និងដំបងឆក់ផងដែរ។

មន្ត្រីកងរាជអាវុធហត្ថធ្វើការហ្វឹកហាត់ពីរបៀបគ្រប់គ្រងក្រុមមនុស្ស និងពីការទប់ទល់កុបកម្ម កាលពីថ្ងៃសៅរ៍ នៅពហុកីឡាដ្ឋានជាតិអូឡាំពិក ។ គណបក្សសង្គ្រោះជាតិបានគំរាមម្តងហើយម្តងទៀតធ្វើមហាបាតុកម្ម។

លោក ខេង ទីតូ អ្នកនាំពាក្យកងរាជអាវុធហត្ថបានមានប្រសាសន៍កាលពីម្សិលមិញ អំពីការហ្វឹកហ្វឺននៅពហុកីឡាដ្ឋានអូឡាំពិក ក្នុងរាជធានីភ្នំពេញថា "យើងបានហ្វឹកហ្វឺនពួកគេតាមយុទ្ធសាស្ត្ររបស់យើងដើម្បីទប់ទល់មហាបាតុកម្ម។ ប្រសិនបាតុករប្រើអំពើហិង្សា យើងនឹងបង្ក្រាបពួកគេ លើកលែងតែគ្មានអាវុធ ។ ប្រសិនពួកគេប្រើអាវុធ យើងនឹងប្រើអាវុធរបស់យើងទប់ទល់ពួកគេវិញ"។

ខ្សែវីដេអូអំពីវគ្គហ្វឹកហ្វឺននេះ ដែលបង្ហោះតាមបណ្តាញសង្គម ហ្វេសប៊ុកបង្ហាញ ក្រុមបុរសគ្មានអាវុធស្លៀកពាក់ឯកសណ្ឋានធ្វើ ជាអ្នកតវ៉ាព្យាយាមរុញច្រានជញ្ជាំងកម្លាំងកងរាជអាវុធហត្ថ ដែលកាន់ខែលធំៗ និងដំបងឆក់។

គណបក្សសង្គ្រោះជាតិដែលជាគណបក្សប្រឆាំងបានគំរាមធ្វើការតវ៉ាម្តងហើយម្តងទៀតចាប់តាំងពីគណបក្សទាំងពីរបានអះអាងរៀងៗខ្លួនថា ខ្លួនបានឈ្នះការបោះឆ្នោតថ្ងៃទី២៨ ខែកក្កដា ដោយគណបក្សសង្គ្រោះជាតិចោទថា មានការលួចបន្លំសន្លឹកឆ្នោតយ៉ាងច្រើន។ ទោះជាយ៉ាងណាពួកគេថា ការអំពាវនាវធ្វើបាតុកម្មគឺជាជម្រើសចុងក្រោយ។

លោក យឹម សុវណ្ណ អ្នកនាំពាក្យគណបក្សសង្គ្រោះជាតិបានលើកឡើងម្តងទៀតកាលពីម្សិលមិញថា នឹងមានការអំពាវនាវធ្វើមហាបាតុកម្មប្រសិនបើការចរចាអំពីការស៊ើបអង្កេតឯករាជ្យមួយចំពោះភាពមិនប្រក្រតីទទួលបរាជ័យ។

លោក សុវណ្ណ បានមានប្រសាសន៍ថា "មិនទាន់មានកាលបរិច្ឆេទសម្រាប់ការធ្វើបាតុកម្ម ទេ វាជាជម្រើសចុងក្រោយ ហើយសម្រាប់ពេលនេះ យើងនៅតែមានឱកាសរកដំណោះស្រាយដោយសន្តិវិធី"។ លោកបានបន្ថែមថា បាតុកម្មណាមួយដែលដឹកនាំដោយគណបក្សនេះ នឹងប្រព្រឹត្តទៅប្រកបដោយសន្តិវិធី។

ទោះជាយ៉ាងណា លោក ផៃ ស៊ីផាន អ្នកនាំពាក្យទីស្តីការគណៈរដ្ឋមន្ត្រីបានមានប្រសាសន៍ថា វាជាភារកិច្ចរបស់រដ្ឋាភិបាលដើម្បីធានាថាយោធាត្រូវបានហ្វឹកហាត់ដើម្បីបញ្ចេញប្រតិកម្មដោយសមស្របចំពោះការតវ៉ា។ លោកបានមានប្រសាសន៍ថា "យើងត្រូវធានាថា អ្វីៗស្ថិតក្រោមការគ្រប់គ្រង"។ លោក ផៃ ស៊ីផាន បន្ថែមថា ដោយសំដៅទៅលើប្រធាន និងអនុប្រធានគណបក្សសង្គ្រោះជាតិថា "ខ្ញុំមិនដឹងថា កុប្បកម្មនឹងកើតឡើងនៅពេលណាទេ មានតែលោក សម រង្ស៊ី និងលោក កឹម សុខា ទេ ទើបដឹង"។

ការហ្វឹកហ្វឺនកងរាជអាវុធហត្ថធ្វើឡើងចំពេលមានការបង្កើនសន្តិសុខទូទៅក្រោយការបោះឆ្នោត ដែលគេឃើញមានរថពាសដែកត្រូវបានដាក់ពង្រាយនៅក្រៅរាជធានីភ្នំពេញ និងរបាំងលួសបន្លាដឹកទៅកាន់ស្នងការដ្ឋាននគរបាលរាជធានី។ កាលពីសប្តាហ៍មុន រថក្រោះ និងជើងទម្រគ្រាប់រ៉ុកកែតបានមកដល់កំពង់ផែស្វយ័តខេត្តព្រះសីហនុ ប៉ុន្តែរដ្ឋាភិបាលបានឱ្យដឹងថា ការដឹកជញ្ជូននេះគ្រោងធ្វើនៅពេលណាក៏បាន ដែរ ហើយវាមិនទាក់ទងនឹងការបោះឆ្នោតឡើយ។

លោកស្រី ជា វណ្ណាត អ្នកវិភាគនយោបាយឯករាជ្យ បានថ្លែងកាលពីម្សិលមិញថា ការហ្វឹកហាត់ស្របតាមស្ថានការណ៍នេះមិនមែនសុទ្ធតែអាក្រក់នោះទេ។ លោកស្រីបានបន្តថា "បាតុករ និងនគរបាលចាំបាច់ត្រូវតែហ្វឹកហាត់ពីរបៀបធ្វើបាតុកម្មដោយសន្តិវិធី។ ប្រសិនពួកគេមិនហ្វឹកហាត់ទេ ពេលនោះវាអាចគ្រប់គ្រងលែងបានហើយវាអាចបង្កឱ្យមានគ្រោះថ្នាក់"៕

*ប្រែសម្រួលដោយ: ចេវ ប៊ុនធី*

# Military Police Receive Training for Violent Demonstrations

*By Denise Hruby and Saing Soenthrith - August 19, 2013*

More than one thousand military police officers on Saturday participated in simulated exercises designed to prepare them should demonstrations over the contested results of last month's national election break out, officials said Sunday.

The officers, clad in bulletproof vests, were trained in crowd control and riot response tactics, playing out possible scenarios of how to react to mass protests, including the use of shields and electric batons.

Military police officers conduct exercises in crowd control and riot response tactics on Saturday at Phnom Penh's Olympic Stadium. The opposition CNRP has repeatedly threatened a mass demonstration if an independent inquiry into irregularities during the July 28 national election is not carried out.

"We trained them in our strategy to prevent mass demonstrations," military police spokesman Kheng Tito said Sunday of the exercises that took place at Phnom Penh's Olympic Stadium.

"If the demonstrators use violence, we will crack down on them, but without weapons. If they use weapons, we will use our weapons against them," he said.

Videos of the training sessions posted on Facebook show unarmed men in uniform pretending to be protesters try to push back a wall of military police officers holding large shields and batons.

The opposition CNRP has repeatedly threatened protests since both parties claimed to have won the July 28 vote, with the CNRP alleging massive fraud. However, they have stipulated demonstrations would only be called as a last resort.

CNRP?spokesman Yim Sovann reiterated Sunday that a mass protest would only be called if negotiations over an independent investigation into election irregularities broke down.

"There is no date for a demonstration, it's the last choice and for the time being we still have room for a peaceful solution," Mr. Sovann said, adding that any demonstrations by the party would be peaceful.

However, Council of Ministers spokesman Phay Siphan said that it was the government's duty to ensure that the military was trained to react appropriately to protests.

"We have to make sure that everything remains under control," he said.

"I have no idea [for] when to expect riots-Sam Rainsy and Kem Sokha know," Mr. Siphan added, referring to the CNRP's president and vice-president.

The military police training comes amid a general step-up in security in the wake of election, which has seen armored personnel carriers deployed outside Phnom Penh.

Last week, tanks and rocket launchers arrived at the Sihanoukville Autonomous Port, but the government has said the shipment had been scheduled for some time and was not election-related.

Independent political analyst Chea Vannath said Sunday that the simulation exercises were not necessarily a bad thing.

"Demonstrators and police need to be trained on how to have a peaceful demonstration. If they are not trained, then it can get out of control, and then it can be ugly," she said.

តមកពីទំព័រទី ១២

## ដើមកំណើតនៃពិធីប្រណាំងទូក"ង"...

ឈ្លានពានរបស់ប្រទេសចម្ប៉ាដោយជោគជ័យ។ មានការកត់ត្រាប្រវត្តិសាស្ត្រថា មានឈាមក្រហមពាសពេញបឹងទន្លេសាប។ នេះបញ្ជាក់ថា កងទ័ពជើងទឹករបស់ចក្រភពខ្មែរសម័យកាលនោះមានការរៀបចំ និងអភិវឌ្ឍន៍ដល់កំពូល ព្រមទាំងទទួលបានការគាំទ្រ និងអបអរសាទរពេញទំហឹងរហូតមកដល់បច្ចុប្បន្ននេះក្នុងរូបភាពជាបុណ្យជាតិ គឺបុណ្យប្រណាំងទូក"ង"ជារៀងរាល់ឆ្នាំនេះឯង។ នៅក្នុងកំណត់ត្រារបស់អ្នកការទូតប្រទេសចិនឈ្មោះ ជូតាក្វាន់ ក្នុងឆ្នាំ១.២៩៦ ក៏បានផ្តល់សក្ខីកម្មដល់ការប្រារព្ធការប្រណាំងទូក"ង"នេះផងដែរ។ លោក ជូតាក្វាន បានរៀបរាប់ថា "កងទ័ពជើងទឹកចក្រភពខ្មែរអុំទូកវែងៗដែលមានទ្រង់ទ្រាយដូចពស់ ឬនាគសមុទ្រ"។

មិនត្រឹមតែប្រើប្រាស់សំរាប់កងទ័ពជើងទឹកប៉ុណ្ណោះទេ ទូក "ង" ក៏បានត្រូវប្រើជាមធ្យោបាយដឹកជញ្ជូនមន្ត្រីរាជការរាជវង្សានុវង្សពីកន្លែងមួយទៅកន្លែងមួយប្រៀបដូចជាការប្រើប្រាស់ដំរី ឬរទេះគោ ឬរទេះសេះអញ្ចឹងដែរ។ សក្ខីកម្មនេះមានឆ្លាក់បញ្ជាក់នៅលើជញ្ជាំងប្រាសាទបាយ័ន ឬអង្គរធំដែលសាងសង់ឡើងក្នុងសតវត្សទី១២ទៀត ផង។



សរុបសេចក្តីមកបុព្វបុរសខ្មែរបានប្រើប្រាស់ទូក"ង"មិនត្រឹមតែជាមធ្យោបាយធ្វើដំណើរសំរាប់មុខការផ្សេងៗរបស់រាជវង្សានុវង្សប៉ុណ្ណោះទេ តែទូក"ង"ត្រូវបានប្រើប្រាស់ដើម្បីបុព្វហេតុការពារទឹកដី និងជាតិសាសន៍ខ្មែរឱ្យបានគង់វង្សរហូតមកដល់សព្វថ្ងៃនេះ។ ក្រៅពីការប្រើប្រាស់ក្នុងសមរភូមិប្រយុទ្ធទូក"ង" ក៏ត្រូវបានប្រើប្រាស់សំរាប់ហាត់ហ្វឹកហ្វឺនកងទ័ពជើងទឹកជាប្រចាំផងដែរ។ យុទ្ធសាស្ត្រ និងទម្លាប់នេះក៏បានក្លាយទៅជាប្រពៃណីខ្មែរយើងតរៀងមក។ ហេតុនេះការប្រារព្ធពិធីប្រណាំងទូក"ង"បច្ចុប្បន្ននេះ គឺមានដើមកំណើតមួយផ្នែកធំចេញពីការអបអរសាទរប្រពៃណីដូនតាដែលបន្សល់មកជាងពាន់ឆ្នាំមកហើយ។ អ្វីដែលគួរឱ្យកោតសរសើរបំផុត គឺខ្មែរអាមេរិកាំងនៅតាមបណ្តារដ្ឋមួយចំនួន ក៏ដូចជាពលរដ្ឋខ្មែរនៅប្រទេសនានាលើពិភពលោកដែលរស់នៅក្បែរស្ទឹង ទន្លេ បឹងបួរ តែងតែនាំគ្នាប្រារព្ធពិធីប្រណាំងទូក "ង"ជារៀងរាល់ឆ្នាំ ដើម្បីរក្សាប្រពៃណីដ៏ពិសិដ្ឋរបស់បុព្វបុរសខ្មែរយើង៕

តមកពីទំព័រទី ១០

## ឡូវែលចេញទៅ...

"ហ៊ុន សែន ត្រូវតែចុះចេញពីតំណែង"

"អ.ស.ប ត្រូវតែជួយពិនិត្យសន្លឹកឆ្នោតដែលមិនប្រក្រតីពេលបោះឆ្នោត២០១៣"

"សូមឱ្យ UN ជម្រុញឱ្យមានការ"

"សូមកុំឱ្យសង្គ្រោះជាតិចូលរួមជាមួយរដ្ឋាភិបាល ហ៊ុន សែន "

ក្នុងពេលកំពុងធ្វើបាតុកម្មប្រមាណ១ម៉ោង លោក សម រង្ស៊ី បានចូលរួមបាតុកម្មតាមប្រព័ន្ធអ៊ីនធើណេត "ស្កាយ" អរគុណសរសើរ និងរំភើបដល់ក្រុមដល់ក្រុមបាតុករច្រើនលើសលុបដែលមកការពារផលប្រយោជន៍នៃប្រជារាស្ត្រខ្មែរ ។

បាតុកម្មបានបញ្ចប់នៅម៉ោងពារសៀលនៅពេលនោះបងប្អូនខ្មែរបានទទួលដំណឹងថ្មីមួយថា "បាតុកម្មប្រជាពលរដ្ឋខ្មែរនៅកម្ពុជានឹងប្រព្រឹត្តនៅថ្ងៃទី២៤ សីហាខាងមុខ" ហើយពលរដ្ឋខ្មែរនៅក្រៅប្រទេសអាចនឹងត្រូវអញ្ជើញទៅបង្ហាញឆន្ទៈម្តងទៀតនៅវិមានប្រធានាធិបតីរដ្ឋធានីវ៉ាស៊ីនតោន ៕ **មុំ សេកនី**

# មហាបាតុកម្មសង្គ្រោះជាតិ / Manifestation

## ជំរាបសួរបងប្អូនជនរួមជាតិជាទីគោរពរាប់អាន

បងប្អូនជនរួមជាតិរបស់យើងនៅឯក្នុងប្រទេសបានក្រោកឡើងស្រុះគ្នា ដើម្បីសង្គ្រោះជាតិដោយបានបោះឆ្នោតផ្តល់សេចក្តីទុកចិត្តដល់គណបក្សសង្គ្រោះជាតិយ៉ាងច្រើនលើសលប់ កាលពីថ្ងៃទី២៨ ខែកក្កដា ឆ្នាំ២០១៣ កន្លងទៅថ្មីៗនេះ ។

ក៏ប៉ុន្តែជ័យជំនះជាប្រវត្តិសាស្ត្រនេះត្រូវបាននឹងកំពុងប្លន់យកដោយក្រុមជនផ្តាច់ការមួយក្តាប់តូចដែលលើកបន្តុបឱ្យកាន់អំណាចដោយយួនហាណូយតាំងពីឆ្នាំ ១៩៧៩ ។

ក្នុងនាមយើងជាកូនខ្មែរយើងមិនអាចបណ្តោយឱ្យមហាជ័យជំនះនេះ របូតបាត់ទៅបានឡើយ ។ នេះជាឱកាសចុងក្រោយតែមួយគត់សំរាប់យើងក្នុងការជួយស្រោចស្រង់ប្រទេសជាតិពីក្រញាំជនផ្តាច់ការពុករលួយបក្ខពួក និងក្រុមគ្រួសារនិយមរណបបរទេស ។

អាស្រ័យហេតុនេះយើងខ្ញុំជាគណៈកម្មការរៀបចំមហាបាតុកម្មសង្គ្រោះជាតិ សូមគោរពអញ្ជើញបងប្អូនជនរួមជាតិទាំងអស់ ជាពិសេសបងប្អូនដែលរស់នៅក្នុងសហគមន៍អឺរ៉ុប

មេត្តាចូលរួមមហាបាតុកម្មនេះនៅថ្ងៃច័ន្ទ ទី២៦ ខែសីហា ឆ្នាំ ២០១៣ នាទីក្រុងសឺណែវ ប្រទេសស្វីស និងនៅថ្ងៃសុក្រ ទី៣០ ខែសីហា ឆ្នាំ២០១៣ នាទីក្រុងប្រ៊ុស្សែល ប្រទេសប៊ែលស៊ិក កុំ បី អាក់ ខាន ឡើយ ។

ដើម្បីបានទទួលដំណឹងបន្ថែម សូមមេត្តាទាក់ទងនឹងគណៈកម្មការរៀបចំមួយចំនួនដែលមានរាយនាមព្រមទាំងលេខទូរស័ព្ទដូចខាងក្រោម :

**ប្រទេសបារាំង :**

១-លោក សេង ហ៊ល :+33 9 51 43 86 08 (ប៉ារីស)

២-លោក ថៃ មករា : +33 6 32 58 12 87 (លីយ៉ុង)

៣-លោក យ៉ឹង ថា : +33 6 48 13 98 66 (លីយ៉ុង)

៤-លោក លី ពឿង : +33 6 68 44 13 33 (លីយ៉ុង)

៥-លោក វ៉ាន់ វណ្ណារិន : +33 6 48 88 90 60 (ម៉ាកសីយ៍)

៦-លោក លាភ ឡេង : +33 6 10 54 97 73 (មូលូស)

៧-លោក ត្រង់សា បៃយ៉ា : +33 6 59 38 63 36 (ទូលូ)

**ប្រទេសស្វីស :**

១-លោក ទ្រុយ ទ្រឿង : +41 7 65 46 84 55

២-លោក ម៉ែន សាន់ : +41 7 97 43 38 14

**ប្រទេសប៊ែលស៊ិក :**

១-លោក ណណ ហ៊ី : +32 4 88 97 33 66

២-លោក ហុក ឈាងអាន : +32 4 79 82 81 82

**ជំរាបលា**

ការិយាល័យទំនាក់ទំនង គសរ-អឺរ៉ុប

*Continue from page 12*

## UN Rights Envoy Says Democracy...

Mr. Subedi's reports were "flimsy" and that he was "sorry" the rapporteur had felt the need to make such reports.

Such treatment echoed that meted out to his predecessors.

Kenyan law professor Yash Ghai endured a litany of verbal abuse from government officials, particularly Mr. Hun Sen, over the course of his three-year term as special rapporteur, and he resigned in 2008, citing a lack of support from the U.N.

Mr. Ghai's predecessor, Aus-trian law professor Peter Leuprecht, stepped down after five years and many spats with the government.

After being snubbed by the govern-ment in December 2012, Mr. Subedi said in his latest report that "the missed oppor-tunity for dialogue with the Government is a significant one."

Although Mr. Subedi was able to meet with key government figures when he returned in May, the mission was again blighted by unfavorable remarks from officials, allegations of a media ban on his activities and a student protest at a lecture he was delivering about investment that was organized by one of the ruling CPP's youth movements and called for him to end his mandate to monitor human rights in the country.

"[T]he Special Rapporteur re-grets that he was subjected to some unpleasant incidents during the mission," his report says.

"If the media reports are to be believed, these were staged protests designed to intimidate and harass the Special Rapporteur in order to distract him from his focus on substantive issues. He was also subjected to baseless allega-tions of bias against the Govern-ment," it says, adding that "the experience was unpleasant."

However, Mr. Subedi said the inci-dents had only strengthened his resolve and that he felt encouraged by messages of support for his mandate.

In his report, Mr. Subedi said he was also encouraged by the March release of Beehive radio station owner Mam Sonando from prison, after he was sen-tenced to 20 years in jail for fomenting a secessionist movement on charg-es that many be-lieved were trumped up.

He also welcomed a decision made in mid-July to allow opposition leader Sam Rainsy to return to Cambodia to par-ticipate in campaigning for the opposition CNRP ahead of the national election.

However, he said, "Cambodia still has some way to go in promoting and pro-tecting human rights, strengthening good governance, enhancing the independence and capacity of State institutions respon-sible for upholding people's rights."

Mr. Subedi said that while the gov-ernment had acknowledged these issues—something he saw as a "sign of progress"—there are still strides that must be made to ensure that the full democrati-zation of Cambodia can be realized.

"While the Constitution of Cam-bodia speaks of a liberal democracy, in reality the situation is akin to a limited democracy in many respects," he said.

"While the process of judicial, par-liamentary and electoral reform has been slow, the Gov-ern-ment is yet to act on most of the recommendations relating to the granting and management of econom-ic and other land concessions."

In his recommendations, Mr. Subedi honed in on the government's ability to listen to constructive criticism, which he said is decreasing.

"For democracy to function properly in Cambodia and for the democratic cul-ture to take root in society, those holding public positions must be willing to acknowledge shortcomings, for only then can solutions be found that are acceptable to all," he said.

"This realization does not yet seem to be prevalent in contemporary Cambodian society. As the Special Rapporteur has stated elsewhere, criti-cism is not a crime but an exercise of free-dom of conscience, an act of intelligence.

"These are inherent attributes of democracy. Their absence is one of the reasons why Cambodia falls short of the full liberal democracy envisaged in the Con-stitution of the country."

He added that the government needs to implement constitutionally mandated laws on the governance of the judiciary in order to put it on the path to independ-ence, while "appropriate measures should be taken to enhance the independence and capacity of the National Election Committee [NEC] to enable it to com-mand the full trust and confidence of the entire electorate within the country in future elections."

Mr. Subedi has said previously that a failure to implement proper reforms of the NEC would shake the confidence of the electorate and could lead to violence.

Council of Ministers spokesman Phay Siphan said he agreed with Mr. Subedi's assessment that Cambodia's democracy is limited, but said, "I think that everyone who understands that with de-mocracy in this world, no one has the best one on Earth."

"[Mr. Subedi] is here to be a partner, not a policeman," Mr. Siphan said. "He is not a professor on Cambodia. He is here to help Cambodia toward what everyone wants Cambodia to be.

"Of course they say Cambodia's democracy is limited—I agree. That's why we need to partner together to improve that. Everyone is looking for sta-bility and peace after the war."

As for how the relationship be-tween the government and Mr. Subedi would move forward, Mr. Siphan said, "we believe he has to build trust and confi-dence between himself and Cambodia and be together."

## ការបោះឆ្នោតជ្រើសតាំងតំណាងរាស្ត្រនីតិកាលទី៥
## ថ្ងៃទី២៨ខែកក្កដាឆ្នាំ២០១៣

លំដាប់លេខរៀងគណបក្សនយោបាយទាំង៨នៅលើសន្លឹកឆ្នោត ៖

| | | |
|---|---|---|
| ១-គណបក្ស សញ្ជាតិកម្ពុជា | ប្រធាន | លោក សេង សុកេង |
| ២-គណបក្ស ហ៊្វុនស៊ិនប៉ិក | ប្រធាន | ក្សត្រី នរោត្តម អរុណរស្មី |
| ៣-គណបក្ស សាធារណរដ្ឋប្រជាធិប្បតេយ្យ | ប្រធាន | អ្នកស្រី សុវត្ថស្សុវណ្ណបញ្ញាក្សីឡា |
| ៤-គណបក្ស ប្រជាជនកម្ពុជា | ប្រធាន | លោក ជា ស៊ីម |
| ៥-គណបក្ស ខ្មែរអភិវឌ្ឍន៍សេដ្ឋកិច្ច | ប្រធាន | លោក ហួត រាជចំរើន |
| ៦-គណបក្ស ខ្មែរឈប់ក្រ | ប្រធាន | លោក ក្រវ៉ាន់ ដារ៉ុង |
| ៧-គណបក្ស សង្គ្រោះជាតិ | ប្រធាន | លោក សម រង្ស៊ី |
| ៨-គណបក្ស សម្ព័ន្ធដើម្បីប្រជាធិប្បតេយ្យ | ប្រធាន | លោក ក្រុម វាសនា |

### គណបក្សនយោបាយឈរឈ្មោះបោះឆ្នោត
### ក្នុងការបោះឆ្នោតជ្រើសតាំងតំណាងរាស្ត្រ នីតិកាលទី៥
ថ្ងៃអាទិត្យ ទី២៨ ខែកក្កដា ឆ្នាំ២០១៣

| | |
|---|---|
| ១ | គណបក្ស សញ្ជាតិកម្ពុជា<br>គ.ស.ក |
| ២ | គណបក្សហ៊្វុនស៊ិនប៉ិច<br>រ.រ.ជ.ក.ឯ.អ.ស.ស |
| ៣ | គណបក្សសាធារណរដ្ឋប្រជាធិបតេយ្យ<br>គ.ស.រ.ប |
| ៤ | គណបក្សប្រជាជនកម្ពុជា<br>ប្រ.ជ |
| ៥ | គណបក្សខ្មែរអភិវឌ្ឍន៍សេដ្ឋកិច្ច<br>គ.ខ.អ.ស |
| ៦ | គណបក្សខ្មែរឈប់ក្រ<br>គ.ខ.ឈ.ក |
| ៧ | គណបក្សសង្គ្រោះជាតិ<br>គ.ស.ជ |
| ៨ | គណបក្សសម្ព័ន្ធដើម្បីប្រជាធិបតេយ្យ<br>គ.ស.ប |

នេះមិនមែនជាសន្លឹកឆ្នោតទេ
នៅមណ្ឌលរាជធានី ខេត្តខ្លះមានគណបក្សឈរឈ្មោះតែមួយចំនួនទេ

## សង្ខេបពីលទ្ធផលការបោះឆ្នោតថ្ងៃទី២៨កក្កដា២០១៣

**ការិយាល័យទាំងអស់:** ១៩ ០០៩ **បានចុះឈ្មោះបោះឆ្នោត:** ៩ ៦៧៥ ៤៥៣
**បានមកបោះឆ្នោត:** ? **អត្រាអ្នកចូលរួមបោះឆ្នោត៖** ? %

**ពីថ្ងៃទី២៨កក្កដា២០១៣មកការប្រកាសលទ្ធផលបណ្ដោះអាសន្នថ្ងៃទី១២សីហា២០១៣**

គ.ជ.ប=គណៈកម្មការជាតិរៀបចំការបោះឆ្នោត-បក្សសង្គ្រោះជាតិ(ប.ស.ជ)

**១**-ការបោះឆ្នោតថ្ងៃទី២៨កក្កដាបានប្រព្រឹត្តទៅធម្មតា ពេលថ្ងៃរសៀលលោកសម រង្ស៊ី បានថ្លែងថា **"ថ្ងៃនេះជាទិវាប្រវត្តិសាស្ត្រដែលគណបក្សសង្គ្រោះជាតិបានឈ្នះការបោះឆ្នោតជ្រើសតាំងតំណាងរាស្ត្រអាណត្តិទី៥ឆ្នាំ២០១៣"** តែលោកមិនបានបញ្ចេញចំនួនអាសនៈឡើយ។ ថ្ងៃដដែលម៉ោង១៨ម៉៣០ លោកខៀវ កញ្ញារិទ្ធ និង គ.ជ.ប បានឲ្យដឹងថាបក្សប្រជាជនបានឈ្នះនាំមុខដោយបានទទួល៦៨អាសនៈ បក្សសង្គ្រោះជាតិបាន៥៥អាសនៈ-គិតជាសម្លេងបក្សប្រជាជនបានទទួល២,៥លាននាក់ បក្សសង្គ្រោះជាតិបានទទួល២,៣លាននាក់ លើចំនួនអ្នកចុះឈ្មោះបោះឆ្នោត៩,៧លាននាក់-គិតជាភាគរយគឺមានតែ៥០%។ ថ្ងៃទី៣១កក្កដា គ.ជ.ប បានបញ្ចេញតួលេខម្ដងទៀត បក្សប្រជាជនបានទទួល៣,២លាននាក់ បក្សសង្គ្រោះជាតិបានទទួល២,៩លាននាក់-គិតជាភាគរយមាន៦៣% គឺមានពលរដ្ឋ៣,៥លាននាក់មិនបានមកបោះឆ្នោត។ នេះជាភាពមិនត្រឹមត្រូវមិនប្រក្រតីមួយក្នុងចំណោមភាពមិនប្រក្រតីជាច្រើនដទៃទៀតដែលបក្សសង្គ្រោះជាតិមិនយល់ព្រមទាមទារឲ្យមានការបង្កើតគណៈកម្មការឯករាជ្យត្រួតពិនិត្យភាពមិនប្រក្រតីនេះឡើងវិញ។ ភាពមិនប្រក្រតីមានការបាត់ឈ្មោះ-ឈ្មោះស្ទួន-ទឹកខ្មៅឆាប់លប់។ល។ ចន្លោះពេលមានភាពមិនប្រក្រតីនេះ លោកសមរង្ស៊ីបានឲ្យដឹងថាបក្សសង្គ្រោះជាតិបានទទួល៦៣អាសនៈ បក្សប្រជាជនបានទទួល៦០អាសនៈ។ គណៈកម្មការឯករាជ្យត្រួតពិនិត្យភាពមិនប្រក្រតីទាមទារឲ្យបង្កើតដោយបក្សសង្គ្រោះជាតិត្រូវមាន៖ គ.ជ.ប-បក្សប្រជាជន - បក្សសង្គ្រោះជាតិ-អង្គការសង្គមស៊ីវិលពាក់ព័ន្ធការបោះឆ្នោតនិងអ.ស.ប។ លោកសម រង្ស៊ី បានធ្វើលិខិតទៅលោក បានគីមូន អគ្គលេខាធិការអ.ស.បថ្ងៃទី៥សីហា ស្នើអង្គការនេះមកធ្វើការជាមួយក្រុមដទៃទៀតសំរាប់ស៊ើបអង្កេតភាពមិនប្រក្រតីនៅពេលមុននិងក្នុងពេលបោះឆ្នោត។ ប្រសិនជាមាន អ.ស.បមកក្នុងឋានៈជាអ្នកសង្កេតការណ៍។

**២**- ទោះបីជាបីជាការបង្កើតគណៈកម្មការចំរុះមិនបានកើតក៏ដោយ ក៏គ.ជ.ប បានប្រកាសលទ្ធផលបណ្ដោះអាសន្ននៅថ្ងៃទី១២សីហា២០១៣ដែរ ដែលធ្វើឲ្យស្ថានភាពនយោបាយមានភាពតានតឹងឡើង។ បក្សសង្គ្រោះជាតិបានធ្វើសេចក្ដីថ្លែងការណ៍មិនទទួលស្គាល់លទ្ធផលបណ្ដោះអាសន្ននេះ។ លទ្ធផលបណ្ដោះអាសន្នបានឲ្យដឹងថាបក្សប្រជាជនបានទទួល៣.២៣៥.៩៦៩សម្លេង-បក្សសង្គ្រោះជាតិបានទទួល២.៩៤៦.១៧៦សម្លេង លើចំនួនអ្នកដែលបានមកបោះឆ្នោត៦.៦២៧.៥៩៩ គិតជាភាគរយមាន៦៨%-ពីឆ្នាំ២០០៨មាន៧៤%-គិតជាចំនួនអ្នកមិនបានមកបោះឆ្នោតមាន៣.០៤៨.២៥៤នាក់។

តាមប្រភព៣៖ គ.ជ.ប-បក្សសង្គ្រោះជាតិ-COMFREL បានផ្ដល់លទ្ធផលខុសគ្នា

| | អាសនៈបក្សប្រជាជន | អាសនៈបក្សសង្គ្រោះជាតិ |
|---|---|---|
| ១-គ.ជ.ប | ៦៨ | ៥៥ |
| ២-បក្សសង្គ្រោះជាតិ | ៦៣ | ៦០ |
| ៣-COMFREL | ៦៧ | ៥៦ |

**៣**-មកដល់ពេលនេះដែល គ្មានទាន់ឃើញសញ្ញាណាមួយបង្ហាញដំណោះស្រាយនយោបាយប្រកបដោយយុត្តិធម៌សំរាប់ដោះស្រាយភាពមិនប្រក្រតីអាចនឹងចេញរួចឡើយ។

សាគូ សាម៉ុត-១២សីហា២០១៣

តមកពីទំព័រទី ៣

## ដល់ពេលជ្រើសយកអាវុធ...

រង់ចាំលទ្ធផលនៃការបោះឆ្នោតរបស់គ.ជ.ប. ពេលចរចាបង្កើតគណកម្មការស៊ើបអង្កេត ពេលរង់ចាំលិខិតរដ្ឋាភិបាលផ្ញើរទៅអ.ស.ប. សុំឱ្យចូលរួមជាអ្នកសង្កេតការណ៍ដែលសុទ្ធតែជាការបញ្ឆោត) ។ ១ខែនៃភាពស្ងប់ស្ងាត់នៅកម្ពុជាតាំងដំណើរដោយគ្មានរដ្ឋាភិបាល គ្មានសភាជាតិគ្មានបាតុកម្មមានតែសង្គ្រោះជាតិមិនយល់ព្រមលើតម្លៃលទ្ធផលសន្លឹកឆ្នោតមានតែរដ្ឋាភិបាលប្រជាជនត្រៀមកងកម្លាំងប្រដាប់អាវុធបំរុងកំទេចពលរដ្ឋគ្នាឯង ។ តើបរទេសនឹងចូលមកជួយសង្គ្រោះជាតិមែនទេ ? មិនប្រាកដជាមកចំពោះមុខទេ បើប្រយោលនិងមានច្រើនតែបើអ.ស.ប. លោក ស៊ូបេឌី វិញ នៅក្នុងរួចជាស្រេច និងក្លាយជាអ្នកជួយមកពីក្រៅនឹងលើកទឹកចិត្តដ៏ប្រសើរតែសង្គ្រោះជាតិក៏មានផ្ទៃក្នុងប្រកបដោយកម្លាំងចិត្តមោះមុតអាចពុសពារឧបសគ្គធំៗគួរឱ្យទុកចិត្តបាន។ ចុះខាង ហ៊ុន សែន វិញ? វៀតណាមប្រាកដជាមកជួយដូចសព្វមួយដងតែលាក់មុខ រីឯចិនមិនដែលយកទ័ពទៅលុកលុយប្រទេសណាផ្សេងក្រៅពីយួនទេ តទៅទំព័រទី ៣១

លទ្ធផលបណ្ដោះអាសន្នរបស់គ.ជ.ប ដែលបក្សសង្គ្រោះជាតិមិនទទួលស្គាល់ លទ្ធផលនៃការបោះឆ្នោតជ្រើសតាំងតំណាងរាស្ត្រនីតិកាលទី៥ថ្ងៃទី២៨ខែកក្កដាឆ្នាំ២០១៣

1=CNP សញ្ជាតិកម្ពុជា 2=FUNCINPEC ហ្វ៊ុនស៊ិនប៉ិច 3=RPD សាធារណរដ្ឋប្រជាធិបតេយ្យ 4= PPC បក្សប្រជាជនកម្ពុជា 5=KEDP ខ្មែរអភិវឌ្ឍន៍សេដ្ឋកិច្ច

12/08/2013 ដោយ: សាគូ សាមុត 6=KAPP ខ្មែរឈប់ក្រ 7=CNRP បក្សសង្គ្រោះជាតិ 8=LDP សម្ព័ន្ធដើម្បីប្រជាធិបតេយ្យ

| N° | Province/Capiale | Siège | 4-PPC | | 7-CNRP | | 1-CNP | 2-FUN | 3-RPD | 5-KEDP | 6-KAPP | 8-LDP | TOTAL |
|---|---|---|---|---|---|---|---|---|---|---|---|---|---|
| | | total | voix | siège | voix | siège | voix | voix | voix | voix | VOIX | voix | |
| | | | | NEC | | NEC | | | | | | | |
| 1 | Banteay Meanchey | 6 | 148593 | 4 | 64732 | 2 | 1768 | 30105 | 1962 | _ | 1432 | 2338 | 250930 |
| 2 | Battambang | 8 | 223733 | 5 | 162527 | 3 | 2582 | 15815 | 2696 | _ | 2741 | 7755 | 417849 |
| 3 | Kampong Cham | 18 | 376182 | 8 | 457819 | 10 | 6464 | 26202 | _ | _ | 8938 | 6748 | 882353 |
| 4 | Kampong Chhnang | 4 | 123341 | 2 | 96210 | 2 | 1281 | 14533 | 1315 | 1803 | 1441 | 1606 | 241530 |
| 5 | Kampong Speu | 6 | 180099 | 3 | 186867 | 3 | 1958 | 12449 | 2146 | 3111 | 2471 | 4008 | 393109 |
| 6 | Kampong Thom | 6 | 128799 | 3 | 115880 | 3 | 2326 | 22934 | 2740 | 4127 | 2344 | 2634 | 281784 |
| 7 | Kampot | 6 | 147265 | 3 | 125320 | 3 | 1473 | 11335 | 2106 | 3055 | 2074 | 2450 | 295078 |
| 8 | Kandal | 11 | 261587 | 5 | 366056 | 6 | 2152 | 8285 | 1434 | 2579 | 2533 | 4111 | 648737 |
| 9 | Koh Kong | 1 | 28632 | 1 | 11017 | 0 | 377 | 1527 | 386 | _ | 341 | 439 | 42719 |
| 10 | Kratié | 3 | 71052 | 2 | 59774 | 1 | 1417 | 4750 | 1337 | _ | 1294 | 1286 | 140910 |
| 11 | Mondulkiri | 1 | 17380 | 1 | 4244 | 0 | 366 | 963 | 379 | _ | _ | 211 | 23543 |
| 12 | Phnom Penh | 12 | 257351 | 5 | 382880 | 7 | 1257 | 7820 | 995 | _ | 2047 | 4904 | 657254 |
| 13 | Preah Vihear | 1 | 53935 | 1 | 19199 | 0 | 1030 | 4522 | 1470 | _ | 905 | 1087 | 82148 |
| 14 | Prey Vèng | 11 | 251689 | 5 | 287778 | 6 | 3582 | 13243 | 2324 | _ | 3465 | 6536 | 568617 |
| 15 | Pursat | 4 | 142135 | 3 | 48417 | 1 | 731 | 3384 | 1202 | 1306 | 834 | 1239 | 199248 |
| 16 | Ratanakiri | 1 | 39630 | 1 | 7821 | 0 | 582 | 1917 | 791 | _ | 407 | 489 | 51637 |
| 17 | Siem Reap | 6 | 193093 | 4 | 140737 | 2 | 3239 | 30338 | 4362 | _ | 3785 | 11319 | 386873 |
| 18 | Preah Sihanouk | 1 | 50110 | 1 | 30558 | 0 | 458 | 2310 | 505 | _ | 555 | 679 | 85175 |
| 19 | Stung Traeng | 1 | 34032 | 1 | 6962 | 0 | 502 | 2545 | 571 | _ | 312 | 375 | 45299 |
| 20 | Svay Rieng | 5 | 183258 | 3 | 99600 | 2 | 1722 | 6377 | 1659 | _ | 1674 | 2479 | 296769 |
| 21 | Takèv | 8 | 245387 | 4 | 236686 | 4 | 1713 | 14724 | 1992 | 3171 | 2455 | 3615 | 509743 |
| 22 | Kep | 1 | 14299 | 1 | 4165 | 0 | 101 | 739 | _ | _ | 209 | 109 | 19622 |
| 23 | Païlin | 1 | 16536 | 1 | 8959 | 0 | 143 | 707 | 167 | _ | 149 | 258 | 26919 |
| 24 | Oddar Meanchey | 1 | 47851 | 1 | 21968 | 0 | 899 | 4889 | 1176 | _ | 818 | 1714 | 79313 |
| | **TOTAL-12/08/2013** | 123 | 3235969 | 68 | 2946176 | 55 | 38123 | 242413 | 33715 | 19152 | 43222 | 68389 | 6627159 |
| | Elections législatives | | | | | | | | | | | | |
| | 28 juillet 2013 | | | | voix | siège | % | | voix | siège | % | | |
| | Bureau de vote | 19009 | 1_CNP | | 38123 | | | 5_KEDP | 19152 | | | | |
| | Inscrits | 9675453 | 2_FUN | | 242413 | | | 6-KCP | 43222 | | | | |
| | Vote | ? | 3_RPD | | 33715 | | | **7-CNRP** | **2946176** | **55** | **44.71** | | |
| | | ? | **4-PPC** | | **3235969** | **68** | **55.28** | 8-APD | 68389 | | | | |

# ខ្ញុំជឿជាក់លើវា

និពន្ធដោយ : លោក វ៉ាន់ ទូច និពន្ធបកប្រែដោយលោក មួង ណារេត

អត្ថបទតែងនិពន្ធខាងក្រោមនេះត្រូវបាននិពន្ធឡើងដោយលោក វ៉ាន់ ទូច ។ សាច់រឿងនេះនឹងឆ្លុះបញ្ចាំងអំពីដំណើរជីវិតតាំងពីកុមារភាពនៅប្រទេសកម្ពុជា រហូតក្លាយជាមនុស្សធំពេញវ័យ និងជាឪពុកម្នាក់នៅទីក្រុងឡូវែលសព្វថ្ងៃ។ នៅទីនេះ យើងខ្ញុំទទួលស្វាគមន៍ជានិច្ចនូវរាល់អត្ថបទតែងនិពន្ធរបស់ប្រិយមិត្ត។ សូមផ្ញើអត្ថបទតែងនិពន្ធរបស់លោកអ្នកមកយើងខ្ញុំតាមរយៈអ៊ីមែល DickHoweJr@gmail.com ។

ពីទីក្រុងភ្នំពេញមកដល់ដីក្រុងឡូវែល : ខ្សែជីវិតរបស់សិស្សអន្តរជាតិម្នាក់មកពីប្រទេសកម្ពុជា: ខ្ញុំជឿជាក់ថា ខ្ញុំពិតជាអាចសិក្សាចេះនិពន្ធដោយលោក វ៉ាន់ ទូច នៅពេលខ្ញុំអាយុបាន៥ឆ្នាំ នៅក្នុងពិភពលោកនេះខ្ញុំបានក្លាយជាមនុស្សឯកោគ្មានអ្វីទីពឹងក្រៅពីពឹងខ្លួនឯងប៉ុណ្ណោះ។ ពួកទាហានខ្មែរក្រហមបាននាំឪពុកម្តាយ និងបងប្អូនខ្ញុំទាំងប្រាំបួននាក់យកទៅសម្លាប់ចោលអស់គ្មានសល់ បន្ទាប់ពីពួកវាដឹងថា ឪពុកខ្ញុំធ្លាប់ធ្វើជាសាស្ត្រាចារ្យនៅសកលវិទ្យាល័យមួយ។ ខ្ញុំត្រូវត្រាច់ចរពីគ្រួសារមួយទៅគ្រួសារមួយទៀត ដើម្បីស្វែងរកជម្រកជ្រកអាស្រ័យ។ ជារឿយៗគ្រួសារដែលខ្ញុំជ្រកកោនជាមួយនៅក្រោយរបបប្រល័យពូជសាសន៍នោះ បានវាយដំច្រំផាក់ខ្ញុំទាំងផ្លូវកាយ និងផ្លូវចិត្តឥតស្រាកស្រាន្ត។ ប៉ុន្តែក្នុងដំណើរជីវិតដ៏លំបាកលំបិនបែបនេះ ខ្ញុំជឿថាខ្ញុំបានសិក្សាចេះដឹងនូវវិធីដែលចេះ ឱ្យខ្ញុំរៀនរស់ និងចេះតស៊ូ ដើម្បីបន្តជីវិតទៅមុខទៀត។

នៅពេលខ្ញុំឈានចូលដល់វ័យ១៥ឆ្នាំមិត្តរួមថ្នាក់ខ្ញុំម្នាក់បបួលខ្ញុំឱ្យទៅបង្រៀនគណិតវិទ្យាដល់គាត់ និងក្មេងៗប្អូននាក់ទៀត ដើម្បីដូរបាយហូប និងជម្រកស្នាក់នៅ។ ពេលនោះខ្ញុំចាប់ផ្តើមសិក្សាធ្វើជាគ្រូគេ។ ខ្ញុំជឿថាឱកាសបែបនេះបានបង្រៀនខ្ញុំឱ្យចេះអំពីរបៀបនៃការយកចំណេះអប់រំមកអនុវត្តជាក់ស្តែង។ ខ្ញុំចាប់ផ្តើមដឹងថា ប្រសិនបើខ្ញុំខំប្រឹងប្រែង និងតាំងចិត្តឱ្យមុតមាំនោះខ្ញុំនឹងអាចប្រើប្រាស់ចំណេះអប់រំនេះ ដើម្បីរំដោះខ្លួនខ្ញុំឱ្យរួចចាកផុតពីភាពក្រីក្រ និងជួយអ្នកដទៃបានច្រើនថែមទៀតផង។

ក្នុងឆ្នាំ ១៩៩៥ ខ្ញុំបានជួបលោក Frank Falcetta អតីតជំនួយការនាយករងនៃសាលា Middlesex Community College ។ គាត់មកប្រទេសកម្ពុជាមកស្វែងរកបេក្ខជនមួយរូបដែលស័ក្តិសមនឹងទទួលបាន តទៅទំព័រទី ២៣

# "Cambodian National Assembly Election" Good v Bad.

@Tooch A. Van, Tuesday, July 30 2013 at 6:30 am (Lowell, MA USA's time)

a good politician versus a bad politician

A good politician always thinks critically with integrity of the nation's interests, soul and heart before he/she acts and/or says his/her words, and who keeps his /her promises.

A bad politician thinks or act determined to advance ONLY his/her popularity and personal gain. He/she does not care of his/her supporter's benefits or the fate of the nation. When he/she calls him/herself a patriot or nationalist it's just a political propaganda.

It's like a good father versus a bad father:

A good father spends time reading or singing to his kids. He regularly helps them with their homework, spends time playing sports with them and take them out to eat. He commits to sharing household responsibilities with his spouse and most importantly, he makes himself a role model for his kids, and always thinks utmost of the success of his kids.

But a bad father does not want to take responsibilities for caring of his kids. A bad father goes out drinking or watching the games (without his kids) almost every evenings. He thinks by him paying for his kids's education or by hiring private teachers /tutors to teach his kids that he meets his responsibilities. He does not help his spouse with house chores. He thinks these tasks are only solely of his spouse's obligations and responsibilities. He never or barely thinks of the further destiny of his children.

It's like a good change versus a bad change:

Good change involves plenty of human and social capitals and involves a great team, that handles the affairs of the country with ability, quality and integrity. Good change like this brings peace and stability to the nation, and make the nation stronger and more prosperous.

But a bad change is change comes too fast with insufficient human/social capitals and an unqualified team. This kind of change brings destruction and chaos and a possibly even bloodshed for the nation.

We cambodians must say "Enough is Enough."

My dear fellow Cambodian youths, friends and others, please think this analysis with me critically, before you act or participate in a mass protest for this election's results. Doing otherwise might lead to anarchy if the nation does not prepare it yet: Think about who will gain versus who will lost if you do it. The nation's soul depends on you.

# អាជ្ញាធមិទូរគមនាគមន៍ប្រចាំតំបន់ឡូវែល

## LRTA បង្កើនចំនួនម៉ោងឡានក្រុងរត់ដល់ម៉ោង៩:៣០នាទីយប់

**ខ្មែរប៉ុស ស.រ.អា**

ក្នុងតំបន់ឡូវែលកន្លងមកអ្នកធ្វើការ សិស្ស និស្សិត និងប្រជាជនដែលប្រើប្រាស់ឡានក្រុងជាមធ្យោបាយធ្វើដំណើរត្រូវជួបនឹងការលំបាកជាក់ស្តែងមួយ គឺឡានក្រុងឈប់ដំណើរការត្រឹមម៉ោង៧:៤៥នាទីយប់ ជាហេតុធ្វើឱ្យគេស្វះស្វែងរកមធ្យោបាយដទៃទៀត ឬត្រូវប្រញាប់បញ្ចប់កិច្ចការទាំងតក់ក្រហល់ ឬទុកចោលការងារមួយឡែកសិន ដើម្បីមកចាប់ឡានក្រុងត្រឡប់ទៅផ្ទះ ឬគោលដៅរបស់គេវិញ។

ប៉ុន្តែចាប់ពីថ្ងៃច័ន្ទ ទី២៦ សីហា ឆ្នាំ២០១៣ នេះតទៅឡានក្រុងនឹងរត់រហូតដល់ម៉ោង៩:៣០នាទីយប់ នេះបើតាមអត្ថបទសរសេរដោយចេននីហ្វឺ មីយឺ (Jennifer Myers) ក្នុងគេហទំព័រ រូមហ្វីហ្វធី (Room 50) ដែលបានផ្សព្វផ្សាយព័ត៌មាននេះឡើង បន្ទាប់ពីសន្និសីទព័ត៌មានប្រកាសជាផ្លូវការនូវដំណើរការថ្មីនេះ។

យ៉ាងណាមិញអស់រយៈពេល១០ឆ្នាំដែលមជ្ឈមណ្ឌលកម្រងយុវជនដើម្បីភាពស្មើគ្នា (United Teen Equality Center) ឬហៅកាត់ថា (UTEC) ព្រមទាំងស្ថាប័នពាក់ព័ន្ធផ្សេងទៀត ពួតដៃគ្នាតស៊ូមតិក្នុងរឿងនេះ ក៏ដូចជាការបង្កើនចំនួនម៉ោងរត់ឡានក្រុង។ នៅឯចំណត ហ្គាឡាហ្វឺ (Gallagher Terminal) នៃសន្និសីទព័ត៌មាន នាថ្ងៃនោះមានវត្តមាន ប្រធានក្រុង ប៊ឺនី លីនជ្ជ៍ (Bernie Lynch) អភិបាលក្រុង ផាទ្រីក មឺហ្វី ( Mayor Patrick Murphy) នាយកប្រតិបត្តិនៃអជ្ញាធមិទូរគមនាគមន៍ប្រចាំតំបន់លោក ជីម ស្កែនឡែន (LRTA Executive Director Jim Scanlan) និងប្រធានសភាពាណិជ្ជកម្មតំបន់ឡូវែល អ្នកស្រី ដាញែល ម៉ាក ហ្វេដដិន ( Greater Lowell Chamber of Commerce President Danielle McFadden) និងអ្នករៀបចំក្រុមយូថិចធីន (UTEC Teen Organizer) ឈ្មោះ Debbie An ព្រមទាំងភ្ញៀវដទៃទៀត។

នេះជាព័ត៌មានល្អ សម្រាប់សហគមន៍ទាំងមូល និងអ្នកប្រើប្រាស់មធ្យោបាយធ្វើដំណើរសាធារណៈដោយឡានក្រុងទាំងអស់ក្នុងតំបន់ឡូវែល។ ចាប់ពីថ្ងៃច័ន្ទនេះតទៅឡានក្រុង LRTA នឹងរត់ដល់ម៉ោង៩៣០នាទី យប់ពីថ្ងៃច័ន្ទដល់ថ្ងៃសុក្រដោយមានការបន្ថែម៥៣ម៉ោងនៃការរត់របស់ឡានក្រុងស្មើនឹង៥០០០ម៉ោងគិតមួយឆ្នាំ។ ម្យ៉ាងវិញទៀតលទ្ធផលបង្កើនចំនួនម៉ោងគោចររបស់ឡានក្រុងអាចធ្វើទៅបាន ក៏អាស្រ័យជំនួយជាទឹកប្រាក់៥០ម៉ឺនដុល្លារ ($500,000) ពីរដ្ឋ និងសហព័ន្ធគិតទាំងទឹកប្រាក់២៣ម៉ឺនដុល្លារ($230,000)ចេញពីទឹកលុយនៃវិក័យប័ត្រតាមផ្លូវច្បាប់សម្រាប់មធ្យោបាយដឹកជញ្ជូន ។

សូមស្វែងយល់ព័ត៌មានពិស្តារជាភាសាអង់គ្លេសសរសេរដោយចេននីហ្វឺ មីយឺ (Jennifer Myers) ក្នុងគេហទំព័រ រូមហ្វីហ្វធី (Room 50)




Greater Lowell Chamber of Commerce President Danielle McFadden



LRTA Executive Director Jim Scanlan



Jennifer Myers



Mayor Patrick Murphy



Bernie Lynch

Debbie An

### Expanded Bus Service Starts Monday!

**By Jennifer Myers, 8/20/2013**

Bus service is too limited. The hours do not accommodate working people, especially young people, who rely on public transportation to get them to and from work.

That's the drum the staff

Continue to Page 30

តមកពីទំព័រទី ១២

## អ្នកធ្វើរបាយការណ៍ពិសេសរបស់...

ផ្សាយរបាយការណ៍សំខាន់ពីរដោយអ្នកធ្វើរបាយការណ៍ពិសេសរូបនេះរបាយការណ៍មួយស្តីពីកំណែទម្រង់ប្រព័ន្ធបោះឆ្នោត និងមួយទៀតស្តីពីសម្បទានដីធ្លីផ្សេងៗទៀតនោះ លោកបានទទួលរងពាក្យសម្តីមិនសមរម្យមួយចំនួន។ នេះជារឿងគួរឱ្យសោកស្តាយយ៉ាងខ្លាំងនៅពេលដែលការផ្តោតលើកិច្ចពិភាក្សារវាងអ្នកធ្វើរបាយការណ៍ពិសេសរូបនេះ និងរដ្ឋាភិបាលផ្តោតខ្លាំងតែទៅលើកិច្ចការដែលអង្គការសហប្រជាជាតិប្រាប់ឱ្យលោកធ្វើ និងមិនមែនផ្តោតលើរូបលោកក្នុងនាមលោកជាមនុស្សម្នាក់"។

លោក សុរិយា ស៊ូបេឌី ទំនងជាសំដៅដល់ពាក្យសម្តីរបស់លោក ឱម យ៉ិនទៀង ប្រធានគណៈកម្មាធិការសិទ្ធិមនុស្សកម្ពុជារបស់រដ្ឋាភិបាល កាលពីខែកញ្ញាឆ្នាំមុន ដែលបានចោទប្រកាន់លោក សុរិយា ស៊ូបេឌី ថា ធ្វើការឱ្យគណបក្សប្រឆាំង។ មួយខែក្រោយមកលោកនាយករដ្ឋមន្ត្រី ហ៊ុន សែន បានមានប្រសាសន៍អំឡុងសុន្ទរកថា ក្នុងពិធីប្រគល់សញ្ញាបត្រមួយថា របាយការណ៍របស់លោក សុរិយា ស៊ូបេឌី "មិនគួរឱ្យជឿ" ហើយបានមានប្រសាសន៍ថា លោក"សោកស្តាយ" ដែលអ្នកធ្វើរបាយការណ៍ ពិសេសរូបនេះគិតថា ចាំបាច់ត្រូវធ្វើរបាយការណ៍បែបនេះ។

បុព្វធិការី (អ្នកកាន់តំណែងមុន) របស់លោកក៏ធ្លាប់ជួបរឿងបែបនេះដែរ។ លោក យ៉ាស ហ្គាយ សាស្ត្រាចារ្យច្បាប់កេនយ៉ាបានអត់ទ្រាំនឹងពាក្យបៀតបៀនយ៉ាងច្រើនពីសំណាក់មន្ត្រីរដ្ឋាភិបាលជាពិសេសលោកនាយករដ្ឋមន្ត្រី ហ៊ុន្ន សែន តែម្តងអំឡុងរយៈពេលបីឆ្នាំដែលលោកកាន់តំណែងជាអ្នកធ្វើរបាយការណ៍ពិសេសហើយលោកបានលាឈប់ពីតំណែងកាលពីឆ្នាំ២០០៨ដោយលើកឡើងពីកង្វះការគាំទ្រពីអង្គការសហប្រជាជាតិ។

លោក ភីតធើ ឡីព្រិច សាស្ត្រាចារ្យច្បាប់អូស្ត្រាលី ដែលជាបុព្វធិការីរបស់លោក យ៉ាស ហ្គាយ បានចុះចេញពីតំណែងបន្ទាប់ពីកាន់តំណែងបានប្រាំឆ្នាំ និងមានជម្លោះជាច្រើនជាមួយរដ្ឋាភិបាល។

បន្ទាប់ពីត្រូវរដ្ឋាភិបាលព្រងើយកន្តើយដាក់កាលពីខែធ្នូ ឆ្នាំ២០១២ លោក សុរិយា ស៊ូបេឌី បានលើកឡើងនៅក្នុងរបាយការណ៍ចុងក្រោយរបស់លោកថា "ឱកាសខកខានសម្រាប់ការពិភាក្សាជាមួយរដ្ឋាភិបាលគឺជាឱកាសសំខាន់"។

ទោះបីជាលោក សុរិយា ស៊ូបេឌី អាចជួបជាមួយមន្ត្រីរដ្ឋាភិបាលសំខាន់ៗបាននៅពេលលោកវិលត្រឡប់មកវិញ កាលពីខែឧសភាក៏ដោយ ក៏បេសកកម្មនេះត្រូវបានធ្វើឱ្យខូចជាថ្មីម្តងទៀតដោយសារតែពាក្យសម្តីមិនពិរោះស្តាប់របស់រដ្ឋាភិបាលការចោទប្រកាន់ចំពោះបម្រាមមិនឱ្យប្រព័ន្ធផ្សព្វផ្សាយផ្សាយពីសកម្មភាពរបស់លោក និងការតវ៉ារបស់និស្សិតម្នាក់អំឡុងពេលលោកធ្វើបាឋកថា ស្តីពីការវិនិយោគដែលជាការរៀបចំឡើងដោយចលនាយុវជនរបស់គណបក្សប្រជាជនកម្ពុជា កំពុងកាន់អំណាច និងបានអំពាវនាវឱ្យលោកបញ្ចប់អាណត្តិរបស់ខ្លួនក្នុងការឃ្លាំមើលស្ថានភាពសិទ្ធិមនុស្សនៅក្នុងប្រទេសកម្ពុជា។

របាយការណ៍របស់លោកបានលើកឡើងថា "អ្នកធ្វើរបាយការណ៍ពិសេសសោកស្តាយដែលលោកត្រូវជួបហេតុការណ៍មិនល្អមួយចំនួនអំឡុងបេសកកម្មនេះ។ ការតវ៉ាទាំងនេះគឺជាការតវ៉ារៀបចំឡើងក្នុងបំណងបំភិតបំភ័យនិងបៀតបៀនអ្នកធ្វើរបាយការណ៍ពិសេសរូបនេះ ដើម្បីបង្វែរការចាប់អារម្មណ៍របស់លោកលើបញ្ហាសំខាន់ៗ។ លោកក៏បានរងការចោទប្រកាន់គ្មានមូលដ្ឋានថា ប្រឆាំងរដ្ឋាភិបាលទាំងលម្អៀងផងដែរ"។ របាយការណ៍នេះបានបន្តថា "នេះជាបទពិសោធដ៏អាក្រក់"។

ទោះជាយ៉ាងណា លោក សុរិយា ស៊ូបេឌី បានមានប្រសាសន៍ថា ហេតុការណ៍ទាំងនេះបានធ្វើឱ្យការប្តេជ្ញាចិត្តរបស់លោកកាន់តែរឹងមាំទៅវិញទេ ហើយលោកត្រូវបានជំរុញលើកទឹកចិត្តដោយសារគាំទ្រចំពោះអាណត្តិរបស់លោក។

នៅក្នុងរបាយការណ៍របស់លោក សុរិយា ស៊ូបេឌី បានថ្លែងថា លោកក៏ត្រូវបានជំរុញលើកទឹកចិត្តដែរ ដោយសារការដោះលែងលោក ម៉ម សូណង់ដូ ម្ចាស់ស្ថានីយវិទ្យុសម្បុកឃ្មុំចេញពីពន្ធនាគារកាលពីខែមីនា បន្ទាប់ពីលោកត្រូវបានតុលាការផ្តន្ទាទោសឱ្យជាប់ពន្ធនាគាររយៈពេល២០ឆ្នាំពីបទបង្កចលនាអបគមន៍តាមការចោទប្រកាន់ដែលមជ្ឈដ្ឋានជាច្រើនជឿថា ត្រូវបានប្រឌិតឡើង។

លោកក៏បានស្វាគមន៍ដែរ ចំពោះសេចក្តីសម្រេចរបស់រដ្ឋាភិបាលកាលពីពាក់កណ្តាលខែកក្កដា ដើម្បីអនុញ្ញាតឱ្យលោក សម រង្ស៊ី មេដឹកនាំគណបក្សប្រឆាំងបានវិលត្រឡប់មកប្រទេសកម្ពុជាវិញ ដើម្បីចូលរួមនៅក្នុងការធ្វើយុទ្ធនាការឃោសនាបោះឆ្នោតសម្រាប់គណបក្សសង្គ្រោះជាតិនៅមុនការបោះឆ្នោតជាតិ។

លោកបានមានប្រសាសន៍ថា ទោះជាយ៉ាងណាប្រទេសកម្ពុជានៅតែមានចំណុចមួយចំនួនដែលត្រូវបំពេញនៅក្នុងការជំរុញ និងការពារសិទ្ធិមនុស្ស ការពង្រឹងអភិបាលកិច្ចល្អពង្រឹងឯករាជភាព និងសមត្ថភាពរបស់ស្ថាប័នរដ្ឋដែលទទួលខុសត្រូវចំពោះការការពារសិទ្ធិរបស់ប្រជាពលរដ្ឋ"។

លោក សុរិយា ស៊ូបេឌី បានមានប្រសាសន៍ថា ខណៈពេលរដ្ឋាភិបាលទទួលស្គាល់បញ្ហាទាំងនេះ ជាអ្វីដែលលោកចាត់ទុកជា "សញ្ញាវិកចម្រើន" នោះ រដ្ឋាភិបាល តទៅទំព័រទី ២៨

តមកពីទំព័រទី ២០

## ខ្ញុំជឿជាក់លើវា....

អាហារូបករណ៍ ដើម្បីយកមកឱ្យសិក្សានៅសាលានោះ។ អ្នកនយោបាយខ្មែរជាច្រើនបានខំប្រឹងបញ្ចុះបញ្ចូលឱ្យលោក Frank ព្រមទទួលយកកូនស្រី ឬកូនប្រុសរបស់ពួកគេ។ ប៉ុន្តែលោក Frank សុខចិត្តមិនស្តាប់តាមពួកគេទេ។ ប៉ុន្តែមានគេណែនាំប្រាប់គាត់អំពីឈ្មោះខ្ញុំ។ ល្ងាចមួយនៅពេលពិសាអាហារគាត់សួរសំណួរខ្ញុំ។

"តើអ្នកចេះសរសេរភាសាអង់គ្លេសឬទេ?"

ខ្ញុំឆ្លើយថា "ខ្ញុំអត់ចេះទេ ប៉ុន្តែខ្ញុំអាចសិក្សាបាន..."

ពេលនោះលោក Frank សើចញឹមៗ និងឥតនិយាយអ្វីមួយម៉ាត់សោះ។

ខ្ញុំសញ្ជឹងគិតម្នាក់ឯង និងស្តីបន្ទោសខ្លួនឯងថា "ទូច! ឯងធ្វើឱ្យខូចការណ៍អស់... ឯងគួរប្រាប់គាត់ថា ឯងចេះសរសេរភាសាអង់គ្លេស"។ ភាពអាម៉ាស់បានរេរាំពេញខួរក្បាលខ្ញុំ។

ប៉ុន្តែក្រោយពេលចប់អាហារល្ងាចនោះ លោក Frank ហុចនាមប័ណ្ណគាត់មួយសន្លឹកមកខ្ញុំ និងប្រាប់ខ្ញុំឱ្យសរសេរអត្ថបទតែងសេចក្តីមួយឱ្យគាត់ ដោយរៀបរាប់អំពី"ហេតុអ្វីបានជាខ្ញុំចង់ទៅសិក្សានៅអាមេរិក"។

មួយឆ្នាំកន្លងផុតទៅខ្ញុំបានទទួលអាហារូបករណ៍ទៅសិក្សានៅសាលា Middlesex Community College។ ទីបំផុត សុបិនរបស់ខ្ញុំបានក្លាយជាការពិត។ ខ្ញុំបានឃើញសហរដ្ឋអាមេរិក។ ដំបូងៗខ្ញុំជួបបញ្ហាលំបាកយ៉ាងច្រើន ដោយសារភាសាអង់គ្លេសមានកម្រិត និងបញ្ហាវប្បធម៌។ ខ្ញុំមិនចេះរបៀបសរសេរ និងអានភាសាអង់គ្លេសឱ្យបានត្រឹមត្រូវ។ ខ្ញុំអត់ចេះរបៀបវិភាគ ឬរៀបចំអ្វីមួយឱ្យក្លាយជាគម្រោងមួយ។ តាមពិតបើនិយាយពីខាងវប្បធម៌ខ្ញុំមិនយល់នូវអ្វីដែលគេនិយាយ និងធ្វើនៅទីនេះទេ។ ជាពិសេសខ្ញុំមិនយល់រឿងកំប្លែងរបស់អាមេរិក និងខ្ញុំមិនយល់ការនិយាយរបៀបបញ្ឆិតបញ្ឆៀង។ នៅក្នុងថ្នាក់សិក្សាពេលគ្រូនិយាយរឿងកំប្លែងជូនកាលសិស្សសើចស្ទើរពេញមួយថ្នាក់ ប៉ុន្តែខ្ញុំមិនយល់មិនដឹងគេសើចស្អី។ ទោះជាយ៉ាងនេះក្តីក្រោយពីខ្ញុំបានខិតខំតាំងចិត្ត និងសំណាងយោងផ្សំផង ខ្ញុំបានសិក្សាចប់នៅសាលា Middlesex Community College។ មិនតែប៉ុណ្ណោះខ្ញុំបានទទួលបរិញ្ញាប័ត្រផ្នែកសិក្សាអន្តរជាតិ (BA in International Studies) និងសញ្ញាប័ត្រផ្នែកយុត្តិធម៌ខាងមនុស្សធម៌ និងយុត្តិធម៌សង្គម (Humanitarian and Social Justice) ពីសាលា Trinity College និងសញ្ញាប័ត្រពីសាលា Woodrow Wilson School ផ្នែកនយោបាយសាធារណៈ និងកិច្ចការបរទេស (Public Policy and International Affairs) នៅសកលវិទ្យាល័យ Princeton University និងបរិញ្ញាប័ត្រជាន់ខ្ពស់ (ឬអនុបណ្ឌិត) ពីសាលា Fletcher School ផ្នែកច្បាប់ និងការទូតនៃសកលវិទ្យាល័យ Tufts University... ។ ឃើញទេ? ខ្ញុំជឿថាខ្ញុំពិតជាអាចសិក្សាដើម្បីយកសញ្ញាប័ត្រសកលវិទ្យាល័យនៅស្រុកអាមេរិកបាន។

ខ្ញុំសូមបន្តជម្រាបឱ្យឆាប់អស់សាច់រឿងខ្ញុំ។ សព្វថ្ងៃនេះ ខ្ញុំដូចទទួលបានពរប្រទានពីទេវតាដ៏ឡូឡានៅជុំវិញខ្លួនខ្ញុំ ទាំងនៅកន្លែងធ្វើការ និងនៅផ្ទះ គឺមានសុទ្ធតែគ្រូបាចារ្យ និងមិត្តភ័ក្តិជាច្រើន។ នៅសាលា Middlesex Community College ខ្ញុំបានសិក្សាយល់ដឹងអំពីរបៀបបំពេញការងារជាមួយមិត្តរួមអាជីពរបស់ខ្ញុំប្រកបដោយវិជ្ជាជីវៈក្នុងការបង្រៀន និងលើកកម្ពស់សមត្ថភាពសិស្សរបស់យើង ដើម្បីឱ្យពួកគេមានមោទកភាពក្នុងការចេះសិក្សាដោយខ្លួនឯង និងឱ្យពួកគេចេះវិធីក្នុងការសម្រេចគោលដៅដ៏គាប់ប្រសើរបំផុតសម្រាប់អនាគតនៃជីវិតរបស់ពួកគេផងដែរ។ ទន្ទឹមនឹងនេះ ខ្ញុំកំពុងសិក្សាអំពីមធ្យោបាយសមស្របក្នុងការលើកសរសើរ និងលើកទឹកចិត្តដល់ស្ត្រីៗជាសហការីរបស់ខ្ញុំនៅកន្លែងធ្វើការដោយធ្វើយ៉ាងណាកុំឱ្យគេមើលឃើញថាជាការបៀតបៀនផ្លូវភេទ លម្មៀង ឬអ្វីមួយផ្សេង។ តាមវប្បធម៌ខ្មែរមនុស្សប្រុសមិនដែល ឬកម្រចេះនិយាយលើកសរសើរស្ត្រីណាស់។ ប៉ុន្តែខ្ញុំជឿថាខ្ញុំអាចសិក្សាដើម្បីធ្វើដូច្នេះបាន។

ពេលនៅផ្ទះ ខ្ញុំកំពុងរៀនធ្វើជាឧត្តមស្វាមី និងឪពុកដ៏ល្អម្នាក់។ ខ្ញុំចេះរៀនទទួលយកការចុះចាញ់ម្តងម្កាលនៅពេលចរចាជាមួយភរិយាខ្ញុំ ដោយចាត់ទុកវាជារឿងធម្មតា។ តាមវប្បធម៌ខ្មែរសង្គមខ្មែរជាសង្គមដែលមនុស្សប្រុសគ្រប់គ្រងអ្វីៗគ្រប់យ៉ាង។ ដូច្នេះប្រុសៗសម្រេចអ្វីក៏មិនចេះខុសដែរ។ ខ្ញុំកើតនិងធំដឹងក្តីក្នុងសង្គមបែបនេះ។ ពេលខ្លះខ្ញុំពិបាកទទួលយកបានណាស់ពេលឮប្រពន្ធខ្ញុំពោលពាក្យប្រកែកថា "ទេ" នៅពេលខ្ញុំចង់បានអ្វីមួយ។ ឧទាហរណ៍ខ្ញុំតែងតែស្រម័យចង់បានគ្រួសារធំមួយ។ ដូច្នេះខ្ញុំត្រូវចរចាជាមួយភរិយាខ្ញុំ។ ខ្ញុំយកជំនាញចរចាដែលខ្ញុំបានសិក្សាពីសាលា Fletcher School ផ្នែកច្បាប់ និងការទូត ដើម្បីចរចាជាមួយភរិយាខ្ញុំ។

ខ្ញុំប្រាថ្នាចង់បានកូនបួននាក់ ដើម្បីឱ្យកូនៗទាំងនោះមានគ្នាលេង និងបង្កើតគ្រួសារធំ និងប្រកបដោយសុខមង្គលមួយ។

ប៉ុន្តែភរិយាខ្ញុំឆ្លើយថា "អត់ព្រម" គាត់បន្តថា កូនពីរគឺល្មមគ្រប់គ្រាន់ពេកហើយសម្រាប់បង។

ប្រការនេះខ្ញុំពិបាកនឹងទទួលយកខ្លាំងណាស់។

ប៉ុន្តែ ខ្ញុំជឿថាខ្ញុំបានសិក្សាចេះសម្របខ្លួនដើម្បីទទួលយកចម្លើយ"ទេ" ពីភរិយាខ្ញុំហើយ។

មុននឹងបញ្ចប់ ខ្ញុំសូមរៀបរាប់បន្តិចអំពីកូនប្រុសអាយុ៤ឆ្នាំរបស់ខ្ញុំ។ គាត់ឈ្មោះ វ៉ាន់ វិនស្តុន (Winston Van) ។ ភរិយាខ្ញុំ និងខ្ញុំបានអប់រំបណ្តុះបណ្តាលគាត់ឱ្យគាត់ចេះយកដៃខ្ទប់មាត់នៅពេលគាត់ក្អក ឬកណ្តាស់។ ការអប់រំបែបនេះគាត់ចាប់បានយ៉ាងខ្ជាប់ខ្ជួន។ មិនតែប៉ុណ្ណោះគាត់ថែមទាំងតាមឃ្លាំមើលកាយវិការខ្ញុំគ្រប់ពេល។ **តទៅទំព័រទី ៣០**

# ម្ហូបអាហារ និងលំហាត់ប្រាណដែលជួយពន្យឺតដំណើរទៅរកភាពចាស់

តើអ្នកអាចមិនទទួលទានអ្វីសោះពេញមួយថ្ងៃបានដែរឬទេ? មនុស្សមួយចំនួនអះអាងថាពួកគេអាច ប៉ុន្តែជារឿយៗមិនមែនគ្មានផលវិបាកនោះទេ។ ចំណីអាហារគឺជាផ្នែកមួយដ៏សំខាន់នៃជីវិតប្រចាំថ្ងៃរបស់មនុស្ស។ ម្ហូបអាហារទាំងនោះជួយចិញ្ចឹមកោសិកានៃរាងកាយរបស់យើង ដូច្នេះហើយទើបរាល់ប្រព័ន្ធសរីរាង្គរបស់យើងអាចដំណើរការបានជាធម្មតា។


ផ្លែ Blueberry


ផ្លែ Avocado


ផ្លែ Blackberry


ផ្លែBlackberry


បន្លែSpinach

ចំណីអាហារក៏ដូចជាលំហាត់ប្រាណផងដែរ គឺជាកត្តាដ៏សំខាន់ក្នុងដំណើរវិវឌ្ឍន៍ទៅរកភាពចាស់ផងដែរ។ ពួកវាអាចថែមទាំងបង្កើនល្បឿន ឬបន្ថយល្បឿននៃដំណើរវិវឌ្ឍន៍ទៅរកភាពចាស់ទៀតផង។

ដូច្នេះប្រសិនបើគោលដៅរបស់អ្នកគឺដើម្បីរស់នៅក្នុងជីវភាពដែលមានគុណភាពខ្ពស់ឱ្យបានកាន់តែយូរខាងក្រោមនេះគឺជាជំរើសម្ហូបអាហារល្អបំផុត និងកម្មវិធីធ្វើលំហាត់ប្រាណមួយចំនួនដែលនឹងនាំអ្នកឱ្យឈានដល់គោលដៅចុងក្រោយរបស់អ្នក។

ចំណីអាហារដែលជួយពន្យឺតដំណើរវិវឌ្ឍន៍ទៅរកភាពចាស់រួមមាន:

១-ពពួកផ្លែប៊ែរី ផ្លែប៊ែរី ជាពិសេសក្រុមផ្លែប្លែកប៊ែរី ផ្លែស្ត្របឺរី និងផ្លែប៊្លូប៊ែរីមានកំរិតសារធាតុ Flavonoids ឬវីតាមីន P ខ្ពស់ជាប្រភេទសារធាតុមួយប្រឆាំងអុកស៊ីតកម្មដ៏មានថាមពលបំផុតក្នុងចំណោមសារធាតុដទៃទៀតដែលជួយដល់រាងកាយក្នុងការប្រយុទ្ធប្រឆាំងនឹងម៉ូលេគុល Free Radicals បំផ្លាញសុខភាពដែលបង្កឱ្យមានជំងឺមហារីក និងធ្វើឱ្យចាស់មុនអាយុ។ ផ្លែឈើទាំងនេះក៏អាចជួយពង្រឹងការចងចាំដែលអន់ថយទៅនៅពេលយើងឈានចូលវ័យកាន់តែចាស់ផងដែរ។

**២-ពពួកបន្លែដែលមានមែកធាង :** ទទួលទានបន្លែដែលមានមែកធាងដូចជាផ្កាខាត់ណាខាត់ណា ស្ពៃក្រញាញ់ ស្ពៃក្តោប ស្ពៃក្រហម បន្លែស្លឹក មើមស្ពៃ និងសណ្តែកបណ្តុះផ្តល់ឱ្យអ្នកនូវការការពារបន្ថែមពីសារធាតុពុល Toxins និងប្រភេទថ្នាំបរទេសផ្សេងទៀតដែលជំរុញល្បឿនឱ្យឆាប់ចាស់ធ្វើឱ្យប្រព័ន្ធភាពស៊ាំចុះខ្សោយ និងបង្កឱ្យមានជំងឺច្រើន។

ដើម្បីទទួលបាននូវអត្ថប្រយោជន៍ពីគុណប្រយោជន៍នៃបន្លែទាំងនោះអ្នកត្រូវតែទទួលទានប្រភេទបន្លែដែលមានមែកធាងមួយណាក៏បានឱ្យបាន១១៥ ក្រាមក្នុងមួយថ្ងៃ និងល្អបំផុត គឺទទួលទានទាំងនៅស្រស់។

៣- ស្ពីណាច Spinach (បន្លែម្យ៉ាងដូចស្ពៃខ្មៅ): Spinach គឺជាប្រភេទបន្លែមួយផ្សេងទៀតដ៏សំខាន់ក្នុងការទទួលទានរាល់ថ្ងៃ។ Spinach សំបូរនូវវីតាមីន K ដែលក្រៅពីមានសារៈសំខាន់ក្នុងការធ្វើឱ្យឈាមកកវាក៏ជួយកាត់បន្ថយនូវផលប៉ះពាល់នៃភាពចាស់ទៅលើគុណភាពឆ្អឹងផងដែរ ។ Spinach ក៏សំបូរនូវសារធាតុ Zeazanthin និង Lutein (សារធាតុលឿងក្នុងស៊ុត) និងជីវជាតិទ្រទ្រង់រាងកាយដែលជួយកាត់បន្ថយនូវហានិភ័យនៃភាពស្រវាំងភ្នែកក្នុងចំណោមមនុស្សចាស់ផងដែរ។

**៤- ប៉េងប៉ោះ:** ប៉េងប៉ោះសំបូរនូវសារធាតុលីកូពីន (Lycopene) ជាសារធាតុប្រឆាំងអុកស៊ីតកម្មដែលមិនត្រឹមតែរ៉ាប់រងក្នុងការធ្វើឱ្យ បន្លែនិងផ្លែឈើមានពណ៌ក្រហមប៉ុណ្ណោះទេ វាក៏ជួយការពារស្បែកពីការបំផ្លាញដោយពន្លឺព្រះអាទិត្យ និងជំងឺមហារីកផងដែរ។ ទទួលទានប៉េងប៉ោះ ឬទឹកប៉េងប៉ោះរាល់ថ្ងៃនឹងមិនត្រឹមតែផ្តល់ឱ្យអ្នកនូវស្បែកភ្លឺរលោងប៉ុណ្ណោះទេ តែវាក៏នឹងជួយឱ្យអ្នកនៅក្មេង និងមានសុខភាពល្អយូរអង្វែងផងដែរ។

៥-គ្រាប់រុក្ខជាតិម្យ៉ាងឈ្មោះថា អាល់ម៉ុង Almond: Almond សំបូរនូវសារធាតុវីតាមីន E ជាប្រភេទសារធាតុប្រឆាំងអុកស៊ីតកម្មដ៏មានឥទ្ធិពលដែលធ្វើមុខងារក្នុងការការពារសាច់ដុំក៏ដូចជាប្រព័ន្ធសរសៃប្រសាទផងដែរ។ ទទួលទាន Almond ជាប្រចាំជួយបង្ការនូវបញ្ហាពាក់ព័ន្ធជាមួយល្បឿន លំនឹងខ្លួន និងដំណើរផ្លាស់ទីនៃរាងកាយដោយគ្មានភាពឆ្គាំឆ្គងផងដែរ។

៦- ផ្លែអាវ៉ូកាដូ (ផ្លែប័រ): Avocado ល្អសម្រាប់សុខភាពព្រោះវាមានសារធាតុខ្លាញ់មានប្រយោជន៍ដែលជួយកាត់បន្ថយនូវកំរិតសារធាតុកូឡេស្តេរ៉ូលមិនល្អ។ វាក៏មានផ្ទុកនូវវីតាមីន E ដូច្នេះវាក៏ល្អសម្រាប់ស្បែកផងដែរ ។

៧- គ្រឿងការី (Curry Powdrer): សារធាតុប្រឆាំងអុកស៊ីតកម្មក្នុងគ្រឿងការីជួយកាត់បន្ថយអត្រានៃការកើតជំងឺបាត់ការចងចាំដែលជាអាការៈកើតឡើងទូទៅសម្រាប់មនុស្សចាស់។

៨-ផ្លែឪឡឹក ឪឡឹករួមទាំងគ្រាប់ផងដែរ គឺសំបូរនូវវីតាមីន A, B, C, និង E បូករួមទាំងសារធាតុ Selenium ស័ង្កសី និងសារធាតុខ្លាញ់មានប្រយោជន៍។ រាល់សារធាតុទ្រទ្រង់រាងកាយទាំងអស់នេះវាដើរតួក្នុងការជួយការពារស្បែកក៏ដូចជារាងកាយពីភាពចាស់មុនអាយុផងដែរ។

**៩-ទឹក:** មែនហើយអ្នកប្រហែលជាមិនដែលគិតថា ទឹកគឺជាប្រភេទអាហារនោះទេ ប៉ុន្តែវាគឺជាអ្វីមួយដែលអ្នកបានផឹក ឬត្រូវតែផឹកឱ្យបានចំនួនមួយដ៏ច្រើនរាល់ថ្ងៃ។ ទឹកមានសារធាតុធ្វើឱ្យស្បែកមានសំណើមដែលជួយរក្សាស្បែកឱ្យទន់ល្វតល្វន់ រលោង និងមើលទៅ ក្មេងជាងវ័យ ប៉ុន្តែលើសពីនេះទៅទៀតទឹកធ្វើឱ្យការរំលាយអាហារមានភាពប្រសើរឡើងជួយសំអាតនូវប្រព័ន្ធផ្សេងៗក្នុងរាងកាយ និងជួយលាងសំអាតនូវជាតិពុល Toxins ។

ប្រភេទលំហាត់ប្រាណដែលជួយបន្ថយល្បឿននៃដំណើរវិវឌ្ឍន៍ទៅរកភាពចាស់:លំហាត់ប្រាណធ្វើឱ្យបេះដូងមានសុខភាពល្អ ។ ការដើរការហែលទឹក ការជិះកង់ ការរាំ ការធ្វើលំហាត់ប្រាណស្រូបយកខ្យល់ អុកស៊ីហ្សែន ឬក៏ទំរង់នៃលំហាត់ប្រាណជំនួយបេះដូងផ្សេងៗទៀត នៅពេលដែលធ្វើបែបនេះ ១៥ ទៅ ១ម៉ោង ឱ្យបាន៣ទៅ ៤ដងក្នុងមួយសប្តាហ៍នឹងជួយដល់ដំណើរការមុខងារនៃបេះដូង។

លំហាត់ប្រាណបែបតស៊ូអត់ធន់ (រត់ប្រណាំង)។ លំហាត់ប្រាណបែបនេះវាជួយបង្កើន ឬទទួលបានមកវិញនូវការបាត់បង់គុណភាពឆ្អឹង ពង្រឹងកម្លាំង និងតុល្យភាពក្នុងរាងកាយ។

លំហាត់ប្រាណដែលធ្វើឱ្យធូរស្បើយក្នុងចិត្ត។ លំហាត់ប្រាណបែបពត់ពេនរាងកាយ (Yoga និង Pilates) អាចជួយពន្យឺតនូវដំណើរវិវឌ្ឍន៍ទៅរកភាពចាស់ដោយបង្កើតនូវតុល្យភាពដែលមានសុខភាពល្អក្នុងចំណោមប្រព័ន្ធនានាក្នុងរាងកាយ ៕

# Moment in Time 2013 Cambodian Movie in Showcase this Coming September

# វិនាទីអាថិកំបាំងកុនខ្មែរអាមេរិកកាំងបញ្ចាំងនៅរោងកុនអាមេរិក Showcase ក្រុងឡូវែល

**អត្ថបទដោយ : សុខា**

**ក្រុងឡូវែល:** វិនាទីអាថិកំបាំង ឬ Moment in Time ជាកុនខ្មែរអាមេរិកកាំងដំបូងដែលផលិតដោយសហផលិតករខ្មែរអាមេរិកកាំង ព្រមទាំងតួសម្តែងថ្មីស្រឡាងដែលកើត នៅអាមេរិក និងប្រជាជនខ្មែរ ដែលបានធ្វើអន្តោប្រវេសន៍មកដល់ទឹកដីសហព័ន្ធមួយនេះរួមមានតួឯកស្រី មេលីសា អ៊ុក (Mellisa) រ៉ុកសេន កែវ (Roxan Keo) តុលា (Tola) ទេវបុត្រ សំ (Tevbot Sam) ជេ ធី យ៉ាន (J. Thy Yan) គង់ វាសនា (Kong Veasna) និងអ្នកស្រី ទិត្យ ណារី ត្រូវជាភរិយារបស់ វិចិត្រករ យ៉ារី លីវ៉ាន់ ។ ស្នាដៃនេះផលិតឡើង ជាពិសេសដោយផ្តិតយកទីកន្លែងជាច្រើននៅក្រុងឡូវែលរាប់តាំងភោជនីយដ្ឋានផ្តល់ទីកន្លែងថតដោយឥតគិតថ្លៃ ដូចជា ភោជនីយដ្ឋាន ហេង ឡាយ (Heng Lay Restaurant) សែនមនោរម្យ (Sen Monorom Restaurant) ក៏ដូចជាទីតាំងមួយ ចំនួនទៀតមានជាអាទិ៍ស៊ុបភឺវ៉ស្ស (Super Wash) ប៉ៃលិនផ្លាសា (Pailin Plaza) កម្ពុជាវីដេអូ (Kampuchea Video) ហាងសម្លាងការ (Boutigue) វត្តពន្លឺពុទ្ធចក្រ (Glory Temple) ជាដើម ។ លក្ខណៈនៃកុនមួយនេះ ជាកុន បែបរន្ធត់ ព្រឺព្រួច និងទស្សនីយភាពមួយចំនួនទៀតដែលផលិតករទុកជា តទៅទំព័រទី ៣១


Thy Yan


Molyda D'Amico


Mollysa Yim


Melissa Ouk


Emily Kem


Daren-Danh


Tola N Sok


Thy Yan


Thevibot Som


Sopheary Choup


Sokhara Kim


Nary Tith

# ចំណីដែលកោសិកាមហារីកត្រូវការសម្រាប់រីកចំរើន

**ប្រែសម្រួលដោយ : គឹមភៀន**



ក-វត្ថុជំនួសជាតិស្ករទាំងឡាយដូចជាពពួកមានឈ្មោះវិទ្យាសាស្ត្រទាំងនេះ : Nutra Sweet, Equal Spoonful,etc គឺសុទ្ធតែបង្កើតឡើងដោយជាតិ Aspartame វាជាវត្ថុមានគ្រោះថ្នាក់ ។ វត្ថុមានជាតិផ្អែមធម្មជាតិល្អបំផុតជារង្វូទឹកឃ្មុំ.រង្វូ ឬស្ករបានមកពីរុក្ខជាតិទាំងឡាយដូចស្ករត្នោត, ស្ករអំពៅ (ពីធម្មជាតិមិនលាយទឹកគីមីធ្វើឱ្យស. ឱ្យល្អសំរាប់សោភ័ណភាព) តែត្រូវទទួលទានក្នុងតិចល្មម ។ អំបិលដែលបានធ្វើឱ្យសដោយដាក់ជាតិគីមីក៏មិនល្អដូចអំបិលបានមកពីសមុទ្រផ្ទាល់ (អំបិលគ្រាប់មកពីសមុទ្រ) ។

ខ-ទឹកដោះគោ : អាហារនេះបង្កើនជាតិរំអិលនៅតាមផ្លូវដឹកជញ្ជូនចំណីអាហារ (គឺក្រពះនិងពោះវៀន) កោសិការមហារីករីកចំរើនធំធាត់ដោយសារជាតិរំអិលនេះ ដូច្នេះដើម្បីបង្អត់អាហារវា. ចូលពិសារទឹកសណ្តែកសាប(គ្មានជាតិស្ករ) កោសិការមហារីកក៏ត្រូវកំទេចដោយងាយបំផុត ។

គ-កោសិកាមហារីកចំរើនលូតលាស់យ៉ាងឆាប់រហ័សក្នុងបរិស្ថានមានជាតិអាស៊ីត ឯចំណីអាហារដែលមានសាច់ចុតបាទជាចំបងនោះវាបណ្តាលឱ្យកើតបានជាជាតិអាស៊ីដ. ហេតុនេះការទទួលទានត្រីជាអាហារជាវិធានការណ៍ប្រសើរបំផុត គេអាចអនុញ្ញាតិឱ្យទទួលទានបន្តិចបន្តួចបន្ថែមនូវសាច់មាន់.ទា ។ សាច់សត្វមានផ្ទុកទៅដោយថ្នាំសម្លាប់មេរោគ (Antibiotics)ជាតិ "អ័រម៉ូន" (ដែលបង្ខំឱ្យសត្វធំយ៉ាងឆាប់រហ័សខុសសត្តម្រាធម្មជាតិ) និងមានសត្វល្អិតហៅថា ប៉ារ៉ាស៊ីតទៀតផល ។ ពួកទាំងនេះមានគ្រោះថ្នាក់ណាស់ពិសេសសម្រាប់បុគ្គលដែលមានជំងឺមហារីក ។

ឃ-បរិស្ថានអាល់កាលិន (ផ្ទុយនឹងបរិស្ថានអាស៊ីត)ជួយឱ្យ"កោសិកាជា"(ល្អ,គ្មានជំងឺ) រីកចំរើនលូតលាស់យ៉ាងឆាប់រហ័ស : ម្ហូបអាហារដែលផ្សំឡើងក្នុងចំនួន៨0%នៃបន្លែស្រស់ និងទឹកដករបស់វាព្រមជាមួយនឹងគ្រាប់ធញ្ញជាតិសំរូបនឹងសាច់ក្នុងគ្រាប់រុក្ខជាតិដំទៃដូចជាសាច់ដូងទំ.សាច់នៃគ្រាប់ស្វាយចាន់ទី.ត្នោតជាមួយនឹងផ្លែឈើមួយចំនួនបានជួយធ្វើឱ្យរាងកាយយើងក្លាយជាបរិស្ថានអាល់កាលិន ។ បរិស្ថានបែបនេះអាចបានមកពីម្ហូបឆ្អិន ២០% ក្នុងនោះមានការរួមផ្សំពីគ្រាប់សណ្តែកគ្រប់ប្រភេទ ។ ទឹកដកបន្លែស្រស់ផ្តល់ឱ្យនូវរបស់ម្យ៉ាងដែលគេហៅថាពួក"អិនដៃរស់"Live enzymes ។ អិនដៃមរស់ទាំងនេះអាចជ្រាបបានយ៉ាងងាយ ហើយចូលទៅដល់ជញ្ជាំងនៃកោសិកាទាំងឡាយតែក្នុងកំរិត១៥នាទីប៉ុណ្ណោះ ដើម្បីចិញ្ចឹមបំប៉នកោសិកាមានសុខភាពទាំងឡាយ ។ ដើម្បីផ្គត់ផ្គង់ឱ្យរាងកាយសម្បូរណ៍ទៅដោយអិនដៃមរស់ដើម្បីបង្កើតនូវកោសិកាពោរពេញទៅដោយសុខភាពល្អទាំងនេះចូលខំពិសារទឹកដមនៃបន្លែស្រស់ទាំងឡាយ (សឹងតែគ្រប់បន្លែស្រស់ទាំងអស់ក្នុងនោះរាប់ទាំងសណ្តែកបណ្តុះគ្រប់ប្រភេទផង)បន្ថែមពីលើនេះ ចូរខំទទួលទានបន្លែស្រស់ឱ្យបានពីទៅបីដងក្នុងមួយថ្ងៃ ។

ក្រោមកំដៅ១០៨អង្សារ F=40 អង្សារ C អិនដៃមរស់ទាំងនេះត្រូវបំផ្លាញខូចអស់ហើយ...

ង-ត្រូវជៀសវាងនូវកាហ្វេ.តែ.សូកូឡា. ពួកចំណីអាហារទាំងនេះផ្ទុកទៅដោយជាតិកាហ្វេអ៊ីនខ្ពស់ ។ ប៉ុន្តែពួកតែស្លឹកខៀវ (Green Tea ) (ខ្ញុំហៅតែស្លឹកខៀវនេះមកពីហៅតាមភាសាអ្នកចំការតែ គេមិនហៅថា តែស្លឹកបៃតងទេ) វាទៅជាជំពូកតែម្យ៉ាងល្អប្រសើរទៅវិញ វាមានលក្ខណៈប្រឆាំងនឹងជំងឺមហារីកទៅវិញ ។ ទឹកដែលល្អបំផុតសម្រាប់ទទួលទាន គឺទឹកបរិសុទ្ធ ឬទឹកដែលបានតម្រងក្នុងបំណងជៀសវាងជាតិពុលទាំងឡាយនឹងជាតិដែកដ៏ច្រើនមកពីបំពង់លំហូរ ។ ចំហាយទឹក (ទឹកបានមកពីការចំហុយ) មិនល្អទៅវិញទេ ព្រោះមានជាតិអាស៊ីត គួរចៀសវាងកុំពិសារវា ។

១២-ជាតិប្រូទិនកំណើតពីសត្វ : មានការលំបាករំលាយយ៉ាងខ្លាំង. វាត្រូវការនូវអិនដៃមរំលាយអាហារយ៉ាងច្រើន សាច់ដែលមិនអាចរំលាយបានក៏នៅសល់ក្នុងពោះវៀន ហើយការកកើតជាជាតិពុលនឹងកើតមានឡើងជាបន្តមក ។

១៣-ជញ្ជាំងនៃកោសិកាមហារីកបានបិតបាំងដោយជាតិប្រូទីនយ៉ាងរឹងមាំ ប្រសិនណាគេតមសាច់ ឬក៏ទទួលទានបន្តិចបន្តួចនោះ វាមានភាពងាយស្រួលជាងសម្រាប់អិនដៃមរំលាយចោលជាតិប្រូទីនការពារជញ្ជាំងកោសិកាមហារីក ។ ការនេះនាំឱ្យកោសិកាពិឃាតរបស់រាងកាយអាចកំទេចចោលនូវកោសិកាមហារីក។

១៤-វត្ថុបំណងដើម្បីបង្កើនប្រព័ន្ធការពារឬភាពស៊ាំវត្ថុទាំងនោះមាន (តាមភាសាវិទ្យាសាស្ត្រមានដូចតទៅនេះ : IP6,Fliorescence, Essiac,Anti-Oxidants, Vitamins,Minerals, EFAs etc) ធ្វើឱ្យរាងកាយមានកោសិកាពិឃាតគ្រប់គ្រាប់ដើម្បីកំទេចពួកកោសិកាមហារីក...

តទៅទំព័រទី៣១

# វិស្វកម្មក្នុងចិត្តមនុស្ស
## The human inner engineering


និពន្ធដោយ : ម៉ៅ ច័ន្ទសំណុំ

តពីលេខមុន

ហើយបន្ថែមទាំងការប្រើសតិដឹងយ៉ាងទូលំទូលាយ និងជាប់ជានិច្ចថែមទៀត ។ ជាក់ស្តែង មនុស្សយើងជាតួទៅរស់នៅតែក្នុងប្រអប់ខួរក្បាលប៉ុណ្ណោះ ប្រអប់ដ៏តូចចង្អៀតយើងពុំមានសតិដឹងអំពីអ្វីៗដែលកំពុងកើតមាននៅក្រៅខ្លួនលើខ្លួន និងក្នុងខ្លួនឡើយ ។ ចំណែកអ្នកត្រាស់ដឹងវិញ និងមានអារម្មណ៍យ៉ាងណា។ លោករស់នៅក្នុងពេលបច្ចុប្បន្នតែម្តង ។ លោករស់នៅក្បៀកកិត និងចរន្តជីវិតពិតៗ ។ តើរស់នៅតាមរបៀបអ្នកត្រាស់ដឹងដូច្នេះនឹងហុចនូវផលប្រយោជន៍យ៉ាងណាខ្លះ?

ខាងក្រោមនេះ សូមពិនិត្យភាពខុសគ្នារវាងមនុស្សសាមញ្ញ និងអ្នកត្រាស់ដឹងដូចតទៅ :

**ករណីទី១ : មនុស្សសាមញ្ញ** បើឃើញអ្វីមួយ គឺគាត់គ្រាន់តែឃើញប៉ុណ្ណោះគាត់នៅប្រើសមត្ថភាពកិរិតពិភពសត្វនៅឡើយ ។

**-អ្នកត្រាស់ដឹង** បើឃើញអ្វីមួយគាត់ឃើញ ហើយថែមទាំងដឹងខ្លួនថា ឃើញទៀត ភ្នែកកំពុងតែមើល ។ គាត់មានសមត្ថភាពអាចមើលពីក្នុងខ្លួនមកមើលឃើញសកម្មភាពរបស់ញាណទាំង៥យ៉ាងច្បាស់ ។

**ករណីទី២: មនុស្សសាមញ្ញ** បើគេគិត គឺគ្រាន់តែគិតប៉ុណ្ណោះ ខ្លួនគាត់ជាគំនិតនេះឯង ពុំមាននរណាផ្សេងឡើយ ។

**អ្នកត្រាសដឹង :** បើគិតគាត់មានសតិដឹងថាកំពុងតែគិត ។ គាត់ឃើញខួរក្បាលកំពុងតែមានសតិដឹងពីក្នុងមកគាត់ពុំបណ្តោយឱ្យគំនិតណាមួយដឹកមុខឡើយ ហើយមានសិទ្ធិជ្រើសរើសគំនិតល្អៗមកប្រើនេះស្តែងចេញជាសេរីភាពក្នុងចិត្តមនុស្ស ។

**ករណីទី៣ : មនុស្សសាមញ្ញ** បើមានអារម្មណ៍ និងគេគ្រាន់តែខឹងប៉ុណ្ណោះខ្លួនគេរូបគេគឺជាកំហឹងនេះតែម្តង ដូច្នេះកំហឹងដឹកច្រមុះគាត់វឹកវរ កំហឹងជាមេញ្ញាការមកលើគាត់កំហឹងត្រួតត្រាគាត់ទាំងស្រុង។ កំហឹងគេមកជាភ្ញៀវហើយគេក្លាយទៅជាស្តេចនៅក្នុងនគរកាយនេះ គេបន្តរស់នៅក្នុងនគរកាយនេះជារៀងរហូត ។ គឺតាមរបៀបនេះហើយ ទើបមនុស្សដែលធ្លាប់មានកំហឹងក្នុងខ្លួន ហើយភ្លើងកំហឹងពុំបាត់ទៅណាទេ វាកាន់តែរីកធំឡើងៗ ជាលំដាប់ពីព្រោះកំហឹងបានតាំងទីសង់សំណង់ក្នុងរូបកាយនេះតទៅ ។

**អ្នកត្រាស់ដឹង :** អ្នកត្រាស់ដឹងពុំមែនអស់កំហឹង ដូចដែលយើងធ្លាប់នឹងស្មាននោះឡើយ កំហឹងនៅតែផុសឡើងដូចមនុស្សនានាដែរ ពីព្រោះជនសាមញ្ញនោះ គឺបើកំហឹងផុសឡើងគាត់ខ្លួនឯងដឹងថា អាត្មាអញកំពុងតែខឹង ។ គាត់ពុំមែនជាកំហឹងនេះឡើយ គាត់មានសមត្ថភាពអាចពិនិត្យកំហឹងពីក្នុងខ្លួនមក ។ កំហឹងជាថាមពលអវិជ្ជមានដែលឧបដឹកឡើងក្នុងប្រព័ន្ធរូបកាយ និងចិត្តមនុស្ស ។ លោកអ្នកត្រាស់ដឹងស្គាល់ធម្មជាតិកំហឹងនេះ លោកគ្រាន់តែមានសតិដឹងស្វាគមន៍បើកចំហរទុកកន្លែងឱ្យកំហឹងនេះ គេមានឱកាសបញ្ចេញផ្លែផ្កា និងចាត់ក្បាច់តាមនាទីធម្មជាតិរបស់គេ លុះកំហឹងនេះគេបានបំពេញកិច្ចការរបស់គេហើយ គេនឹងចាកចេញពីរូបកាយនេះជារៀងរហូត ដោយសុវត្ថិភាពពុំទុកសល់នូវស្នាកស្នាមអ្វីឡើយ ។ កំហឹងវាផុសឡើងតាមដំណើរធម្មជាតិ ហើយវារលាយបាត់ទៅមួយរំពេចដោយអំណាចនៃសតិដឹងនេះ ។ អ្នកត្រាស់ដឹងធ្វើការបើកចំហរ (Open and allow) បើកចំហរជាចំហរធំទូលាយ នោះប្រៀបហាក់ដូចជាផ្ទៃមេឃដ៏ធំទូលាយក្នុងនោះ ពពក ព្យុះ ភ្លៀង ខ្យល់ កើតរលត់ កើតរលត់ពុំបានប៉ះពាល់ដល់មេឃបន្តិចឡើយ ។ ដូច្នេះអ្នកត្រាស់ដឹងបានរួចរំដោះទាំងស្រុងពីថាមពលកំហឹងនេះជាការពិសោធន៍ព្រះនិព្វានក្នុងប្រព័ន្ធរូបកាយ-ចិត្តមនុស្ស ។ ខ្ញុំគួរបញ្ជាក់អំពីពាក្យគន្លឹះ "បើកចំហរ និងស្វាគមន៍" នោះមានន័យថាចំពោះមុខវត្ថុមានថាមពលនៃកំហឹងអ្នកត្រាស់ដឹងរក្សាភាពស្ងៀមស្ងាត់ (Being Silent) លោកពុំធ្វើអ្វីឡើយ ពុំប្រតិកម្មពុំរុញច្រានចេញ ឬពុំស្រូបចូលលោកទទួលយកសភាពការណ៍តាមដំណើរធម្មជាតិ ។ ជាក្រិត្យក្រមធម្មជាតិ : អ្វីៗដែលកើតឡើងមកវាពុំអាចតាំងនៅឋិតស្ថេរឡើយ វាតែងតែរលាយបាត់ទៅវិញ ដោយពុំត្រូវការ មនុស្សអន្តរាគមន៍អ្វីឡើយ អនិច្ចំ អនិច្ចំ អនិច្ចំ ...នេះជាអាថិកំបាំងក្នុងពិភពធម្មជាតិពិសេសពិភពផ្លូវចិត្តមនុស្ស ។

**ករណីទី៤: មនុស្សសាមញ្ញ** បើកើតទុក្ខក្រៀមក្រំគាត់គ្រាន់តែកើតទុក្ខប៉ុណ្ណោះ គាត់ជាទុក្ខក្រៀមក្រំនេះឯង គាត់ត្រាំទុក្ខក្រៀមក្រំតែម្តង គាត់ទទួលរងភាពវឹកវរ ឈឺផ្សារ សោកសង្រេង វិងវិរជាប់ជានិច្ច គាត់សោយភ្លើងនរកភ្នែកស្រស់តែម្តង ។ គាត់ត្រាំក្នុងអវិជ្ជា ក្នុងភាពងងឹតងងុល ពុំដឹងពុំយល់អ្វីឡើយ ។

**អ្នកត្រាស់ដឹង :** គាត់ក៏ដូចមនុស្សនានាដែរ ទុក្ខក្រៀមក្រំអាចកើត តទៅលេខក្រោយ

តមកពីទំព័រទី ២២

## អ្នកធ្វើរបាយការណ៍ពិសេសរបស់...

នៅតែចាំបាច់ត្រូវធ្វើឱ្យប្រសើរឡើងនូវស្ថានភាពមួយចំនួនដើម្បីធ្វើឱ្យប្រាកដថា ប្រទេសកម្ពុជាមានលទ្ធិប្រជាធិបតេយ្យពេញលេញ។

លោកបានមានប្រសាសន៍ថា "ខណៈរដ្ឋធម្មនុញ្ញនៃប្រទេសកម្ពុជាចែងអំពីលទ្ធិប្រជាធិបតេយ្យសេរីនិយមនោះ ជាក់ស្តែងស្ថានភាពលទ្ធិប្រជាធិបតេយ្យនៅទីនេះនៅមានកម្រិតនៅឡើយ ។ ស្របពេលដែលដំណើរការនៃការធ្វើកំណែទម្រង់ប្រព័ន្ធតុលាការ សភា និងប្រព័ន្ធបោះឆ្នោតមានការយឺតយ៉ាវនោះ រដ្ឋាភិបាលនៅមិនទាន់អនុវត្តតាមអនុសាសន៍ភាគច្រើនពាក់ព័ន្ធនឹងការផ្តល់ និងការគ្រប់គ្រងដីសម្បទានសេដ្ឋកិច្ចដីសម្បទានផ្សេងៗទៀត នៅឡើយទេ"។

នៅក្នុងអនុសាសន៍របស់លោក លោក សុរិយា ស៊ូបេឌី បានផ្តោតលើសមត្ថភាពរបស់រដ្ឋាភិបាលក្នុងការបង្ក្រាបការរិះគន់ដើម្បីស្ថាបនាដែលលោកបានមានប្រសាសន៍ថា កំពុងធ្លាក់ចុះ។ លោកបានមានប្រសាសន៍ថា "សម្រាប់ប្រជាធិបតេយ្យដំណើរការបានល្អនៅក្នុងប្រទេសកម្ពុជា និងសម្រាប់វប្បធម៌ប្រជាធិបតេយ្យចាក់ឫសនៅក្នុងសង្គម អ្នកដែលកាន់មុខងារសាធារណៈត្រូវតែមានឆន្ទៈក្នុងការទទួលស្គាល់គុណវិបត្តិពេលនោះ ទើបអាចរកដំណោះស្រាយឃើញដែលអ្នកគ្រប់គ្នាអាចទទួលយកបាន។ ការយល់ដឹងនេះ ហាក់ដូចជាមិនទាន់ទូលំទូលាយទេ នៅក្នុងសង្គមកម្ពុជាបច្ចុប្បន្ន។

ក្នុងនាមជាអ្នកធ្វើរបាយការណ៍ពិសេសយល់ថា ការរិះគន់មិនមែនជាបទល្មើសទេ ប៉ុន្តែគឺជាការប្រើប្រាស់សេរីភាពនៃមនសិការ ជាទង្វើឆ្លាតវៃ។ ទាំងនេះគឺជាគុណសម្បត្តិមិនអាចកាត់ផ្តាច់ពីគ្នាបាននៃលទ្ធិប្រជាធិបតេយ្យ។ អវត្តមានរបស់វាជាហេតុផលមួយដែលធ្វើឱ្យកម្ពុជាខ្វះលទ្ធិប្រជាធិបតេយ្យពេញលេញដែលមានចែងនៅក្នុងរដ្ឋធម្មនុញ្ញនៅប្រទេសនេះ"។

លោកបានមានប្រសាសន៍បន្ថែមថា រដ្ឋាភិបាលចាំបាច់ត្រូវអនុវត្តច្បាប់ដែលមានចែងនៅក្នុងរដ្ឋធម្មនុញ្ញស្តីពីការគ្រប់គ្រងប្រព័ន្ធតុលាការដើម្បីធ្វើឱ្យវាស្ថិតនៅលើមាគ៌ាឆ្ពោះទៅឯករាជភាព ខណៈដែល"ត្រូវចាត់វិធានការសមស្របដើម្បីពង្រឹងឯករាជភាព និងសមត្ថភាពរបស់គណៈកម្មាធិការជាតិរៀបចំការបោះឆ្នោត (គ.ជ.ប.) ដើម្បីធ្វើឱ្យស្ថាប័នទទួលបានការជឿទុកចិត្តទាំងស្រុងពីអ្នកបោះឆ្នោតទាំងអស់នៅក្នុងប្រទេសកម្ពុជានៅក្នុងការបោះឆ្នោតលើកក្រោយៗ"។

លោក សុរិយា ស៊ូបេឌី បានមានប្រសាសន៍កាលពីលើកមុនថា ការមិនអនុវត្តកំណែទម្រង់សមស្របលើគ.ជ.ប. ធ្វើឱ្យអ្នកបោះឆ្នោតមិនជឿទុកចិត្ត ហើយអាចឈានទៅការផ្ទុះអំពើហិង្សា។

លោក ផៃ ស៊ីផាន អ្នកនាំពាក្យទីស្តីការគណៈរដ្ឋមន្ត្រីបានមានប្រសាសន៍ថា លោកយល់ស្របនឹងការវាយតម្លៃរបស់លោក សុរិយា ស៊ូបេឌី ដែលថា លទ្ធិប្រជាធិបតេយ្យរបស់កម្ពុជានៅមានកម្រិត ប៉ុន្តែបានមានប្រសាសន៍ថា "ខ្ញុំគិតថាអ្នកគ្រប់គ្នាដែលយល់ពីលទ្ធិប្រជាធិបតេយ្យនៅក្នុងពិភពលោកនេះដឹងថា លើលោកនេះគ្មាននរណាម្នាក់ល្អឥតខ្ចោះទេ។ ឱ្យលោក ស៊ូបេឌីឱមកទីនេះក្នុងឋានៈជាដៃគូ មិនមែនជានគរបាលឡើយ។ គាត់មិនមែនជាសាស្ត្រាចារ្យដែលមានជំនាញខាងកម្ពុជាទេ គាត់មកទីនេះដើម្បីជួយកម្ពុជាឆ្ពោះទៅរកចំណុចមួយដែលអ្នកគ្រប់គ្នាចង់បាន។ ជាការពិតពួកគេនិយាយថា លទ្ធិប្រជាធិបតេយ្យរបស់កម្ពុជានៅមានកម្រិតខ្ញុំយល់ស្រប។ នោះជាមូលហេតុដែលយើងចាំបាច់ត្រូវចាប់ដៃគូជាមួយគ្នា ដើម្បីធ្វើឱ្យវាប្រសើរឡើង ។ អ្នកគ្រប់គ្នាកំពុងស្វែងរកស្ថិរភាព និងសន្តិភាពក្រោយពីសង្គ្រាម"។

នៅពេលនិយាយដល់ចំណុចថា តើទំនាក់ទំនងរវាងរដ្ឋាភិបាល និងលោក សុរិយា ស៊ូបេឌី បន្តឆ្ពោះទៅមុខដោយរបៀបណានោះ លោក ផៃ ស៊ីផាន បានមានប្រសាសន៍ថា "យើងគិតថា គាត់ត្រូវតែសាងទំនុកចិត្ត និងការជឿជាក់រវាងរូបគាត់ និងប្រទេសកម្ពុជាដើម្បីធ្វើការរួមគ្នា"៕

***ប្រែសម្រួលដោយ : តែម សុខុម***

តមកពីទំព័រទី ៨

## ចៅហ្វាយក្រុងឡូវែល...

ប្រយោជន៍ជូនបណ្តាជននៃតំបន់ដែលខ្មែរផុសចែកផ្សាយជាច្រើនឆ្នាំមកហើយ ដូចជាឡូវែលហ្វឺឡាដែលហ្សៀ កូណិច ទីកិត រ៉ូដអៃឡិន ញូជើស្ស៊ី... ហើយត្រឡប់មកវិញ អ្នកទាំងនោះបានផ្តល់ឱ្យយើងនូវធនធានដោយដាក់ផ្សាយពាណិជ្ជកម្មបានកើនឡើងវិញ យើងអាចកែរលំអគុណភាពកាសែតដំឡើងពី២០ទៅ៣២ទំព័រ យើងអាចជួលការិយាល័យដ៏សមរម្យដំបូងបង្អស់នៅកណ្តាលក្រុងងាយស្រួលក្នុងការទាក់ទងជាមួយភ្ញៀវមានកន្លែងឱ្យបុគ្គលិកធ្វើការ ។ ក្នុងតួនាទីជាអ្នកនាំសារដែលខ្មែរផុសធ្វើបានល្អនេះ នាំឱ្យមានទំនាក់ទំនងអាចបំរើបន្ថែម មន្ទីរពេទ្យ ធានាគារ សាលាក្រុង ក្រុមហ៊ុនអាកាសចរ រោងចក្រ ការឃោសនាបោះឆ្នោត សាលារៀន មហាវិទ្យាល័យ... ដែលនឹងត្រូវការសេវាខ្មែរផុសជាបន្តបន្ទាប់ ។

យើងខ្ញុំរីករាយជាអតិបរិមានឹងទទួលលិខិតកោតសសើរពីសាលាក្រុងឡូវែល ចំពោះស្នាដៃរួមដើម្បីសហគមន៍ខ្មែរក្នុងនោះក៏មានព្រឹទ្ធាចារ្យ ម៉ម យីន -លោក គិម ភឿន -លោក អ៊ុម លឿម -លោក សេងលី គង់ -លោក វីរធី ហាវ - នាង លីម ហេង ហៀង- លោក ឈុនឡេង ហេង ដែលបានរួមចំណែកឱ្យខ្មែរផុសខ្ពង់ខ្ពស់៕ **ស្ទូបិន - សំខុន ពិន**




# ជោគជតារាសីទាំង 12 ប្រចាំឆ្នាំហោង




លោកអ្នកនឹងទទួលបាននូវលាភសក្ការៈពីភាគហ៊ុនរកស៊ី និងមិត្តរួមការងារយ៉ាងច្រើនគួរឱ្យពេញចិត្ត ។ លើសពីនេះទៅទៀតគម្រោងការដែលបានត្រៀមទុកនឹងបានសម្រេចដូចបំណងទៀតផង ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ គួរជួញដូរនៅទីជិត១ ទើបសមប្រកប ។ រីឯបញ្ហាស្នេហាគូស្នេហ៍ចេះស្តាប់ឱវាទគ្នា ៕




នៅក្នុងរយៈពេលនេះ លោកអ្នកទទួលលាភសក្ការៈពីសាច់ញាតិបងប្អូនដែលជិតស្និទ្ធ ។ ក្រៅពីនោះក៏នៅទទួលបានដំណឹងល្អដែលមានប្រយោជន៍ដល់ជាតិនិងការងាររបស់លោកអ្នកតទៅអនាគតទៀតផង ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញផលកម្រៃទទួលបានកាក់កបគ្រាន់បើ តែហាមកុំជួញដូរផ្លូវឆ្ងាយប្រយ័ត្នមានបញ្ហាដល់ខ្លួន ។ រីឯបញ្ហាស្នេហាគូស្នេហ៍អាចមានការរកាំរកូសគ្នាខ្លះ ប៉ុន្តែមិនធ្ងន់ធ្ងរនោះទេ ៕




រាល់កិច្ចការសព្វបែបយ៉ាងលោកអ្នកអាចជួបនឹងបញ្ហាខ្លះ១នាគ្រាដំបូង ប៉ុន្តែក្រោយមកមិនមានអ្វីជាឧបសគ្គរារាំងទៀតឡើយ ។ ចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ មានការទិញចូលលក់ចេញគ្រាន់ បើ អាចរកផលកម្រៃត្រឡប់មកផ្ទះវិញយ៉ាងត្រជាក់ចិត្ត ។ រីឯបញ្ហាស្នេហាមានភាពផ្អែមល្ហែម និងស្រស់ស្រាយប្រៀបដូចត្រីក្នុងទឹកនារដូវខែវស្សាដូច្នេះដែរ ៕




លោកអ្នកអាចនឹងមានអារម្មណ៍ច្របូកច្របល់បន្តិចនៅក្នុងរយៈពេលនេះ ព្រោះកិច្ចការដែលថា នឹងទទួលបានផលល្អនោះ វាអាចមានការប្រែប្រួលដោយសារតែមានការរំខានពីអ្នកដទៃ ។ បើចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ អាចរកផលកម្រៃគ្រាន់បើគួរជាទីគាប់ប្រសើរជាងមុន ។ រីឯបញ្ហាស្នេហាពុំមានផលរមាស់អ្វីនោះឡើយ ៕




រាល់ការស្អុតស្អាញដែលធ្លាប់កើតមានលើលោកអ្នកក្នុងពេលនេះ នឹងត្រូវអហោសិកម្មទាំងអស់ហើយទ្រព្យដែលរបូតចេញពីដៃទៅនឹងវិលត្រឡប់មកវិញយ៉ាងគ្រប់គ្រាន់ ។ ចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ ត្រូវគិតគូរឱ្យបានច្បាស់លាស់មុននឹងដាក់ទុនថ្មីទើបមិនខាតបង់រាល់ការចំណាយទាំងនោះ ។ រីឯបញ្ហាស្នេហាត្រូវចេះពូនជ្រោយចំណងស្នេហាដោយមានភាពផ្អែមល្ហែមទើបជាការប្រសើរ ៕




លោកអ្នកគួរប្រុងប្រយ័ត្នចំពោះការនិយាយស្តីបន្តិច ពីព្រោះអាចនឹងមានគូសត្រូវចាំចាប់ទោសកំហុសមួលបង្កាច់បង្ខូចកេរ្តិ៍ឈ្មោះរបស់លោកអ្នកឱ្យប្រែក្លាយទៅជាស្មុយអសោចិ៍ ។ សម្រាប់អ្នកប្រកបមុខរបររកស៊ីជួញដូរវិញមានក្រុមមនុស្សតាមឈ្នានីសច្រើន ដូចច្នេះត្រូវប្រយ័ត្នបន្តិចចៀសវាងការបរាជ័យ ។ រីឯបញ្ហាស្នេហាមានភាពចម្រូងចម្រាសដាក់គ្នាបន្តិចបន្តួច ៕




រាល់កិច្ចការដែលលោកអ្នកប៉ងប្រាថ្នាជាយូរមកហើយនោះក្នុងរយៈពេលនេះ គឺបានសមដូចបំណងហើយគ្មានអ្វីមករារាំងនោះទេ ហើយរាល់ការប៉ងយាយីពីមនុស្សដែលមានបំណងមិនល្អមកលើលោកអ្នកនោះក៏មិនបានសម្រេចដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញអាចពង្រីកអាជីវកម្មឱ្យធំបន្ថែមទៀតបាន ។ ឯបញ្ហាស្នេហា គូស្វាមីភរិយាមានភាពសុខដុមរមនាគ្មានផលរមាស់អ្វីឡើយ ៕




ក្នុងរយៈពេលនេះលោកអ្នកជួបនឹងបញ្ហាខាងផ្លូវចិត្តមិនសូវជាសប្បាយរីករាយប៉ុន្មាននោះទេ តែប្រសិនបើចង់ទទួលផលពីការងារនោះ ចូរធ្វើចិត្តឱ្យត្រជាក់ ទើបបានសម្រេចដូចបំណង ។ បើជាអ្នកប្រកបរបររកស៊ីជួញដូរវិញ គឺមានការប្រទាំងប្រទើសជាមួយអ្នកមានមុខរបរដូចគ្នា ដូច្នេះគួរបើកចិត្តឱ្យទូលាយ ។ រីឯបញ្ហាស្នេហាមានការកាំចិត្ត ព្រោះតែម្នាក់១ចង់ចាញ់ឈ្នះគ្នានោះឯង ៕




លោកអ្នកមានភ័ព្វសំណាងល្អក្នុងការងារទទួលរឿងឡើងតួនាទី ឬប្រាក់បៀវត្សរ៍បន្ថែម ។ ជាងនេះទៀតនោះ ប្រសិនបើចង់ពឹងពាក់អ្នកមានយសស័ក្តិខ្ពង់ខ្ពស់ក្នុងរឿងអ្វីមួយនឹងបានដូចបំណងផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញអាចរកប្រាក់ចំណូលចិញ្ចឹមគ្រួសារបានដោយស្រួលទេ មិនមានអ្វីមករាំងស្ទះឡើយ ។ រីឯបញ្ហាស្នេហាគូស្នេហ៍រមែងចេះអត់ឱនឱ្យគ្នា ៕




រាល់ការបំពេញការងារទាំងឡាយលោកអ្នកមិនមានបញ្ហាអ្វីចោទនោះទេ ប៉ុន្តែក្នុងនោះសូមប្រយ័ត្នកុំយកអាសាមនុស្សសម្បុរសឱ្យសោះ ព្រោះនាំឱ្យកើតរឿងសៅហ្មងទៅថ្ងៃក្រោយ ។ សម្រាប់អ្នកប្រកបមុខរបររកស៊ីជួញដូរវិញ អាចសន្សំទុកបានខ្លះ ។ រីឯបញ្ហាស្នេហាចូរកុំយកភាពមានៈចង់ចាញ់ឈ្នះប្រយ័ត្នកើតមានជម្លោះវិវាទឈានដល់ការប្រេះស្រាំ ៕




អាចពោលបានថា លោកអ្នកមានសេចក្តីសុខក្នុងជីវិត និងការងារ ព្រោះវិបត្តិ និងភាពស្អុតស្អាញដែលមានកន្លងមកក៏បានធូរស្រាលឡើងវិញមួយកម្រិត ផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ ទោះបីជាចេញ ទៅជួញដូរនៅទីណាក្តីគួរចៀសវាងការដាក់ទុនថ្មី ព្រោះអាចនាំឱ្យខាតបង់ ។ រីឯបញ្ហាស្នេហាគូស្នេហ៍ច្រើនប្រចណ្ឌខុសរឿង ៕




រាល់ការបំពេញការងាររបស់លោកអ្នកក្នុងរយៈពេលនេះ សុទ្ធតែផ្តល់នូវអត្ថប្រយោជន៍គួរឱ្យជាទីពេញចិត្តទាំងអស់គ្មានអ្វីមករាំងស្ទះឡើយ ហើយជាងនេះទៀត នោះគម្រោងការដែលបានត្រៀមទុកជាយូរមក ហើយក៏នឹងបានសម្រេចផងដែរ ។ បើជាអាជីវកររកស៊ីវិញ មានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ រីឯបញ្ហាគូស្នេហ៍ច្រើនយល់ចិត្តគ្នា និងនឹករលឹកគ្នាបើនៅឆ្ងាយ ៕

តមកពីទំព័រទី ២៣

## ខ្ញុំជឿជាក់លើវា....

ឱ្យតែខ្ញុំភ្លេចយកដៃខ្ទប់មាត់ពេលខ្ញុំក្អកម្តងៗគាត់តាមមកស្តីឱ្យភ្លាម។ គាត់តែងតែដាស់តឿនក្រើនរម្លឹកមនុស្សរាល់គ្នាដែលនៅក្នុងផ្ទះរួមទាំងភ្ញៀវដែលជាឪពុកមាភរិយាខ្ញុំមកពីប្រទេសបារាំងមកលេងផ្ទះខ្ញុំផងដែរ (នៅមានសាច់រឿងមួយពាក់ព័ន្ធនឹងឪពុកមាមកលេងនេះ)។

នៅមានសាច់រឿងបន្តមួយទៀតអំពីវិនស្តុន។ នៅពេលគាត់អាយុបាន ៤ ឆ្នាំ នៅថ្ងៃទី២៨ ខែ មេសា គាត់ដើរចុះឡើង និងប្រាប់គេឯងគ្រប់គ្នានៅសាលាមត្តេយ្យរបស់គាត់រួមទាំងលោកគ្រូអ្នកគ្រូគាត់ផង។ គាត់ប្រាប់គេថា ថ្ងៃនេះជាថ្ងៃខួបកំណើតរបស់ខ្ញុំ។ ឪពុកម្តាយខ្ញុំនឹងរៀបចំពិធីខួបកំណើតឱ្យខ្ញុំ។ ពេលនោះគ្រូគាត់ម្នាក់សួរគាត់ "តើកូនអាយុប៉ុន្មាន?"។ វិនស្តុនឆ្លើយថា "ខ្ញុំអាយុ ៤ ឆ្នា"។ គ្រូបន្តសួរគាត់ថា "តើឪពុកកូនអាយុប៉ុន្មាន?"។ វិនស្តុនឆ្លើយថា "គាត់អាយុ៤ឆ្នាំកន្លះ"។ ឃើញទេ! វិនស្តុនមិនខ្លាចក្នុងការប្រថុយប្រថានក្នុងជីវិតរបស់គាត់ទេ។ ខ្ញុំផ្ទាល់តែងតែលើកទឹកចិត្ត និងគាំទ្រគំនិតផ្តួចផ្តើមភាពក្លាហាន និងគំនិតច្នៃប្រឌិតរបស់គាត់។ ដោយសារតែឱកាសទាំងអស់នេះ ខ្ញុំជឿជាក់ថា ថ្ងៃណាមួយវិនស្តុននឹងចេះបង្កើតគំនិតផ្ទាល់ដោយខ្លួនឯង និងចេះប្រើប្រាស់ជីវិតរបស់គាត់ឱ្យត្រឹមត្រូវ។

ខ្សែជីវិតរបស់ខ្ញុំគឺពោរពេញទៅដោយការតស៊ូ ភាពអំណត់ និងជោគជ័យ។ ទាំងនេះជាកម្លាំងថាមពលជម្រុញឱ្យជីវិតខ្ញុំសម្បូរទៅដោយឱកាសសិក្សាមិនចេះចប់។ ដំណើរជីវិតក្នុងវិស័យ អប់រំរបស់ខ្ញុំបានធ្វើឱ្យខ្ញុំអាចសិក្សាចេះដឹងអំពីរបៀបកាច់ចង្កូតនាវានៃជីវិត ខ្ញុំប្រកបដោយសមត្ថភាពសុចរិតធម៌ ភាពច្នៃប្រឌិត និង ការទទួលខុសត្រូវខាងផ្លូវសីលធម៌ ដើម្បីអាចឱ្យខ្ញុំចេះសម្លឹងមើលពិភពលោក និង របៀបនៃការវិវឌ្ឍរបស់វា។

@Tooch A.Van, 2013

Continue from Page 21

## Expanded Bus Service Starts...

and youth of the United Teen Equality Center have been beating for a decade, since the first City Council candidates forum they sponsored in 2003.

It took some time, but their pleas have been heard. On Monday August 26, Lowell Regional Transit Authority bus lines will run later, adding 53 additional trips per weekday, 5,000 new hours of service annually, LRTA Executive Director Jim Scanlan said at a press conference at Gallagher Terminal Tuesday afternoon.

Hours of the downtown shuttle bus will also be extended to 9:30 p.m., adding 20 trips per day. The changes affect not only bus routes in Lowell, but in Billerica, Burlington, Chelmsford, Dracut, Tewksbury and Westford.

"It gives us more opportunities to work later evenings," said UTEC Teen Organizer Debbie An. "At the end of the day it is really helpful. We are very thankful."

City Manager Bernie Lynch said the elements necessary for successful public transportation include dependable service and clean buses, which the LRTA already has, and providing service to people who need it WHEN they need it, which will be accomplish by this expansion.

The added service was made possible by an additional $500,000 in state and federal funds, including $230,000 from the state Legislature's transportation-finance bill.

In January the LRTA expanded its Saturday service, resulting in a 25 percent increase in ridership. Scanlan said last Saturday 2,000 people took the bus, compared to 1,300 the same Saturday last year.

"If you put the service on the street, people are going to use it," said Scanlan."The people of the Greater Lowell area have been short-changed for a long time."

Lynch said in his seven years as City Manager, he has heard from the youth at UTEC, as well as businesses and residents about the need to expand bus service. But, it was Mayor Patrick Murphy, who he called a "proven advocate for public transportation in our region and particularly in our city," who has "held my feet to the fire" to make the expansion, as well as additional bus stops and bus shelters happen throughout the city.

Murphy said he picked up where his grandfather, City Councilor George Murphy, left off 50 years ago.

George Murphy was a bus driver for the Eastern Bus Company, who used his platform as a city councilor, to advocate for expanded bus service.

"I'm happy to follow in that line," said Mayor Murphy, adding that the LRTA has been a great partner with the city and very responsive to the needs of its residents, unlike Eastern Bus, who never complied with the elder Murphy's requests.

"The LRTA recognizes the importance of public transportation not only to our city, but the importance of public transportation to sustainable development for years to come," he said.

Greater Lowell Chamber of Commerce President Danielle McFadden said expanded LRTA service makes the city a more "desirable place to live work and come to spend money," a plus not only for businesses in Lowell, but throughout the region.

More accessible public transit also benefits the arts, culture and sports venues in the city as well as makes it easier for Middlesex Community College and UMass Lowell students to get around the city and participate in evening activities, McFadden said.

"There are so many people dependent on this service," said Sen. Eileen Donoghue, adding she and other members of the Statehouse delegation saw the extent of the need for public transportation services and funding in early 2012 when scores of residents showed by at a hearing Lowell City Hall railing against plans to cut some MBTA services.

Donoghue said she is pleased "the transportation finance we supported will bring these changes and others in the future."

For more information about the expanded schedule visit www.lrta.com

## តមកពីទំព័រទី ១៨ ដល់ពេលជ្រើសយកអាវុធ តើនរណានឹងកាន់អ្វី?

ហើយទំនងជាបានយកព្រះមហាក្សត្រទៅថៃព្រះរោគ ព្រោះតែចង់ការពារកុំឱ្យ ហ៊ុន សែន ហៅប្រើជាជំនួយផង ក៏ថាបាន -រីឯផ្ទៃក្នុងគណបក្សប្រជាជនវិញ រួមទាំងកងទ័ព លោក ហ៊ុន សែន ក៏កំពុងរង្គោះរង្គើទុកចិត្តបានតែ៥០ភាគរយយ៉ាងច្រើន ដូចគេបានឃើញកាលពីពេលការបោះឆ្នោតអ៊ីចឹង ។ បើដូច្នេះការសង្គ្រឹតដាក់គ្នានេះមានដំណោះស្រាយសន្តិវិធីបានដែរ ឬទេ?

មាន! គឺវាអាស្រ័យលើការស្គាល់កម្លាំងខ្លួនឯងស្គាល់អាវុធដែលខ្លួនកាន់: កាំភ្លើងជាអាវុធដ៏គំរក់អាចគម្រាមសត្រូវយកឈ្នះបានតែជាមួយមនុស្សគំរក់តែប៉ុណ្ណោះមិនអាចថៃជ័យជំនះដោយគ្មានភាពសុច្ចរិតបានទេ រីឯយុត្តិធម្មជាកម្លាំងអមតៈ កំពុងរីករុងរឿងយ៉ាងចេញមុខក្នុងសង្គមសម័យនេះ។ លោក ហ៊ុន សែន កំពុងត្រវីកាំភ្លើងដែលខ្លួនមិនទាន់ជឿថា "មានកម្លាំងគ្រប់គ្រាន់" ដូចគ្នានឹងទ័ពអង់គ្លេស សម រង្ស៊ី-កឹម សុខា ដូចជា មហាត្មៈគន្ធី ដែលដឹកនាំប្រកបដោយជំនឿរំដោះពលរដ្ឋឥណ្ឌាពីអនានិគមអង់គ្លេស លោក ហ៊ុន សែន គួរតែចាំថា នរណាជាអ្នកឈ្នះ? បើចង់ចាំ? ដំណោះស្រាយរបៀបអង់គ្លេសអាចរួមរស់ជាមិត្តយូរអង្វែងរបស់ប្រជាជាតិខ្មែរបាន បើមិនចាំទេ? មិនត្រឹមតែ ហ៊ុន សែន ទេ ទោះជាក្រុមគ្រួសារនឹងក្រុមមិត្តក៏នឹងក្លាយជាក្រុមខ្មែរក្រហមទីពីរដែលរលាយទាំងខ្លួននឹងអនាគតដែលខំកសាងយ៉ាងលំបាកយូរមកហើយបាត់សូន្យឈឹង ៕

## តមកពីទំព័រទី ២៦ ចំណីដែលកោសិកាមហារីកត្រូវការ...

វត្ថុបំពេញបន្ថែមផ្សេងទៀត មានដូចជាវិតាមីនអ៊ី (Vitamin E) មានភារកិច្ចរៀបចំទុកដាក់( ភាសាអង់គ្លេសហៅថា Apotosis) នូវកោសិកាស្លាប់, គឺជាភាគមិនត្រូវការរបស់រាងកាយនេះ គឺជាវិធីសាមញ្ញធម្មតារបស់រាងកាយក្នុងការរៀបចំទុកដាក់នូវកោសិកាឬស ឬកោសិកាដែលត្រូវការ ។

១៥-ជំងឺមហារីកជាជំងឺរបស់ចិត្ត ឬអារម្មណ៍ផង, របស់រាងកាយផង និងជារបស់ស្មារតីផងដែរ ។ ការពង្រឹងស្មារតី ឬកែប្រែស្មារតីឱ្យក្លាយជាជាស្មារតីវិជ្ជមានអាចនឹងជួយអ្នកចំបាំងប្រឆាំងនឹងជំងឺមហារីកក្លាយជាអ្នកមានជីវិតរស់នៅបាន គឺថារួចផុតពីមរណា ។ ក្តីក្រោធ,ភាពមិនចេះអត់ឱន, ភាពជូរចត់បានជំរុញរាងកាយយើងឱ្យត្រាំត្រែងនៅក្រោមសម្ពាធនៃការកង្វល់ទុក្ខព្រួយនឹងស្ថិតនៅក្នុងបរិស្ថានអាស៊ីត ។ ចូរខំប្រឹងបណ្តុះស្មារតីនៃក្តីមេត្តា, សណ្តុះប្រណី ។ ចូរចេះបន្ធូរនូវអារម្មណ៍ ហើយចូរចេះសប្បាយរីករាយនឹងជីវិត ។

១៦-កោសិកាមហារីកមិនអាចរីកដុះដាលក្នុងបរិស្ថានសម្បូរអុកស៊ីហ្សែនឡើយ : ហាត់ប្រាណរៀងរាល់ថ្ងៃ និងការដកដង្ហើមវែងនាំឱ្យទទួលបន្ថែមបានច្រើននូវចំនួនអុកស៊ីហ្សែនចូលដល់គ្រប់កោសិការនៃរាងកាយ ។ ឯវិធីព្យាបាលដោយប្រើអុកស៊ីហ្សែននោះក៏ជាមធ្យោបាយល្អមួយសម្រាប់កំទេចកោសិកាមហារីកដែរ ។

តទៅលេខក្រោយ

## តមកពីទំព័រទី ២៥ វិនាទីអាថ៌កំបាំងកុនខ្មែរអាមេរិកាំង...

ការសម្ងាត់រង់ចាំឱ្យទស្សនិកជនទទួលបានទទួលចំណីចក្ខុដ៏ល្អមួយនេះ ដោយផ្ទាល់នៅពេលដែលពួកគេមកទស្សនាកុនមួយនេះ ចាប់ពីថ្ងៃសុក្រទី៦ ខែកញ្ញា ឆ្នាំ២០១៣ នេះតទៅបញ្ចាំងនៅរោងកុនស្យូខេស (Showcase) ក្រុងឡូវែលរយៈពេលមួយសប្តាហ៍។ ក្នុងចំណោមសហផលិតករដែលមានលោក ធី យ៉ាន (Thy Yan) កុននេះចម្រាញ់ដោយចម្រុះផលិតករដែលជាជាងគំនូរ តន្ត្រីករ អ្នកថតរូប និងអ្នកផលិតកុនសុទ្ធសឹងជាខ្មែរសញ្ជាតិអាមេរិកកាំង។ តាមប្រសាសន៍របស់លោក ធី យ៉ាន (Thy Yan) កុននេះចំណាយពេលមួយឆ្នាំក្នុងការថត និងផលិត។ លោកបន្តថា ត្បិតកុននេះផលិតដំបូងឧបសគ្គក្នុងការថតក៏មានច្រើន ដូចជាកូនខ្មែរអាមេរិកាំង និងអ្នកភូមិឡូវែលមានឧបនិស្ស័យក្នុងការសម្តែងដែលត្រូវបានជ្រើសរើសជាតួសម្តែងនោះពុំធ្លាប់មានបទពិសោធន៍ថតកន្លងមកទេ ចំណែកឯឈុតមួយចំនួនដែលធ្លាប់បានថតកន្លងមក និងសម្រេចថាយកជាការហើយត្រូវថតសារឡើងវិញ ព្រោះរាល់ពេលតួសម្តែងថ្មីៗទាំងអស់នេះអភិវឌ្ឍសម្ថភាពសម្តែងខ្ពស់ឡើងៗ ដែលតម្រូវឱ្យមានការពិចារណាក្នុងការថតជាថ្មី ។ សហផលិតកររូបនេះមិនទាន់ហ៊ានអះអាងថា ស្នាដៃដំបូងរបស់ពួកគេនឹងទទួលជោគជ័យ ឬយ៉ាងណាឡើយ តែលោកបញ្ជាក់ថាលទ្ធផលបែបណាលោក និងក្រុមការងារសប្បាយចិត្តទទួលយក ព្រោះយ៉ាងហោចណាស់ខ្មែរនៅឡូវែលជំនាន់ក្រោយមានឱកាសបង្ហាញសមត្ថភាពសម្តែងឱ្យឃើញមួយផ្នែកនៃវប្បធម៌សាសនាខ្មែរ ជំនឿ ដូងព្រលឹង វិញ្ញាណតថភាពសហគមខ្មែរនៅអាមេរិកជាសាធារណៈដល់មជ្ឈដ្ឋានទាំងអស់ទាំងខ្មែរទាំងអាមេរិកកាំងបានជ្រាប។ យ៉ាងណាមិញលោកសង្ឃឹមថា ការផលិតកុននេះ ជាការលើកទឹកចិត្តខ្ពស់ និងផ្តល់ឱកាសឱ្យពន្លកថ្មីៗដែលជាខ្មែរអាមេរិកកាំងជំនាន់ក្រោយទាំងនេះឈានទៅកាន់ហូលីវូដ ៕



# ទៅលេងភ្នំបូកគោ ជារមណីយដ្ឋានឋានសួគ៌?

ផ្លែធូរេនដ៏ធំមួយផ្លែនេះប្រឹងរំលេចខ្លួន ទទួលស្វាគមន៍ភ្ញៀវទេសចរតែផ្ទុយទៅវិញ

មានដើមឈើធំៗដែលជាជម្រកសម្រាប់សត្វព្រៃ និងប្រជាពលរដ្ឋដែលរស់នៅអាស្រ័យ








ទេសចរទាំងឡាយហាក់មើលរំលងនេះដោយសារតែនៅខេត្តកំពតមានរមណីយដ្ឋានជាច្រើនពោរពេញទៅដោយភាពទាក់ទាញ ដូចជារមណីយដ្ឋានភ្នំបូកគោជាដើម ។

រមណីយដ្ឋានភ្នំបូកគោស្ថិតនៅក្នុងស្រុកទឹកឈូចម្ងាយប្រមាណ៤២គីឡូម៉ែត្រពីទីរួមខេត្តកំពត និងបានក៏សាងឡើងនាសម័យអាណានិគមនិយមបារាំងនៅឆ្នាំ១៩២២ ក្នុងរាជកាលព្រះបាទស៊ីសុវត្ថិ ហើយកាលពីសម័យនោះភ្នំបូកគោជារមណីយដ្ឋានដំពេញនិយមរបស់ពួកបារាំង ។

បច្ចុប្បន្នរមណីយដ្ឋានភ្នំបូកគោ គឺជាទីដែលភ្ញៀវទេសចរជាតិ និងអន្តរជាតិតែងតែចូលទៅសម្រាកលំហែកាយពេលដែលពួកគេបានទៅលេងនៅខេត្តកំពត ។ រមណីយដ្ឋានមួយនេះអាចទាក់ទាញការចាប់អារម្មណ៍ពីភ្ញៀវទេសចរបានដោយមានអំណោយផលពីធម្មជាតិដូចជានៅលើកំពូលភ្នំដែលមានកំពស់១០៧៥ម៉ែត្រ និងអាកាសធាតុដ៏សែនត្រជាក់យើងអាចមើលឃើញទេសភាពដ៏ស្រស់ត្រកាល បីដូចជាឋានសួគ៌ និងមានគ្របដណ្តប់ទៅដោយពពកក្រាសៗ យើងអាចយកដៃទៅប៉ះបានថែមទៀតផង ។ ភ្ញៀវទេសចរគ្រប់រូបអាចមើលឃើញក្រុងកំពត ឆ្នេរកែប ខេត្តព្រះសីហនុ និងទឹកសមុទ្រដែលមានពណ៌ខៀវស្រងាត់គួរជាទីរំសាយចិត្តបាត់អស់រាល់ក្តីកង្វល់ទាំងឡាយ ។

ជាងនេះទៅទៀត រមណីយដ្ឋានភ្នំបូកគោផលត្រង់តំបន់ចង្កេះភ្នំលើសពីនេះមានទឹកជ្រោះដ៏ស្រស់ស្អាតបូករួមនឹងផ្ទាំងថ្មធំៗគួរជាទីចាប់ចិត្តជិតអារម្មណ៍សម្រាប់ភ្ញៀវទេសចរគ្រប់រូប ។

រមណីយដ្ឋានភ្នំបូកគោនៅមានកន្លែងកម្សាន្តជាច្រើនទៀតដូចជា ទឹកធ្លាក់ពពកវិល និងតំណាក់របស់អតីតព្រះមហាក្សត្រខ្មែរ ព្រះអង្គស៊ីសុវត្ថិ មុនីវង្ស ដែលគេអះអាងថា ជាទីដែលទ្រង់សោយទិវង្គតជាដើម ៕



